ការិយាល័យមេធាវីខ្មែរ
LAW OFFICE OF
Stewart H. Lim & Associates
ពិគ្រោះយោបល់ដោយមិនគិតថ្លៃ
▸ច្បាប់គ្រោះថ្នាក់ចរាចរ, សំណងប្រាក់ចិញ្ចឹមកូន, ច្បាប់អន្តោប្រវេសន៍, បណ្តឹងលែងលះ, សេដ្ឋកិច្ចក្ស័យធន
▸បណ្តឹងមរតក, ការការពារក្តី
Stewart H. Lim
Car Accident, Child Support, Immigration, Divorce, Bankruptcy, Living Trust, Defense you in Court
Main Office
100 Oceangate Blvd., Suite 1200, Long Beach, CA 90802
(562) 590-7181
FREE CONSULTATION

Khmer Post
# ខ្មែរប៉ុស្តិ៍
# Khmer Post

ឱសថស្ថាន ខ្មែរថ្ងៃនេះ
Today Pharmacy
សូមស្វាគមន៍ !
Fast and Friendly Service
Today Pharmacy
FREE DELIVERY
•ទទួលយកទៅ Medicare & Medical និង Insurance ។
2200E. Anaheim St. #C Long Beach, CA 90804
Tel: (562) 438-2031 . Fax: (562) 438-2031
(2 Blocks East of Cherry Ave.)

KHMER BILINGUAL BIWEEKLY NEWSPAPER

VOLUME 02 | ISSUE 09 | February 16st - 29th 2008 | ADVERTISING (562) 313-2129 | WWW.THEKHMERPOST.COM

# អាជ្ញាធរ Long Beach ប្រយុទ្ធប្រឆាំងពួកក្រុមយុវជន

## •ក្មេងខ្មែរក៏មានមិនតិចនាក់ទេដែលធ្លាក់ខ្លួនជាក្មេងយុវជន

***ដោយ : មាជ សុវណ្ណារ៉ា***

ពេលថ្មីៗក្រុមសភាទាំង២របស់សភាអាមេរិក បានយល់ព្រមជួយដល់អាជ្ញាធរក្រុង Long Beach នូវកញ្ចប់ថវិកា ដើម្បីប្រយុទ្ធប្រឆាំងទៅនឹងក្រុមយុវជន ដែលបង្កអំពើហិង្សានូវអសន្តិសុខ និងការភ័យខ្លាចរបស់ប្រជាជន ដែលក្នុងនោះមានសហគមន៍ ( តទៅទំព័រទី១២ )

អភិបាលរដ្ឋ & ព្រឹទ្ធសភា California

## ជីវិត និងការតស៊ូ
## "សម្លេងខ្ញុំនាំជីវិតឱ្យជោគជ័យ"

***ដោយ : រ៉ាតាច***

ចំពោះ ប៉ាង លីណា នៅក្នុងសហគមន៍ខ្មែរ Long Beach អ្នកណាក៏ស្គាល់នាងថា អ្នកចម្រៀងដែលមានសម្លេងទឹកដមក្រអួនពិរោះក្នុងការបំពេរអារម្មណ៍អ្នកដែលបានទៅកំសាន្ត នៅរង្គសាលនាគព័ន្ធ (Dragon House) ។ មិនតែប៉ុណ្ណោះ ប៉ាង លីណា បានបង្ហាញនូវសំលេងឯកតួស្រីក្នុងកុនចិន របស់ក្រុមហ៊ុននាងផ្ទាល់ឈ្មោះក្រុមហ៊ុនសិលាផ្កាយព្រឹក ។ ប៉ាង លីណា ជាម្ចាស់ក្រុមហ៊ុនផង និងក៏ជាអ្នកបញ្ចូលសម្លេងតួឯកស្រីខ្លួនឯងទៀត គឺថាជារឿងអស្ចារ្យសំរាប់ស្ត្រីភេទ ។ ( តទៅទំព័រទី២៨ )

## ទិចារណកថា
## សន្និធិនាស់

***ដោយ : ពិន សំខុន***

"ដង្ហែរក្បួនព្យុហយាត្រានៃពិធីបុណ្យចូលឆ្នាំខ្មែរ ២០០៨ នេះ និងមានតំណាងនៃរដ្ឋាភិបាល លោក ហ៊ុន សែន ចូលរួមជាអធិបតី" ។ សេចក្តីសម្រេចរបស់គណៈកម្មការក្រុងខ្មែរ នាពេលនេះ បានបណ្តាលឱ្យមានប្រតិកម្មខ្លាតធំមួយ ដែលនឹងធ្វើឱ្យកំណើតនៃក្រុងខ្មែរ នៅទីក្រុងឡុងប៊ិចរបូសជាដំបូងបង្អស់ ( តទៅទំព័រទី០៩ )

PHNOM PENH express
ក្រុមហ៊ុនទទួលផ្ញើប្រាក់ និងលក់សំបុត្រយន្តហោះ
( តទៅទំព័រទី១៦ )

Law Offices of Boroth Chay
•មេធាវីខ្មែរមានបទពិសោធន៍ខ្ពស់ក្នុងករណីក្តីនៃគ្រោះថ្នាក់រថយន្ត, រដ្ឋប្បវេណី, អន្តោប្រវេសន៍ ។
•ពិគ្រោះយោបល់ដោយមិនគិតថ្លៃ, បើមិនឈ្នះក្តីអត់យកលុយ
No Recovery . No Fees !
New Location
2501Cherry Ave, Ste.245, Signal Hill, CA 90755
Office: (562) 997- 8500 . Direct : (562) 453 - 5898

TOP AUTO INSURANCE AGENCY
Free Quote, Low Rates, LOW MONTHLY
AUTO-LIFE-HEALTH-HOME-COMMERCIAL
⇒រថយន្ត ⇒ជីវិត ⇒សុខភាព ⇒គេហដ្ឋាន ⇒ហាងពាណិជ្ជកម្ម
នាងខ្ញុំនិយាយភាសាខ្មែរ សូមទូរស័ព្ទទាក់ទង
Tel: (562) 989-1800
Tiffany Prak
Agent/Broker Lic.0E44334
2760E. Spring St., Ste 140 . Long Beach, CA 90806

FARMER INSURANCE
Douglas Horn Agency
License #0B83665
Life Insurance, Home Insurance, Business Insurance, Auto Insurance, Health Insurance, One Stop Service, Bail Bond,
1360E Anaheim St, Ste 203, Long Beach CA 90813
Tel: (562) 591- 3100 Fax : (562) 591- 3911

ក្រុមហ៊ុនធានារ៉ាប់រង
State Farm
STATE FARM INSURANCE
Peter Kong Insurance Agency
■ Business Liability Insurance ■ ធានារ៉ាប់រងទទួលខុសត្រូវលើហាងពាណិជ្ជកម្ម
■ Auto Insurance ■ ធានារ៉ាប់រងរថយន្ត
■ Home Insurance ■ ធានារ៉ាប់រងគេហដ្ឋាន
■ Life Insurance ■ ធានារ៉ាប់រងជីវិត
■ Health Insurance ■ ធានារ៉ាប់រងសុខភាព
■ Apartement Insurance ■ ធានារ៉ាប់រងល្វែងអាគារ
■ Disability Insurance ■ ធានារ៉ាប់រងពិការភាព
■ Family & Individual Coverage ■ ធានារ៉ាប់រង បុគ្គល និងគ្រួសារ
(Notary Public)
Savannara + Sokha
2750E. Spring Street, Suite 201, Long Beach, CA 90806
Tel: (562) 426-9189 Fax: (562) 426-4669




# ក្រុមហ៊ុនអង្គរទេសចរណ៍

# Angkor Travel



**ការជ្រើសរើសតែមួយគត់សំរាប់ធ្វើដំណើរទៅកាន់ប្រទេសកម្ពុជា**

- ទទួលបំរើកិច្ចការធ្វើដំណើរក្នុងសហរដ្ឋ និងអន្តរជាតិ ។
- តម្លៃសំបុត្រលក់ចុះថ្លៃជាពិសេសសំរាប់ការធ្វើដំណើរក្នុងស្រុកចេញពីចំណតយន្តហោះ LAX ទៅកាន់គ្រប់ទីក្រុងក្នុងសហរដ្ឋអាមេរិក ។
- មានលក់កាកសំរាប់ទូរស័ព្ទផ្ញើពិភពលោក ( លក់ដុំ និងលក់រាយ) ។
- ទទួលធ្វើ Re-Entry Permit លិខិតឆ្លងដែន ។
- ទទួលធ្វើ Re-Entry Permit ប្រញាប់ជូនភ្លាមៗ!!!
- ជួយរកតម្លៃសំបុត្រយន្តហោះថោកជាងគេទៅស្រុកខ្មែរតាមរយៈក្រុមហ៊ុន Eva Air , Cathay Pacific,Malaysia Air , Singapore Air.

**បើលោកអ្នកចង់ដឹងតម្លៃពិសេស សូមអញ្ជើញទាក់ទងនាងខ្ញុំ**

**Tel: (562) 599-0877 , Fax: (562) 599 4758**

1569E, Anaheim St.,C Long Beach ,
CA 90813 (កាច់ជ្រុងផ្លូវ Anaheim & Walnut)

## Cellphonatic

Wireless Super center

យើងខ្ញុំមានលក់កាកទូរស័ព្ទ ទិញដាក់បញ្ចូលទឹកលុយទៅក្នុងទូរស័ព្ទដៃ និងទូរស័ព្ទនៅផ្ទះបានភ្លាមៗ!!!

NO CONNECTION FEE !
NO EXPIRATION DATE !

metroPCS No te limites.

FREE PHONE !!!

តម្លៃត្រឹមតែ $30 ក្នុងមួយខែ !



# TOYOTA

TOYOTA






CHUCK CHET
Cambodian Sale Manager



LINDA HING




- គ្មានក្រេឌីត, ខូចក្រេឌីត, ក្ស័យធន, អត់មានបញ្ហា
- យើងខ្ញុំជួយសំរួលកិច្ចការជូនលោក-អ្នក
- យើងខ្ញុំជាខ្មែរ មានបទពិសោធន៍ជាង 20 ឆ្នាំ ជាមួយជំនាញលក់ឡាន និងមានទំនាក់ទំនងល្អ ក្នុងសហគមន៍ខ្មែរ ។
- សូមមេត្តាទូរស័ព្ទផ្ទាល់មកលេខខ្ញុំ : (562) 325-9647 បើលោកអ្នកមានបំណងចង់ទិញឡានពីក្រុមហ៊ុន TOYOTA យើងខ្ញុំ ។







## UP TO $4.000 Rebate



4401E. Pacific Coast Highway Long Beach, CA 90804
Phone: (562) 494- 4444 / Fax: (562) 494-1350

# DARANY'S FASHION



**ហាងយើងខ្ញុំមានលក់**

.Beauty Suplies . Phone Card .

ម្សៅលាបបំបាត់មុន.ជាំមុខ. ឡេចិញ្ចឹមស្បែកឱ្យបានស្អាត

ហាងយើងខ្ញុំមានសំលៀកបំពាក់ខ្មែរដែលរចនាម៉ូដដោយជាងចំណានៗ ធ្វើពីហូល ផាមួង និងក្រណាត់ចាក់ មានតុបតែងមុខសំរាប់ពិធីផ្សេងៗ.មានលក់ថ្នាំបញ្ចុះទម្ងន់ មានទទួលផ្ញើរគីវ៉ាន់ និងគ្រឿងសម្ភារៈផ្សេងៗទៅកាន់ស្រុកខ្មែរ ។

.ថ្នាំម៉ាស្សាត្រាំទឹកដោះគោ .ឡេម្សៅល្មៀតលាបខ្លួន

.គ្រឿងអលង្ការធ្វើពីប្រាក់ .គ្រឿងលំអគ្រប់ប្រភេទ

Cambodian Night Club & Restaurant

Dragon House

101 Alamitos Avenue, Long Beach, CA 90801 • Tel: (562) 437-3303

Starts @7:00 pm-2:00 am

**Valentine's Day Party**

**Fri., Feb. 15, 2008**

ADMISSION : $15/person

Pre-Sale Ticket is sold at DARANY Fashion (562) 786-2095 (562) 438-2488

I Love YOU

Sodany

Patrick

YAN DA
Singer from Australia

YEM SAMONN
Karaoke Star & Singer from Cambodia

**បញ្ចុះតម្លៃ ពិសេស ១៥%**



**សូមអញ្ជើញ ទៅហាងយើងខ្ញុំ ដោយមេត្រី!**




2201E. Anaheim St.# 102 . Long Beach, CA 90804

Store : (562) 438-2488 . Cell: (562) 786-2095

# បោះឆ្នោតរកយុត្តិធម៌ឱ្យព្រះសង្ឃ ត្រូវគេចោទថាខុស ?

*ដោយ ៖ មាជ សុវណ្ណារ៉ា*

ពុទ្ធបរិស័ទរាប់រយនាក់ចម្រុះក្មេងចាស់ មិនថា ប្រុសស្រី រហូតដល់អ្នកពិការជរាកាន់ឈើច្រត់ និងអ្នកខ្លះទៀតនោះ មានជម្ងឺប្រចាំកាយក៏ដោយ ក៏ពួកគាត់ទាំងនោះបាននាំគ្នាទៅកាន់ទីវត្ត អាយរ៉ាប់ តាំងពីព្រលឹមក្នុងបំណងប្រាថ្នាគោរពតាមគោលការណ៍លក្ខន្តិកៈរបស់ពុទ្ធិកសមាគមខ្មែរ វត្តវិបស្សនារាម ធ្វើការបោះឆ្នោតជ្រើសរើសគណៈកម្មការវត្តថ្មី ដើម្បីឱ្យស្របច្បាប់ សំរាប់បំរើកិច្ចការវត្ត ពិសេសបំរើដល់ផ្លូវព្រះពុទ្ធសាសនា ដែលមានព្រះសង្ឃជាតំណាងទីសក្ការៈនៃយើង ដោយភាពយុត្តិធម៌ ។ ថ្ងៃទី២៧ ខែមករា ឆ្នាំ២០០៨ គឺជាថ្ងៃបោះឆ្នោតជាប្រចាំឆ្នាំ ក្នុងលក្ខន្តិកៈច្បាប់វត្ត ដែលគណៈកម្មការចាស់អត់អនុវត្តមក ១១ឆ្នាំ ។ ថ្ងៃនេះទិដ្ឋភាពត្រូវបានប្រទះភ្នែកឃើញពុទ្ធបរិស័ទមិនតិចជាង៥០០នាក់ បានទៅកាន់ទីវត្តអារាម ក្រោយអាកាសធាតុត្រជាក់ខ្លាំង ដែលលាយឡំនឹងដំណក់ទឹកភ្លៀងរាប់ម៉ោង ។ ហើយបើទោះបីភ្លៀងបានធ្លាក់ជោគជាំនាឱកាសនោះក៏ដោយ ក៏នៅតែមានក្រុមពុទ្ធបរិស័ទឆ្លៀតបាំងឆ័ត្រ នាំគ្នាទៅចូលរួមការបោះឆ្នោតដោយភាពមោះមុត ។

ក្រុមពុទ្ធបរិស័ទជាច្រើននាក់ សុទ្ធតែនិយាយដូចៗគ្នាថា ការដែលពួកគាត់មកបោះឆ្នោត ក៏ព្រោះពួកគាត់ឈឺចិត្តក្នុងនាមជាពុទ្ធសាសនិកជន ដែលមើលឃើញគណៈកម្មការវត្តចាស់ ដែលដឹកនាំដោយលោក ពៅ សាវ៉ន បានធ្វើបាបព្រះសង្ឃ ។ ដូច្នេះយើងជាពុទ្ធបរិស័ទ ត្រូវតែរកយុត្តិធម៌ជូនដល់ព្រះសង្ឃ ទើបនាំគ្នាមកបោះឆ្នោត ព្រោះទី

( តទៅទំព័រទី០៧ )



នាំគ្នាដើរកាត់ភ្លៀងទៅបោះឆ្នោត





ឡាន Police មកមើលការពារថ្ងៃបោះឆ្នោត



ទិដ្ឋភាពក្នុងថ្ងៃបោះឆ្នោត





# គណបក្សសិទ្ធិមនុស្សអំពាវនាវ ឱ្យក្រៅស្រុករួមដៃជាមួយបក្សខ្លួន

*ដោយ ៖ ស្រីនាថ*

មន្ត្រីជាន់ខ្ពស់នៃគណបក្សសិទ្ធិមនុស្សបានអំពាវនាវដល់បងប្អូនខ្មែរ-អាមេរិកាំង ឱ្យចូលរួមជាមួយបក្សខ្លួន មិនថា ទាំងអ្នកមានចំណេះដឹង ឬអ្នកមានទ្រព្យធនក្តី ក្នុងការប្រកួតប្រជែងយកជ័យជំនះ សំរាប់ការបោះឆ្នោតសកលជិតឈានមកដល់ នាខែកក្កដាឆ្នាំ២០០៨។

អគ្គលេខាធិការគណបក្សសិទ្ធិមនុស្សលោក អ៊ូ ច័ន្ទរ័ត្ន បានថ្លែងនៅក្នុងពិធីជួបជុំជាមួយសកម្មជនរបស់ខ្លួន នាទីក្រុង Long Bach កាលពីចុងខែមករា បានឱ្យដឹងថា យោងតាមគោលការណ៍ និងលក្ខន្តិកៈរបស់គណបក្សសិទ្ធិមនុស្សឃើញថា បងប្អូនអាចចូលរួមធ្វើការជាមួយគ្នាបាន ដោយយកប្រជាពលរដ្ឋជាធំ ហើយប្រធានគណបក្សមានអំណាចតាមការកំណត់ ដែលមិនអាចធ្វើអ្វីតាមតែអំពើចិត្ត ។ ដូច្នេះយើងសូមអំពាវនាវចំពោះបងប្អូននៅក្រៅស្រុក ជាពិសេសខ្មែរនៅសហរដ្ឋអាមេរិក សូមមេត្តាចូលរួមជាមួយគណៈបក្សសិទ្ធិមនុស្ស ដើម្បីជាកម្លាំងនយោបាយជំរុញដល់អ្នកក្នុងស្រុក ដែលវាជាឥទ្ធិពលនយោបាយអន្តរជាតិ សំរាប់នាំទៅរកភាពជោគជ័យក្នុងការបោះឆ្នោតនាថ្ងៃខាងមុខ ។

លោក អ៊ូ ច័ន្ទរ័ត្ន បន្តថា គណបក្សនយោបាយមួយនេះ នឹងមិនធ្វើឱ្យបងប្អូនខកបំណង ដើរខុសទិសដៅ ដូចគណបក្សនយោបាយមុនៗនោះទេ ។ ដែលពួកគេបានក្បត់ឆន្ទៈរបស់ប្រជារាស្ត្រឃើញសំភារៈនិយមជាធំ ប្រព្រឹត្តអំពើពុករលួយជិះជាន់រំលោភបំពានដីធ្លីប្រជាជន បង្កអសន្តិសុខសង្គម បើកនូវបនល្បែង បារ៍ Karaoke ស្រីខូច គ្រឿងញៀន និងក្រុមក្មេងយូកូង ដែលជាមុខព្រួញគណបក្សសិទ្ធិមនុស្សត្រូវតែបោសសំអាត ដើម្បីឱ្យសង្គមមួយដែលស្អាតស្អំរស់នៅដោយការគោរពសិទ្ធិមនុស្សប្រកាន់យករបបលទ្ធិប្រជាធិបតេយ្យតាមនិតិរដ្ឋ ។



លោក អ៊ូ ច័ន្ទរ័ត្ន អគ្គលេខាធិការគណបក្សសិទ្ធិមនុស្ស

ពួកអ្នកតាមដាននយោបាយកម្ពុជា នៅទីក្រុង Long Bach ភាគច្រើនហាក់អស់ជំនឿ ចំពោះគណបក្សនយោបាយ ដែលតាំងខ្លួនជាអ្នកប្រជាធិបតេយ្យ ក្នុងការប្រយុទ្ធប្រឆាំងជាមួយគណៈបក្សរបស់ ហ៊ុន សែន ព្រោះទីបំផុត គណបក្សនយោបាយទាំងនោះ បង្កើតជម្លោះតែក្នុងរង្វង់ផ្ទៃក្នុងខ្លួនឯង

( តទៅទំព័រទី០៧ )

Jim Suos
Realtor, Loan Consultant
jimsuos@hotmail.com
Fax (562) 426-1880
(562) 427-0767

First
AMERICAN TEAM REALTY ™

ក្រុមហ៊ុនលក់-ទិញគេហដ្ឋាននិងខ្ចីប្រាក់

Cell: (562) 884-0892

ជំនាញឯកទេសជាទីទុកចិត្តនិងស្មោះត្រង់ចំពោះលោក-អ្នកក្នុងការរកស៊ី
លក់ដូរពិគ្រោះយោបល់ ជាមួយបទពិសោធន៍ជាង១២ឆ្នាំក្នុងកិច្ចការលក់-ទិញ
ផ្ទះ-ហាងជំនួញ និងខ្ចីលុយព្រមទាំងផ្នែកសាងសង់សំណង់ជិត៣០ឆ្នាំ

LONG BEACH
2501 CHERRY AVE. SUITE100
SIGNAL HILL, CA 90755

LOS ALAMITOS
10704 LOS ALAMITOS BLVD.
LOS ALAMITOS, CA 90720

HUNTINGTON BEACH
2100 MAIN ST. STE.225
HINTINGTON BEACH, CA 92648

# វត្តព្រះពុទ្ធរង្សីកំពុងសំដែងបដិហារ

**ដោយ : ពិន សំខុន**

វត្តព្រះពុទ្ធរង្សី នៅហ្វីឡាដែលហ្វីយ៉ា ជ្រុងផ្លូវលេខ៦ និង Ritner បានផ្សព្វផ្សាយអំពីកម្មវិធីមួយចំនួន ជូនដល់សហគមន៏របស់ខ្លួន ដូចជាថ្នាក់បង្រៀ ន ភាសាអង់គ្លេសថ្នាក់បង្រៀនភាសាខ្មែរថ្នាក់បង្រៀនរបាំបូរាណខ្មែរថ្នាក់បង្រៀនពីកុំព្យូទ័រ ថ្នាក់រៀនយល់ពីព្រះពុទ្ធសាសនា... ។ល ។ សកម្មភាពនេះ បានធ្វើឱ្យពលរដ្ឋក្នុងសហគមន៏ មានការចាប់អារម្មណ៏ ហើយនិយាយពីការខិតខំប្រឹងប្រែងនេះគ្រប់ៗគ្នា។ ប៉ុន្មានពីរបីខែចុងក្រោយនេះ ព្រះគ្រូចៅអធិការ មុនី រតនា និងភក្ខុវ័យក្មេងៗបានខិតខំបង្ហើយកសាងវត្ត និងវិហារផង ខិតខំបង្កើតសកម្មភាពជួយស្មារតីប្រជាពលដ្ឋខ្លួនផង យ៉ាងស្វាហាប់ ។ ផ្ទុយនឹងចរន្តគំនិតស្តីអំពីវត្តអា-រាម កាលពីឱកាសមុន វត្តព្រះពុទ្ធរង្សី បានបង្ហាញពីមុខមាត់ថ្មី ហើយលើកកម្ពស់ក្រុមអ្នកជឿសាសនាព្រះពុទ្ធថា "ពុំមែនធ្វើបុណ្យសំរាប់តែអនាគតជាតិតែប៉ុណ្ណោះទេ គឺត្រូវធ្វើសំរាប់បច្ចុប្បន្នជាតិនេះ ជាពិសេស" ។ កាលពីមុនគេតែងនិយាយថា វត្តអារាមនៅហ្វីឡាដែលហ្វីយ៉ា" នេះ គឺជាកន្លែងធ្វើ "បុិសីណេស" ពុំមែនច្បាស់ជាកន្លែងសំរាប់រំងាប់ចិត្ត ឬធ្វើចិត្តឱ្យស្ងប់ស្ងាត់អ្វីនោះទេ ។ សកម្មភាពថ្មីនេះ គឺជាសកម្មភាពវត្ត ដែលមានបំណងប្រាថ្នាខ្ពស់ ពុំដែលមានពីមុនមកនៅវត្តផ្សេងៗ និងនៅក្នុងវត្តក្រុងដែលសំបូរដោយអំពើហិង្សានោះទេ ។ កាលពីរដូវក្តៅឆ្នាំមុន វត្តព្រះពុទ្ធរង្សី



ព្រះសង្ឃគង់នៅវត្តព្រះពុទ្ធរង្សី

បានបំបួសនេនច្រើនអង្គ សំរាប់រយៈពេលមួយខែ ដើម្បីបង្ហាត់បង្រៀនពីព្រះធម៌ និងវិន័យជាសង្ឃ ។ ឆ្នាំថ្មីនេះ កម្មវិធីបំបួសនេន នៅតែបន្តដដែល ហើយកម្មវិធីថ្មីៗទៀត បានបង្កើតឡើង តាមសេចក្តីត្រូវការរបស់សហគមន៏ ។

ព្រះគ្រូចៅអធិការ មុនី រតនា មានសង្ឃដីកាថា "សកម្មភាពបើកជូនសហគមន៏នេះ ធ្វើឡើងដោយសារសទ្ធាររបស់ឧបាសក-ឧបាសិកា សុទ្ធសាធពុំមានប្រាក់ជំនួយពីរដ្ឋនៅឡើយទេ" ។ ( តទៅទំព័រទី៣០ )

# ជំនឿនៃការសែនព្រេនក្នុងថ្ងៃបុណ្យចូលឆ្នាំចិន_វៀតណាម

**ដោយ : គីម សារឿន**

ជនជាតិចិន មានចំនួនច្រើនជាងគេនៅលើពិភពលោកបានធ្វើចំណាកស្រុកទៅរស់នៅស្ទើរគ្រប់ប្រទេស ហើយប្រកាន់ភ្ជាប់នូវទំនៀមទំលាប់ប្រពៃណីពីបុរាណ ។ ជាពិសេសថ្ងៃបុណ្យចូលឆ្នាំ ចិន-វៀតណាមគេសង្កេតឃើញមានរៀបចំគ្រឿងតង្វាយម្ហូបអាហារនំចំណីដើម្បីទទួលទេវតាឆ្នាំថ្មី និងឧទ្ទិសកុសលចំពោះព្រលឹងបុព្វការីជនដែលបាន ចែកឋានក្នុងបំណងសូម សេចក្តីសុខសប្បាយ និងជួយថែរក្សាកូនចៅឱ្យរកស៊ីមានបានយសស័ក្តិថ្កុំថ្កើង ។



ពិធីបុណ្យចូលឆ្នាំចិន-វៀតណាមច្រើនប្រព្រឹត្តិទៅនៅខែ មករា ឬខែកុម្ភៈជារៀងរាល់ឆ្នាំ ហើយគេសង្កេតឃើញប្រជាជនចិន និងកូនចៅកាត់ចិន ដែលរស់នៅក្នុងប្រទេស និងក្រៅប្រទេសបានរៀបចំសំអាតផ្ទះសំបែង ទិញផ្កាភ្លី គ្រឿងឧបភោគបរិភោគ សំរាប់សែនព្រេន ជាពិសេស ផ្កាអង្គាសិល និងផ្លែឈើដែលតំណាងឱ្យភាពរុងរឿងថ្កើងថ្កានក្នុងជីវិត ។ ពិធីនេះ មិនថាតែនៅប្រទេសចិនទេ សូម្បីតែនៅស្រុកខ្មែរកូនចៅចិនកាត់ខ្មែរមួយចំនួនធំ ក៏បានត្រៀមខ្លួនធ្វើពិធីនេះដែរ ទាំងនៅទីប្រជុំជន និងតំបន់ដាច់ស្រយាល នៅតាមផ្ទះរបស់ខ្លួនយ៉ាងគគ្រឹកគគ្រេង ។

លើសពីនេះទៀត នៅថ្ងៃនោះមន្ត្រីរាជការ សិស្សសាលា ដែលមានឈាមជ័រកាត់ចិនមួយចំនួនធំ មិនទៅធ្វើការ ឬចូលសាលាទេ ដោយយកលេសថា រវល់នៅសែនព្រេនឱ្យកុងម៉ាសូម្បីតែនៅតាមទីផ្សារ ក៏មិនសូវមានអ្នកលក់ដូរដែរ ព្រោះគេត្រណមខ្លាចដូនតាខឹង ជាហេតុនាំឱ្យធ្លាក់ឆ្លងក្នុងបររកស៊ីចិញ្ចឹមជីវិត

( តទៅទំព័រទី១១ )



LAW OFFICES OF FRANK G. PIAZZA, JR. & ASSOCIATES

-PROFESSIONAL AGRESSIVE. DISCREET,EXPERIENCE, REPRESENTATION



CRIMINAL LAW AND FAMILY LAW ARE STRICTLY HANDLED BY AN UNASSOCIATED ATTORNEY

- Serious accident Required Experienced and Compentent Representation to make sure you received adequate compensation for your injuries. Otherwise, you(the injured person) could lose thousands of dollar with **the Incompentent and Unexperienced Representation.**
- I Speak Combodian/English fluently, I have many years of experience on dealing and negotiating for maximum settlement possible with insurance compenies for our clients.
- Appointments are available for you to come in office after working hour and weekend. Please call in advance.

100 OCEANGATE,SUITE 525,
LONG BEACH.CA 90802
TEL:(562) 708-3721, Fax: (562) 437-8425,
Email:MORALAW5@YAHOO.COM



MORA MAO FRANK PIAZZA DOUGLAS MELSON

- ត្រូវរបួសធ្ងន់ត្រូវឱ្យមានអ្នកតំណាងមានសមត្ថភាព និងមានការពិសោធន៍យ៉ាងបរិបូណ៌ ដើម្បីទារសំណងឱ្យបានសមរម្យនឹងរបួសលោកអ្នកពុំនោះទេ លោកអ្នកនឹងត្រូវខាតបង់ប្រាក់ច្រើនពាន់ដុល្លារ កាលបើអ្នកតំណាងក្តីរបស់លោកអ្នកអសមត្ថភាព និងខ្វះការពិសោធន៏ ។
- ខ្ញុំបាទស្ទាត់ជំនាញខាងភាសាខ្មែរ,អង់គ្លេសមានទេពកោសល្យខាងពិភាក្សាចរចាក្នុងរឿងក្តីរបស់លោកអ្នក ជាមួយនឹងក្រុមហ៊ុនធានារ៉ាប់រងជាច្រើនកន្លែងមកហើយ ។
- កិច្ចការ ហ្មត់ចត់ ម៉ឺងម៉ាត់ រហ័សទាន់ចិត្តទាំងក្នុង និងក្រៅតុលាការ ។
- លោកអ្នកអាចធ្វើការណាត់ជួបខ្ញុំបាទ ក្រៅម៉ោងធ្វើការ ឬចុងសប្តាហ៍ ។

***Our Recent successful cases :***

- **$1,000,000.00,** Bicylist Vs Truck Case, Guranteed annuity.
- **$100.,000.00,** Dog Bites Vs Home Owner Insurance of the apt.complex.
- **$250,000.00,** Auto Vs Auto, Settlement

INJURY / DEATH CASES:

- Wrongful death
- Broken / fracture bones
- Amputation / Paraplegia
- Auto / Bicycle / Motorcycle
- Uninsured Motorist
- Dog Bites
- All insurance Disputes

CRIMINAL/STATE &FEDERAL:

- Drug offense
- Murder
- Rape
- Kidnapping
- Fraud
- DMV Hearings
- Hit & Run
- Assault & Battery

FAMILY LAW:

- Child Custody
- Divorce
- DA Child Support
- Legal Separation



# បោះឆ្នោតរកយុត្តិធម៌ឱ្យ...

វត្តជាស្រែបុណ្យរបស់ពុទ្ធបរិស័ទ មិនមែនជារបស់ក្រុមបុគ្គលគណៈកម្មការវត្តចាស់ប៉ុន្មាននាក់នោះទេ ។ ពុទ្ធបរិស័ទគេស៊ីអត់ស៊ីឃ្លានសន្សំលុយធ្វើបុណ្យជាមួយព្រះសង្ឃមិនមែនជាមួយអស់លោកនោះទេ ។

ក្រុមពុទ្ធបរិស័ទអះអាងថា ការបោះឆ្នោត គឺជាយុត្តិធមិ ដើម្បីជ្រើសរើសគណៈកម្មការថ្មី គឺបំរើកិច្ចការវត្ត និងព្រះសង្ឃ


ព្រះសង្ឃគាំទ្រវិបក្សគណៈកម្មការវត្តថ្មី


មេធាវីតំណាងគណៈកម្មការថ្មី និងចាស់


អ្នកបោះឆ្នោត

ឱ្យមានតម្លាភាព ។

ក្នុងការពារសន្តិសុខ និងប៉ូលិស ទាំងឯកសណ្ឋាន និងស៊ីវិល បានដាក់កម្លាំងការពារសន្តិសុខ ដើម្បីរក្សាសណ្តាប់ធ្នាប់កុំឱ្យកើតមានអំពើហឹង្សា ក្នុងយថាហេតុណាមួយពីពួកជម្លោះ ។

មេធាវីទាំងសងខាងបានទៅកាន់ទីវត្តអារាម ដើម្បីជាស្មាក្តីការពារកូនក្តីខ្លួន ។ ដោយមេធាវីខាងភាគីពុទ្ធបរិស័ទថ្លែងថា លោកគាំទ្រនូវការសម្រេចចិត្តរបស់ពុទ្ធបរិស័ទក្នុងការបោះឆ្នោត ។ រីឯមេធាវីខាងក្រុមគណៈកម្មការវត្តរបស់ ពៅ សាវ៉ន ថ្លែងថា ទោះបីពុទ្ធបរិស័ទនាំគ្នាធ្វើការបោះឆ្នោតក្នុងថ្ងៃនេះ (២៧ ខែមករា) ក៏ដោយក៏គ្មានការទទួលស្គាល់ជាផ្លូវការដែរ ។ ប្រធានគណៈកម្មការរៀបចំការបោះឆ្នោត គាំ ស័ក្តិផាន និយាយថា ការបោះឆ្នោតប្រព្រឹត្តទៅដោយភាពរលូន ដែលមានអ្នកមកចូលរួមបោះឆ្នោតមានចំនួន៥៦% នៃចំនួនសមាជិក៥២៥នាក់ ។ ដោយលោក គាំ ស័ក្តិផាន បានអះអាងថា អ្នកដែលកំពុងបានមកចូលរួមបោះឆ្នោតមានបញ្ហាបី ដែលជួបប្រទះ គឺភ្លៀងគ្មានកន្លែងចតឡាន និងមានការភ័យខ្លាច ។

ការបោះឆ្នោតនាពេលនោះ ត្រូវបានសម្រេចជ្រើសរើសបានមនុស្ស១៣នាក់ ដែលមានតួនាទី និងភារកិច្ចការងារបំរើទីវត្តអារាម និងព្រះសង្ឃ ដែលមានលោក សរ ស៊ីថាល់ ជាប្រធានគណៈកម្មការវត្តថ្មី និងលោក ស៊ុន សារិន ជានាយកប្រតិបត្តិ ។ ក្រុមព្រះសង្ឃ៥អង្គ ដែលដឹកនាំមុខដោយព្រះចៅអធិការវត្ត និងព្រះមហាថេរ ដែលពកព្រះអង្គត្រូវរងគ្រោះដោយការគំរាមកំហែង ធ្វើបាបពីគណៈកម្មការចាស់បានទទួលស្គាល់យកគណៈកម្មការវត្តថ្មី ដើម្បីរៀបចំវត្តអារាមឱ្យមានវិន័យ តាមបែបផ្លូវព្រះពុទ្ធសាសនា ដើម្បីចាត់ចែងការងារវត្ត តាមការបញ្ជា ឬអធិបតីពីព្រះសង្ឃ ។

ប៉ុន្តែ ទោះបីអង្គរបានក្លាយជាបាយហើយក្តី ទាំងពុទ្ធបរិស័ទ និងក្រុមព្រះសង្ឃបានទទួលស្គាល់ការបោះឆ្នោតជ្រើសរើសគណៈកម្មការវត្តថ្មីហើយក៏ដោយ ។ ក៏លោក ពៅ សាវ៉ន ដែលជាប្រធានគណៈកម្មការវត្តចាស់បានអះអាងនៅក្នុងសេចក្តីថ្លែងការរបស់ខ្លួន ដែលខ្មែរប៉ុស្តិ៍ទទួលបាននៅថ្ងៃទី៣ ខែ កុម្ភៈ តាមសារអ៊ីមែលបានបញ្ជាក់ថា ការបោះឆ្នោតក្លែងបន្លំនឹងខុសច្បាប់ ដែលធ្វើឡើងនៅថ្ងៃទី២៧ ខែមករា ឆ្នាំ២០០៨ គឺធ្វើឡើងដោយក្រុមមិនបានទទួលសិទ្ធិអនុញ្ញាតិ ដោយរំលោភបំពានលើលក្ខន្តិកៈរបស់សមាគម ។ គណៈកម្មការវត្តចាស់នេះ មិនបានចូលរួមបោះឆ្នោតទេ ។ ប្រតិកម្មវាយបកលោក លី ឡេប បានអះអាងនៅក្នុងលិខិតមួយឈ្មោះ "អង្គរបុរី សម្លេងខ្មែរនៅបរទេស" ដែលខ្មែរប៉ុស្តិ៍ទទួលបាន តាមសារអ៊ីមែលបានបញ្ជាក់ថា ថ្ងៃកំណត់ធ្វើការបោះឆ្នោតបានទទួលព្រមព្រៀងគ្នា រវាងគណៈកម្មការពុទ្ធិកសមាគមខ្មែរ និងភាគីតំណាងព្រះសង្ឃ និងពុទ្ធបរិស័ទ កាលពីថ្ងៃទី៩ ធ្នូ ឆ្នាំ ២០០៧ គឺយកថ្ងៃទី២៧ មករា ឆ្នាំ២០០៨ ហើយនឹងជាថ្ងៃត្រូវនៅក្នុងច្បាប់ (byLaw) របស់ពុទ្ធិកសមាគមខ្មែរ ។ ដែលការព្រមព្រៀងគ្នានោះមានភស្តុតាង តែទុកជាឯកសារនៅក្នុងវីដេអូថេប ដែលបានចម្លងចែកផ្សាយជូនជាសាធារណៈយ៉ាងច្រើនរួចមកហើយ ។ ដូច្នេះឱ្យយល់ថា គឺលោក ពៅ សាវ៉ន ខ្លួនឯងហ្នឹងហើយ ដែលបំពានលើកិច្ចសន្យារបស់ខ្លួន និងបំពានទៅលើច្បាប់របស់ពុទ្ធិកសមាគមខ្មែរ ។

នៅក្នុងលិខិត ពៅ សាវ៉ន នោះទៀត អះអាងថា សមាជិកគណៈកម្មការនាយកនៃពុទ្ធិកសមាគមខ្មែរ បានបោះឆ្នោតដោយចេញមុខ និងបានយល់ព្រមថា ការបោះឆ្នោតនៅថ្ងៃទី ២៧ ខែមករា គឺទុកជាមោឃៈ ពីព្រោះក្នុងចំណោមការរំលោភបំពានផ្សេងទៀត ។ វាមិនមានគណនេយ្យភាពត្រឹមត្រូវទាក់ទងនឹងសមាជិកភាពមុនការបោះឆ្នោត ហើយពាក្យសុំសមាជិកភាពមិនបានទទួលការយល់ព្រមពីគណៈនាយកដូចដែលបានតម្រូវដោយលក្ខន្តិកៈ ។ ហើយគណៈនាយកបានកំណត់រួចហើយនូវកាលបរិច្ឆេទបោះឆ្នោតសមហេតុផល នៅថ្ងៃទី២៣ មិនា ឆ្នាំ២០០៨ ។ ដូច្នេះអ្នកដែលបានជ្រើសរើសនៅថ្ងៃទី២៧ មករា ឆ្នាំ២០០៨ នឹងមិនត្រូវបានទទួលស្គាល់ថា បានជ្រើសរើសដោយត្រឹមត្រូវឡើយ ។

ចំណែកសំដីក្នុងលិខិតរបស់លោក លី ឡេប និយាយថា គណៈកម្មការពុទ្ធិកសមាគមខ្មែរជាអ្នកជ្រើសតាំងគណៈកម្មការកណ្តាលរៀបចំការបោះឆ្នោតនៅថ្ងៃទី២៧ ខែមករា ឆ្នាំ២០០៨ ។ ដល់មកឥឡូវប្រែនិយាយថា មិនត្រឹមត្រូវ និងទុកជាមោឃៈ ដោយសារខ្លួនសុំពន្យាពេលបោះឆ្នោតមិនបាន ថាតើជាការត្រឹមត្រូវ និងសមហេតុផលឬទេ ? ។ ខាងភាគីតំណាងព្រះសង្ឃ និងពុទ្ធបរិស័ទ ពុំបានជ្រើសរើសតាំងគណៈកម្មាធិការកណ្តាលទេ ហើយក៏ពុំតវ៉ាអ្វីទាំងអស់ ក្រៅអំពីសុំឱ្យមានការគោរពតាមច្បាប់ (bayLaw) របស់ពុទ្ធិកសមាគមប៉ុណ្ណោះ ។ ការនិយាយថា ការដាក់ពាក្យសុំចូលជាសមាជិកមិនមានគណនេយ្យភាពត្រឹមត្រូវ និងគ្មានបានទទួលនូវការយល់ព្រមពីគណៈកម្មការពុទ្ធិកសមាគមខ្មែរជាការមិនត្រឹមត្រូវទេ ។ ពីព្រោះនេះ ជាការបោះឆ្នោតពិសេសហើយ អំណាចចាត់ចែងបោះឆ្នោតគណៈកម្មាធិការកណ្តាល ជាអ្នកចាត់ចែងរួចហើយ ។ គណនេយ្យភាព ក៏ដូចជាការត្រួតពិនិត្យដែរ គឺត្រូវស្ថិតនៅក្រោមការទទួលខុសត្រូវរបស់គណៈកម្មាធិការកណ្តាល ។ បើពុទ្ធិកសមាគមខ្មែរទាមទារឱ្យមានការ

(តទៅទំព័រទី១០)

# គណបក្សសិទ្ធិមនុស្ស...

តើធ្វើម្តេចនឹងឈ្នះគណបក្សប្រជាជនកម្ពុជាទៅ ។

អ្នកតាមដាននយោបាយទាំងនោះ បានអះអាងថា ពួកគេជាខ្មែររស់នៅសហរដ្ឋអាមេរិក តែងចង់ឃើញប្រជាជនរស់នៅក្នុងស្រុករំដោះខ្លួនចេញពីរបបកុម្មុយនិស្តជិះជាន់សង្កត់សង្កិនឱ្យមានសិទ្ធិសេរីភាពក៏ខំប្រឹងប្រែងជួយគាំទ្រទាំងកម្លាំងកាយចិត្ត បញ្ញា ចំណេះដឹង និងថវិកាជាមួយគណបក្សនានា ក្នុងការកែប្រែរបបដឹកនាំឱ្យមានលក្ខណៈប្រជាធិបតេយ្យសេរី ។ ដែលបងប្អូនខ្មែរនៅក្រៅស្រុក ភ្លូកទឹកភ្លូកដី ចូលខ្លួនធ្វើការជាមួយគណបក្ស លោកតា សឺន សាន និង Funcipec រហូតដល់លះបង់មិនត្រឹមតែ អស់លុយ អស់កាក់ បាត់បង់ការងារប៉ុណ្ណោះទេ គឺថែមទាំងអស់ប្រពន្ធកូនទៅទៀត ។ ហើយនៅទីបញ្ចប់គណបក្សទាំងនោះ ធ្វើឱ្យពួកគេខកបំណងអស់ជំនឿបន្តរហូតមកដល់សព្វថ្ងៃ ក៏ព្រោះតែមិនបានអនុវត្តតាមគោលការណ៍នៃការសន្យាមុនខ្លួនកាន់អំណាច ក្រៅតែពីបង្កការពុករលួយ ទិញដូរតំណែង គ្មានការគិតគូរអ្វីដែលជាប្រយោជន៍របស់ប្រជាពលរដ្ឋ ដែលជាម្ចាស់ឆ្នោតនោះ ។ ពោលគឺតាំងពីខ្លួនមានអំណាច ធ្វើអ្វីមិនត្រូវបានកែទម្រង់ រហូតធ្លាក់ខ្លួនទន់ខ្សោយ នៅក្រោមសំពាធនយោបាយ


ជំនួបនយោបាយគណបក្សសិទ្ធិមនុស្ស នៅ Long Beach

អតីតគូសត្រូវ ដែលកំពុងតែក្តោបអំណាចបច្ចុប្បន្នថា តើមានអ្វីសង្ឃឹមទៀតសំរាប់អនាគតប្រទេសជាតិ និងអ្នកប្រជាធិបតេយ្យ ដែលកំពុងហែកហួរគ្នាពីជម្លោះ ព្រោះតែអំណាចមិនឈប់ឈរនោះ ។

អគ្គលេខាធិការគណបក្សសិទ្ធិមនុស្ស លោក អ៊ូ ច័ន្ទរ័ត្ន បានអះអាងថា យើងនៅតែបន្តជំហរ រួបរួមអ្នកប្រជាអិបតេយ្យ រហូតមកដល់ថ្ងៃនេះ ប៉ុន្តែអ្នកដឹកនាំនយោបាយនានា នៅបន្តភាពរឹងរូសពីមោទនភាពខ្លួន និងការចង់ក្តោបអំណាចតែម្នាក់ឯង ដែលធ្វើឱ្យគណបក្សសិទ្ធិមនុស្សពិបាករួមជាមួយគ្នា ។

គណបក្ស សម រង្ស៊ី ធ្លាប់ថ្លែងឱ្យដឹងថា គណបក្សរបស់ខ្លួនមានមូលដ្ឋានរឹងមាំអ្នកគាំទ្រច្រើនលាននាក់ ដែលគ្មានផ្លូវណាមួយត្រូវឱ្យខ្លួនរត់ទៅរកគណបក្សថ្មីមួយ ដែលទើបតែបង្កើតក្រោមផ្លាកសិទ្ធិមនុស្សនោះទេ ។ ដោយគណបក្សប្រឆាំងមួយនេះ បានអះអាងថា បើគណបក្សសិទ្ធិមនុស្សចង់រួបរួមជាមួយខ្លួនសូមទទួលដោយរីករាយដែលឥតលក្ខខ័ណ្ឌ ។

គណបក្សសិទ្ធិមនុស្សបានចាប់បដិសន្ធិឡើង នៅខែកក្កដា ឆ្នាំ២០០៧ ដែលមានរចនាសម្ព័ន្ធដឹកនាំចែកចេញជាបីអំណាចដាច់ពីគ្នា គឺប្រធានប្រតិបត្តិ (ប្រធានគណបក្ស) ប្រធានគណៈកម្មការនាយក និងប្រធានគណៈកម្មការវិន័យ ។ គណបក្សសិទ្ធិមនុស្សតម្រូវឱ្យប្រធានបក្សដឹកនាំតែពីរអាណត្តិតែប៉ុណ្ណោះ ។ លោក កឹម សុខា ជាអតីតអគ្គលេខាធិការគណបក្សលោកតា សឺន សាន, អគ្គលេខាធិការគណបក្ស ហ៊្វុនស៊ិនប៉ិច និងជាសមាជិកព្រឹទ្ធសភា និងចុងក្រោយឆ្នាំ២០០២ លោក កឹម សុខា បានក្លាយខ្លួនជាប្រធានមជ្ឈមណ្ឌលសិទ្ធិមនុស្សកម្ពុជាធ្លាប់ប្រឆាំងដោយការតស៊ូមតិជាមួយលោក ហ៊ុន សែន ពីការរំលោភសិទ្ធិមនុស្ស និងបញ្ហាបូរណភាពដែនដីក្នុងអំឡុងឆ្នាំ២០០៦ ។ ត្រូវបានរដ្ឋាភិបាល ហ៊ុន សែន ចាប់ដាក់គុក រហូតដល់មានការលើកលែងទោសពីព្រះមហាក្សត្រក្រោមសំពាធឥទ្ធិពលពីសហគមន៍អន្តរជាតិ ជាពិសេសរដ្ឋាភិបាលអាមេរិកចំពោះលោក ហ៊ុន សែន ។ បន្ទាប់ពីបានចេញពីគុកនៅដើមឆ្នាំ២០០៧ បានប៉ុន្មានខែមក លោក កឹម សុខា បានរៀបចំបើកគណបក្សសិទ្ធិមនុស្សនេះឡើងក្នុងបំណងទាមទារសេរីភាពជូនប្រជាជនឱ្យដើរតាមបែបបទប្រទេសក្នុងពិភពលោកដែលកាន់លទ្ធិប្រជាធិបតេយ្យក្នុងពេលដែលគណបក្សរបស់ខ្លួនឈ្នះឆ្នោតក្នុងខែកក្កដា ឆ្នាំ២០០៨នេះ ។

បើទោះបីខ្មែរក្រៅស្រុកជាច្រើននាក់ មានការជូរចត់រៀងចាលជាមួយនយោបាយនៅកម្ពុជា មិនថាគណបក្ស Funcipec, សម រង្ស៊ី និងគណបក្សប្រជាជនកម្ពុជារបស់លោក ហ៊ុន សែន ក៏ដោយ ក្នុងពអាណត្តិមកនេះ ។ ក៏គេសង្កេតឃើញថា នៅតែមានមនុស្សមិនតិចទេ ដែលបន្តលលេងជាមួយគណបក្សសិទ្ធិមនុស្សម្តងទៀត ថាតើអ្នកថ្មី និងអ្នកមុនអ្នកណាគ្រាន់បើជាងដែលគេគិតថា ជាទឹកចុងក្រោយសំរាប់ជីវិតនយោបាយរបស់ពួកគេ ជាពិសេសពួកអ្នកសហគមន៍ខ្មែរ Long Beach, ផ្តុំទៅដោយអ្នកនយោបាយអ្នកមានចំណេះដឹងខ្ពង់ខ្ពស់ទ្រព្យសម្បត្តិស្តុកស្តម្ភក្នុងការសម្រេចជ្រើសរើសយកគណបក្សនយោបាយនានាដែលខ្លួនគិតថា អាចជួយស្រោចស្រង់ប្រទេសជាតិបាន ៕

# ទិវានៃក្តីស្រឡាញ់មានសារសំខាន់ខ្លាំងណាស់សំរាប់យុវវ័យ

**ដោយ : ទីឃាយុ**

ថ្ងៃទី១៤ កុម្ភៈ គឺជាថ្ងៃដ៏ពិសេស ដែលប្រជាពលរដ្ឋភាគច្រើននៅលើពិភពលោក នាំគ្នាប្រារព្ធទិវានៃក្តីស្រឡាញ់ (Valentine´s day) ។ នៅថ្ងៃនេះ គេសង្កេតឃើញមនុស្សម្នាមានទឹកមុខសប្បាយរីករាយ ពួកគេបានជូនកាដូរគ្នា ជាវត្ថុអនុស្សាវរីយ៍ ខ្លះសរសេរជាលិខិត ដើម្បីបញ្ជាក់ពីសេចក្តីស្រឡាញ់ ។







ប្រវត្តិនៃថ្ងៃស្រឡាញ់ បានចាប់ផ្តើមនៅក្នុងទីក្រុងរ៉ូម នៅឆ្នាំ២៧០មុនគ.ស ។ នៅពេលនោះ ស្តេចក្លូឌាសទី២ ដែលជារាជាធិរាជនៃទីក្រុងរ៉ូម បានគំរាមកំហែងទៅកាន់រាល់មនុស្សម្នាទាំងឡាយថា ត្រូវតែគោរពតាមព្រះជាម្ចាស់ ដែលទ្រង់គោរព ហើយទ្រង់ក៏លប់ចោលផងដែរ នូវវិធីរៀបមង្គលការ និងចាប់ខ្លួនចំពោះជនណា ដែលមិនស្តាប់តាមបទបញ្ជា ។

អ្នកកាន់សាសនាគ្រិស្ត ជាច្រើន ត្រូវបានគេធ្វើទារុណកម្ម និងសំលាប់ចោល ចំពោះជនណាដែលជឿ និងទុកចិត្តទៅលើព្រះជាម្ចាស់ ។

មានបុព្វជិតម្នាក់ ដែលត្រូវបានគេដាក់ឈ្មោះឱ្យជា (Valentine) នៅតែបន្តចាត់ចែងរៀបចំពិធីរៀបការ តាមពាក្យទូន្មានរបស់ព្រះជាម្ចាស់ ទោះបីផ្ទុយពីច្បាប់របស់ "ក្លូឌាស" ក៏ដោយ គាត់នៅតែបន្តរហូតដល់ត្រូវគេចាប់ខ្លួន ហើយបញ្ជូនទៅក្នុងគុក ។ ប៉ុន្តែ ទោះបីជាជញ្ជាំងគុក ក៏មិនអាចឃាំងគាត់បានដែរ គឺដោយសារតែអ្នកស្រឡាញ់ព្រះជាម្ចាស់ បានប្រកាសឱ្យដោះលែងគាត់ ។ គាត់បានជួយផ្តត់ផ្តង់អ្នកទោស ហើយនឹងអ្នកយាមជាច្រើនឱ្យទៅគ្រិស្តសាសនា ។

អ្នកយាមម្នាក់មានកូនស្រីម្នាក់ ដែលពិការភ្នែក ហើយអ្នកយាមនោះ ក៏នាំយកកូនស្រីគាត់ទៅឱ្យ (Valentine) ជួយបន់ស្រន់ឱ្យភ្នែកនាងភ្លឺឡើងវិញ ។

អ្នកយាមបានដឹងថា ជីវិតរបស់គាត់នឹងមានគ្រោះថ្នាក់ដ៏ធំ ប្រសិនបើគាត់ត្រូវបានគេរកឃើញថា គាត់នៅជាមួយ (Valentine) ។ ប៉ុន្តែ គាត់ជឿជាក់នូវភាពអស្ចារ្យជាងភាពភ័យខ្លាច ហើយបានបន់ស្រន់ជាមួយ (Valentine) និងក្មេងស្រីដែលបានឱ្យពរ ដោយព្រះអម្ចាស់ ហើយចក្ខុរបស់នាងបានភ្លឺឡើងវិញ ។

ដំណឹងនៃអព្ភូតហេតុនេះ ត្រូវបានរាលដាលយ៉ាងឆាប់រហ័សទៅដល់អធិរាជ ហើយពេលដែលអធិរាជដឹងថា (Valentine) នៅតែទេសនាពាក្យរបស់ព្រះជាម្ចាស់ គាត់ក៏បានបញ្ជាឱ្យ (Valentine) ប្រគល់ជីវិត ដោយការកាត់ក្បាល ។

ខណៈពេលដែលកំពុងរង់ចាំការប្រហារជីវិត (Valentine) បានសរសេរសំបុត្រលាទៅកាន់ក្មេងស្រីម្នាក់ ដែលបានទទួលពន្លឺភ្លឺឡើងវិញ នៃអព្ភូតហេតុដែលគាត់បានបន់ស្រន់ ។ នាងក៏បានទៅសួរសុខទុក្ខ (Valentine) នៅក្នុងគុក តាមកាលដែលនាងអាចធ្វើបាន ហើយពួកគេ ស្រឡាញ់គ្នារៀងៗខ្លួន ដោយស្ងប់ស្ងាត់ ។ (Valentine) បានទុកសញ្ញាមួយសំគាល់លើសំបុត្រ ទៅកាន់នាងថា "ក្តីស្រឡាញ់របស់អ្នក" ការប្រហារជីវិតរបស់គាត់នៅថ្ងៃទី១៤ កុម្ភៈ ។

ពីព្រោះវាជាថ្ងៃនៃក្តីស្រឡាញ់ ដែលរះឡើងក្នុងជីវិតរបស់គាត់ ក្នុងការប្រៀនប្រដៅនៃព្រះជាម្ចាស់ ហើយគាត់ក៏ស្លាប់ ។ តែជាម្ចាស់ដែលគិត ថាគាត់គឺជាអ្នករងទុក្ខច្រើនជាងគេ ហើយគាត់ក៏បានដឹងថា តាំងពីពេលនោះមក គាត់ជាមនុស្សដែលគេចាត់តាំងជាអ្នកមានសទ្ធា (Valentine) ។

ក្តីស្រឡាញ់របស់គាត់ចំពោះព្រះជាម្ចាស់ និងសំរាប់មនុស្សម្នាទាំងឡាយ ( តទៅទំព័រទី១១ )

# គណបក្សប្រជាធិបតេយ្យ គួរតែនៅអួតដាក់គ្នា ឬរួមគ្នា ?

**ដោយ : ទីឃាយុ**

រដូវបោះឆ្នោតបានខិតជិតមកដល់គេសង្កេតឃើញគណបក្សនយោបាយប្រជាធិបតេយ្យមួយចំនួនបាននឹងកំពុងអួតពីកម្មវិធីនយោបាយរៀងៗ


លោក កឹម សុខា


លោក សម រង្ស៊ី

ខ្លួន ។ មន្ត្រីគណបក្សទាំងនោះបានចេញចូលពីបក្សមួយទៅបក្សមួយទៀត ដើម្បីរកលាភសក្ការៈសំរាប់ក្រុមគ្រួសារ និងអំណាចបុណ្យសក្តិទៅថ្ងៃមុខ ។

កាលពីឆ្នាំ១៩៩៣ គណបក្សរាជានិយមហ៊្វុនស៊ិនប៊ិច ដែលបានឈ្នះឆ្នោតយ៉ាងគគ្រឹកគគ្រេងរហូតដល់៥៨អាសនៈ គឺក្រោមព្រះរាជកិច្ចដឹកនាំរបស់អតីតព្រះមហាក្សត្រនរោត្តម សីហនុ ។ លុះមកដល់ឆ្នាំ១៩៩៨ គណបក្សហ៊្វុនស៊ិនប៊ិច នៅសល់តែ៤៣អាសនៈ ដោយសារលោក សម រង្ស៊ី បានបង្កើតដែរគបក្សមួយចំនួនដែរ ហើយទាក់ទាញសម្លេងបាន១៥អាសនៈ ។

នៅឆ្នាំ២០០៣ ហ៊្វុនស៊ិនប៊ិច នៅសល់តែ២៦អាសនៈប៉ុណ្ណោះ ។ ចំណែកគណបក្ស សម រង្ស៊ី បានកើនឡើងដល់២៤អាសនៈ ប៉ុន្តែ មិនបានចូលរួមក្នុងរដ្ឋាភិបាលទេ ។

ការថយចុះនៃអាសនៈក្នុងរដ្ឋសភារបស់ ហ៊្វុនស៊ិនប៊ិចនេះ បណ្តាលមកពីភាពមិនចុះសំរុងគ្នានៃសមាជិកក្នុងបក្សការមិនបានចុះក្នុងមូលដ្ឋានជួយប្រជាជនតាមពាក្យសន្យា និងភាពមិនស្មោះត្រង់នៃមន្ត្រីមួយចំនួន ។

អ្វីដែលគួរឱ្យកត់សំគាល់នៅថ្ងៃទី១៨ តុលា ឆ្នាំ២០០៦ គណបក្សហ៊្វុនស៊ិនប៊ិច បានរៀបចំសមាជដកសម្តេចក្រុមព្រះនរោត្តម ( តទៅទំព័រទី៣១ )


# ភោជនីយដ្ឋានបាត់ដំបង

Battambang Restaurant

ជាពិសេសយើងខ្ញុំមានឧត្តមពិធីផ្សេងៗបានចំនួន ៤០ តុ ។ បើលោកអ្នកបញ្ជា២៥តុឡើងទៅ យើងខ្ញុំនឹងជូនវង់ភ្លេងសម័យដោយឥតគិតថ្លៃ !

បាយល្ងាចពិសេស !!!

BATTAMBANG RESTAURANT

**មុខម្ហូប A : $20**
- ម្ជូរត្រី
- សាគោអាំង
- ប្រហុកខ្ទិះ

**មុខម្ហូប B : $29**
- ម្ជូរឆ្អឹងជំនី
- ញាំសាច់មាន់
- ត្រីប្រម៉ាចំហុយ
- សាច់គោអាំង

**មុខម្ហូប C : $38**
- ម្ជូរត្រី
- ភ្លាសាច់គោ ឬ ឈ្លូស
- សាច់គោអាំង
- អាម៉ុក
- សាច់មាន់ឆារប៉័រ

**មុខម្ហូប D : $62**
- ម្ជូរបង្កង និងត្រី
- សាច់គោអាំង
- ក្តាមឆារប៉័រ
- លាសឆារជីនាងវងម្ទេស
- ត្រីខ្មៅចំហុយដាក់ខ្ទិះ
- សាច់មាន់ឆារគ្រឿង

**មុខម្ហូប E : $78**
- ម្ជូរបង្កង និងត្រី
- ភ្លាជើងទា
- សាច់គោអាំង
- ក្តាមឆារប៉័រ
- លាសឆារជីនាងវងម្ទេស
- ត្រី ខខឹមស និង ម្ទេស
- សាច់ឈ្លូសឆារឡុកឡាក់

**មុខម្ហូប F : $115**
- ស៊ុបពោះត្រីសាច់ក្តាម
- ម្ជូរបង្កង និងត្រី
- ត្រីប្រម៉ាចំហុយ
- ក្តាមឆារខ្ទី និងខ្ទឹមខ្សៀវ
- បង្កងឆារប៉័រ
- សាច់ឈ្លូសឆារឡុកឡាក់

**មុខម្ហូប G : $160**
- ខាត់ណាទឹកខ្យង
- ម្ជូរបង្កង និងត្រី
- បង្កងឆារប៉័រ
- ក្តាមឆារម្រេច
- សាច់មាន់ឆារគ្រឿង
- ស៊ុបព្រុយត្រីសាច់ក្តាម
- សាច់គោអាំង
- លាសឆារជីនាងវងម្ទេស
- ត្រីខខឹមស និងម្ទេស

ដំណឹងពិសេស !!!
ភោជនីយដ្ឋានយើងខ្ញុំមានផ្តួចផ្តើមតន្ត្រីសំរាប់ ច្រៀង និងរាំកំសាន្ត រៀងរាល់ថ្ងៃច័ន្ទ ដល់ ថ្ងៃសុក្រ ពីម៉ោង ៧ យប់ ដល់ ម៉ោង១១យប់ !

(626) 307-3938
1806 S. San Gabriel Blvd.
San Gabriel, CA 91776
Mon - Fri 10:30 AM - 11 PM
Sat - Sun 9:30 AM - 11 PM

## សន្សំទំនាស់...

ហើយស្លាកស្នាមអាចលុបមិនជ្រះ ។

សេចក្តីសម្រេចពោរពេញទៅដោយសេចក្តីក្លាហាន បានក្លាយទៅជាការសម្រេចអត្តនោម័តបោះបង់ការស្រង់មតិពលរដ្ឋខ្លួនឯងយ៉ាងងាយស្រួល ។ ហេតុនេះ ធ្វើឱ្យមានសំនួរថា "បើទំនាស់នេះ គេដឹងជាមុនហេតុអ្វីក៏ជ្រើសយកទំនាស់ថា ប្រសើរជាងធ្វើបុណ្យក្នុងសន្តិភាព ?"

អ្នកប្រឆាំងទំនងជាមានគំនិតអ្វីល្អសំរាប់ក្រុមអ្នករៀបចំចូលឆ្នាំពិចារណាផងដែរទេដឹង ? អញ្ជើញភ្ញៀវម្នាក់មកជាកិត្តិយសក្នុងពិធីដែលខ្មែរទាំងអស់ជាម្ចាស់ផ្ទះ ហើយភ្ញៀវនោះមកជាគណធិបតីថែមទៀតនោះ តម្រូវឱ្យភ្ញៀវនោះមានកិត្តិយសគ្រប់គ្រាន់ ហើយម្ចាស់ផ្ទះមានការចុះសម្រុងគ្នាថែមទៀត ។

ពេលនេះជាងពេលណាទាំងអស់ ដែលខ្មែរគេចផុតពីដង្ហៀបនយោបាយតឹងតែងមករស់នៅទឹកដីសេរីភាពគួរយកមនុស្សគំរូមកជាគណធិបតី គឺយើងចេះរើសដោយខ្លួនឯង ។ បើថ្ងៃនេះ អ្នកបានបង្ហាញរូបភាពគំរូរបស់អ្នកមិត្តភ័ក្រ្ត និងកូនចៅអ្នកនឹងឃើញច្បាស់ថា លោកអ្នកជានរណា ? សហគមន៍អ្នកត្រូវការលោកអ្នកជាអ្នកដឹកនាំជាភ្នែកច្រមុះ តែប្រសិនបើលោកអ្នកនាំគេទៅលក់យកកម្រៃសំរាប់ "អញ" លោកអ្នកជាមនុស្សប្រភេទណា ?

ថ្ងៃនេះមេរៀនដែលយើងទទួលជាមរតកពីអ្នកនយោបាយជើងចាស់របស់យើង គឺយើងក្លាយជាអ្នកបង្រួបបង្រួមរស់នៅក្រៅស្រុក ដោយសារស្នាដៃនៃក្រុមខ្មែរក្រហម និងក្រុមកុម្មុយនិស្តបន្តបន្ទាប់គ្នា មានមនុស្សជាច្រើនបានចាត់ទុកថានេះជាសំណាងដែលបានមករស់នៅសហរដ្ឋអាមេរិក ។ អ្នកទាំងនោះមានសំណាងដោយសារការស្លាប់ក្រោមទារុណកម្មរបស់ឪពុកម្តាយ មា មីង ឬបងប្អូនខ្លួនឯង រូបភាពនេះនឹងធ្វើឱ្យយើងយល់ថា "តម្លៃនៃសំណាងរបស់អ្នកនោះ ខ្ពស់ជាងជីវិតនៃក្រុមគ្រួសារគាត់ " ។

តម្លៃនៃអ្នកមានសំណាងនោះ មានឈ្មោះថា "អានិកជនជជុះ" គឺជាមរតកនៃអតីតកាល ដែលការរៀនសូត្រជ្រៅជ្រះ និងនាំឱ្យយើងចៀសចេញឱ្យផុតបាន ។

ចេញឱ្យផុតបាន ? នេះត្រូវអាស្រ័យដោយការមិនយកក្រុងខ្មែរធ្វើជាសម្បត្តិរបស់ "ក្រុមអញ" អាស្រ័យដោយសេចក្តីសម្រេចដ៏មានគ្រោះថ្នាក់ដល់របួសស្លាកស្នាមត្រូវតែមានអ្នកប្រឆាំងចូលរួម ជាពិសេសប្រៀបធៀបសេចក្តីសម្រេចទៅនឹងសីលធម៌ ថាតើក្នុងនាមជាអ្នកដឹកនាំគេ តើសេចក្តីសម្រេចនោះ នឹងបានជាប្រយោជន៍ដល់ពលរដ្ឋនៃក្រុងខ្មែរ ១០០%ឬទៅ ?

បើគេសន្សំ "បុណ្យ" គេមិនត្រូវលក់ស្រាយកប្រាក់ប្រគេនលោកទេ បើគេសន្សំ "សន្តិភាព" គេត្រូវស្វែងរកភាពចុះសម្រុង បើមិនដូច្នោះទេ គេនឹង "សន្សំបានទំនាស់" ៕

**"វាមិនដែលយឺតពេលទេ បើចង់ធ្វើអំពើល្អ"**


**Unipaq Realty & Financial**

Complete Real Estate Services

សូមអញ្ជើញដោយមេត្រីភាព !

-បំរើកិច្ចការងារលក់ដូរទិញផ្ទះទូទៅ

-អ្នកប្រឹក្សាពិគ្រោះយោបល់នៃការខ្ចីប្រាក់

David Kuoch
Real Estate Agent
Loan Consultant

Cell: (714) 351-2803
Office: (714) 892-2070
Fax: (714) 893-2059
Residence: (714) 774-4061
12062 Valley View St., Suite 204B
Garden Grove, CA 92845
Email: davidkuoch@sbcglobal.net



Sopheary Band

**ក្រុមតន្ត្រីសោភារី**

រីករាយបំពេញការប្រគុំតន្ត្រីជូនលោក-អ្នកក្នុងពិធីបុណ្យផ្សេងៗ ។

សូមទាក់ទងអ្នកគ្រប់គ្រង :

Charlie Ouk 562-591-2011

Cell: 562-400-7678

SOPHEARY BAND


# សមាគមខ្មែរនៅទ្វីបអាមេរិក

# CAMBODIAN ASSOCIATION OF AMERICA

## A Nonprofit Human Services Organization

សមាគមខ្មែរនៅទ្វីបអាមេរិក – CAMBODIAN ASSOCIATION OF AMERICA

2 Hearts, 2 Hands, 1 Purpose
Building a Strong, Healthy Marriage

## លំនាំសុភមង្គលនៃស្វាមីភរិយា និងគ្រួសារ

**គតិលេខមុខ**

*** ចំពោះសមាគមន៍ :**

- អត្រាកើនខ្ពស់ក្នុងចំណោមប្រជាជនដែលមានសុភមង្គលក្នុងគ្រួសារ
- អត្រាកើនខ្ពស់ក្នុងចំណោមប្រជាជនដែលមានការសិក្សា
- កាត់បន្ថយអំពើហិង្សាក្នុងសង្គម
- កាត់បន្ថយឧក្រិដ្ឋកម្មក្នុងសង្គម
- កាត់បន្ថយចំនួនក្មេងមានផ្ទៃពោះក្រោយអាយុ
- កាត់បន្ថយចំនួនក្មេងក្រោមអាយុដើរ[illegible]
- ភាគច្រើនជាអ្នកមានផ្ទះសំបែង
- កាត់បន្ថយចំនួនជនអន្តោប្រវេសន៍ខុសច្បាប់
- ភាគច្រើនជាអ្នកមានទ្រព្យសម្បត្តិ
- កាត់បន្ថយសេចក្តីត្រូវការក្នុងសង្គមកិច្ច

**សំណួរ :**

- តើមនុស្សយើងសព្វថ្ងៃ នៅមានជំនឿលើអាពាហ៍ពិពាហ៍ដែរឬទេ ? ឬក៏យល់ថា វាមិនមានសារៈសំខាន់ដូចកាលមុនទៀតឡើយ ?

ទោះបីមនុស្សភាគច្រើនមានការព្រួយបារម្ភចំពោះអត្រាខ្ពស់នៃការលែងលះគ្នាយ៉ាងណាក៏ដោយភាគច្រើនទៅតែមានសង្ឃឹមចង់រៀបអាពាហ៍ពិពាហ៍ក្នុងអនាគត ។ ហើយទោះបីមនុស្សមួយចំនួនបានឆ្លងកាត់ការតស៊ូដ៏លំបាក ដែលបានកើតឡើងដោយសារការលែងលះគ្នាក៏ដោយ ក៏គេនៅតែស្វែងរកសុភមង្គលឱ្យគ្រួសារ ។ ការស្រាវជ្រាវបានបង្ហាញថា ច្រើនជាង៨០% នៃយុវជននៅតែចង់រៀបការ ហើយយល់ថា ជារឿងសំខាន់ក្នុងឆាកជីវិតសឹងតែ៩០% នៃជនជាតិអាមេរិកាំង មិនយល់ស្របនឹងគំនិតថា អាពាហ៍ពិពាហ៍គឺជាទំនៀមទំលាប់ហួសសម័យឡើយ ។ ហើយមានមនុស្សភាគតិចណាស់ដែល មិនចង់រៀបការសោះ ឬដាច់ខាតមិនរៀបការម្តងទៀតសោះ ។

**ប្រសិទ្ធិភាពនៃការប៉ិនប្រសប់សន្ទនា និងស្តាប់**

**សំណួរ :**

-តើអ្នកមានស្គាល់អ្នកណាម្នាក់ ដែលពូកែស្តាប់យកចិត្តទុកដាក់ទៅលើរូបអ្នក ?

-តើអ្វីទៅដែលបានធ្វើឱ្យគេនោះ ជាអ្នកស្តាប់ដ៏ប៉ិនប្រសប់ ?

-តើការចេះដឹង និងជំនាញដ៏ស្ទាត់ ដែលនាំឱ្យអាពាហ៍ពិពាហ៍បានជោគជ័យអាចយកមកធ្វើជាមេរៀនសំរាប់អ្នកដទៃឱ្យចេះផងបានឬទេ ?

-តើសុភមង្គលក្នុងរង្វង់គ្រួសារ ឋិតនៅលើការជ្រើសរើសគូស្រករឬ ?

● មនុស្សម្នាក់ៗអាចរៀនសូត្របាននូវចំណេះវិជ្ជា និងការប៉ិនប្រសប់ដ៏ស្ទាត់ក្នុងការធ្វើឱ្យអាពាហ៍ពិពាហ៍មានជោគជ័យ ទោះបីគេទាំងពីរពុំទាន់បានយល់ចិត្តយល់ថ្លើមគ្នាក៏ដោយ ។ មានកម្មវិធីសិក្សាជាច្រើន ស្តីអំពីសុភមង្គលក្នុងគ្រួសារ ដែលអាចជួយដល់គូដណ្តឹងថ្មីថ្មោង និងស្វាមីភរិយា ក្នុងការបង្កើនការចេះដឹង និងប៉ិនប្រសប់ ដើម្បីស្វែងរកសុភមង្គលដ៏ប្រសើរក្នុងគ្រួសារ ។

+ការស្រាវជ្រាវបានបញ្ជាក់ថា អនុវត្តនូវអ្វីដែលបានរៀនហើយអាចជួយចំរើនដល់ទំនាក់ទំនងរបស់យើង និងជួយបន្ថយដល់ការលែងលះគ្នា ។ ការអប់រំសុភមង្គលអាពាហ៍ពិពាហ៍អាចជាជំនួយដ៏វិសេសវិសាលមួយ សំរាប់អាពាហ៍ពិពាហ៍ជាច្រើន ដែលភាគច្រើនបញ្ចប់ដោយការ លែងលះគ្នា ។ **នៅមានត**

Funding for This project is provided by U.S Department of Health and Human Services Administration for Children and Families Grant #90FE0065




ចំណងដៃពិសេសពីផលិតកម្មមាតុភូមិ




2517 E. ANAHEIM STREET LONG BEACH, CA 90804

Tel: (562) 968-7188 • (562) 438-8602

















CD 1 & CD 3 ON SALE NOW




កម្រង CD អធិរាជសម្លេងមាសអមដោយអត្ថាធិប្បាយ លេខ១ & ៣ បានចរាចរនៅលើទីផ្សារហើយ!

ផលិតកម្មមាតុភូមិ សូមស្វាគមន៍ !

## បោះឆ្នោតរកយុត្តិធម៌ឲ្យ...

គោរពលក្ខន្តិកៈ ពួកគេមិនត្រូវធ្វើកំហុស១១ឆ្នាំកន្លងមកទេ រួចហើយចាត់ចែងការបោះឆ្នោតដោយខ្លួនឯង ដោយពុំចាំបាច់មានគណៈកម្មាធិការកណ្ដាលឡើយ ។

នៅក្នុងលិខិតរបស់ ពៅ សាវ៉ន បានបញ្ជាក់ថា ការស៊ើបអង្កេតពេញលេញពីការបោះឆ្នោតក្លែងបន្លំនិងខុសច្បាប់ និងធ្វើឡើង ហើយសកម្មភាពសមស្របនឹងដាក់ចេញប្រឆាំងនឹងអ្នកដែលបានបង្ខូចការពិត និងនាំមកនូវការអាប់ឱនកិត្តិយសដល់កិត្តិនាមដ៏ល្អរបស់ពុទ្ធិកសមាគមខ្មែរ ។ ទោះជាយ៉ាងនេះក្ដីសមាគមនឹងស៊ើបអង្កេត ព្រមទាំងដោះស្រាយផងដែរ ចំពោះការប្ដឹងតវ៉ាណាមួយរបស់ព្រះសង្ឃ និងសមាជិក ។ យើងជឿជាក់ថា បញ្ហាទាំងនេះត្រូវការនូវការដោះស្រាយ និងការសន្យា ដើម្បីស្វែងរកការពិត និងស្ដារនូវកិត្តិនាម និងកិត្តិយសដ៏ល្អរបស់សមាគម ។

ក្នុងចុងបញ្ចប់ឆ្លើយតបនោះដែរ ក្នុងលិខិតរបស់លោក លី ឡៀប បានបំភ្លឺថា បើគេចង់ធ្វើការស៊ើបអង្កេតលើការបោះឆ្នោតក្លែងបន្លំ និងខុសច្បាប់ គឺមានតែគេចង់ឱ្យការបោះឆ្នោត នោះត្រឹមត្រូវ និងស្របច្បាប់ស្របទៅតាមការចង់បានរបស់គេ ។ តាមពិតការទទួលខុសត្រូវក្នុងការបោះឆ្នោត គឺជារបស់គណៈកម្មាធិការកណ្ដាល ។ បើគេចង់ធ្វើការស៊ើបអង្កេតគេគួរហៅគណៈកម្មាធិការកណ្ដាលទៅសាកសួរក្នុងនាមខ្ញុំ (លី ឡៀប) បានប្រុងប្រៀបខ្លួនជានិច្ច និងចូលខ្លួនទៅឆ្លើយបំភ្លឺនូវគ្រប់សំនួរទាំងអស់ ។ "ការពិត" នឹងត្រូវលាតត្រដាងជាសាធារណៈ និងនៅចំពោះមុខច្បាប់ ។ ភាគីតំណាងព្រះសង្ឃ និងពុទ្ធបរិស័ទគ្រាន់តែជាអ្នកអនុវត្តតាមលក្ខន្តិកៈរបស់គណៈកម្មាធិការកណ្ដាលតែប៉ុណ្ណោះ ។

ប្រធានគណៈកម្មការពុទ្ធិកសមាគមខ្មែរថ្មី លោក សរ ស៊ីថាល់ បានថ្លែងប្រាប់ខ្មែរប៉ុស្តិ៍ថា ក្រុមលោកមិនមានប្រតិកម្មអ្វីនឹងលិខិតថ្លែងការរបស់លោក ពៅ សាវ៉ន ទេ ។ ដោយលោកទុកភារកិច្ចឱ្យមេធាវីធ្វើការតាមផ្លូវច្បាប់ក្នុងដំណោះស្រាយ ។ ការរកខុសត្រូវបញ្ចប់នៃក្ដីក្ដាំរវាងឧបាសកឧបាសិកា និងគណៈកម្មការចាស់ត្រូវ ធ្វើឡើងនៅតុលាការជាន់ខ្ពស់រដ្ឋ California ។ មានតែតុលាការប៉ុណ្ណោះដែលអាចវិនិច្ឆ័យថា ភាគីណាមួយជាអ្នកគ្រប់គ្រងសមាគមតាមច្បាប់ ។

●នៅក្នុងលិខិតនៃការផ្សាយរបស់វត្តអាយរ៉ាប់របស់គណៈកម្មការថ្មី មានបញ្ជាក់ពីកម្មវត្ថុចំនួន ២ ដែលទី១ និយាយអំពីការបោះឆ្នោតគោរពតាមលក្ខន្តិកៈពុទ្ធិកសមាគមខ្មែរ ថ្ងៃទី ២៧ មករា ឆ្នាំ ២០០៨ ដោយបានបោះឆ្នោតជ្រើសរើសបានគណៈកម្មការថ្មីចំនួន១៣នាក់ ទាំងគណៈកម្មការនាយក និងគណៈកម្មការប្រតិបត្តិ ដែលក្រុម គណៈកម្មការថ្មីនេះ បញ្ជាក់មានការទទួលស្គាល់ពីក្រុមពុទ្ធបរិស័ទចំនួន៥២៥នាក់ ព្រមទាំងព្រះសង្ឃចំនួន ៥អង្គ ដែលមានព្រះចៅអធិការវត្តទទួលស្គាល់ផងដែរ ។ ហើយនៅកម្មវត្ថុទី២ គណៈកម្មការនាយកវត្តអាយរ៉ាប់ប្រចាំឆ្នាំ២០០៨ ជាគណៈកម្មការដែលបានកើតឡើងត្រឹមត្រូវតាមផ្លូវច្បាប់សមាគម ព្រោះស្របនឹងមាត្រាទី៤ នៃលក្ខន្តិកៈពុទ្ធិកសមាគមត្រឹមត្រូវតាមច្បាប់រដ្ឋប្បវេណី ព្រោះស្របតាម

( តនៅទំព័រទី១៤ )

LENG BEAUTY SALON

ហាងកាត់សក់-សំអាងការ

2224 E. ANAHEIM STREET • LONG BEACH, CA 90804

(562) 434-9621

មានជាងចំណានៗដែលមានការពិសោធន៍ជាច្រើនឆ្នាំជាមួយជំនាញកាត់សក់, អ៊ុតសក់ សម្រាប់មនុស្សគ្រប់វ័យ ប្រុស-ស្ត្រី ។

ហាងយើងខ្ញុំក៏មានទទួលតែងការក្នុងពិធីរៀបអាពាហ៍ពិពាហ៍តាមម៉ូតស៊ីវិល័យទាន់សម័យនិយម ឬបែបប្រពៃណីបូរាណ ។

-ទទួលសាក់ចិញ្ចើម និងគូរភ្នែក

សូមអញ្ជើញ ដោយមេត្រីភាព!

ហាងយើងខ្ញុំត្រូវការរកជាងលាបក្រចកម្នាក់ និងរកជាងអ៊ុតសក់ម្នាក់ !



## ជំនឿនៃការសែនព្រេនក្នុង...

ទៅថ្ងៃក្រោយបុណ្យចូលឆ្នាំចិន-វៀតណាមឆ្នាំនេះ ត្រូវនឹងថ្ងៃទី ៦-៧-៨ ខែកុម្ភៈ មានរយៈពេល៣ថ្ងៃ គឺថ្ងៃដ៏អស្ចារ្យបំផុតរបស់ជនជាតិចិន-វៀតណាម ។ គេសង្កេតឃើញមានរៀបចំពិធីសែនព្រេននៅតាមផ្ទះរៀងៗខ្លួន ដែលខិតខំបួងសួងចំពោះអារក្សអ្នកតា ទេវតា មេឃដី ដូនជីតា សាច់សារលោហិត ដែលបានចែកឋានទៅកាន់បរលោក ។



ការសែនព្រេននេះ ក្នុងបំណងសូមឱ្យបានសេចក្តីសុខសប្បាយរកស៊ីមានបាននៅឆ្នាំថ្មី ដល់ក្រុមគ្រួសាររបស់គេ ។ តាមទំលាប់របស់ជនជាតិចិន នៅថ្ងៃទី១ នៃថ្ងៃបុណ្យចូលឆ្នាំ ឬថ្ងៃឈីវអ៊ិច គេត្រូវតមមិនធ្វើការងារ មិនបោសជី មិនឈ្លោះប្រកែកគ្នា ឬធ្វើឱ្យបែកបាក់របស់អ្វីទោះទេ គឺពួកគេសំងំនៅក្នុងផ្ទះសែនព្រេន ផឹកស៊ី លេងល្បែងជាមួយក្រុមគ្រួសារប៉ុណ្ណោះ ។ ក្រៅពីគ្រឿងតង្វាយ ពន្លឺភ្លើង ធូបទៀន នៅតាមកន្លែងសក្ការៈបូជា និងរានទទួលទេវតារបស់គេ ក៏ឮសំលេងអុជផាវកងរំពងស្ទើរស្តាប់អ្វីពុំឮ ដើម្បីទទួលទេវតាឆ្នាំថ្មី ។ លុះចូលថ្ងៃទី២ និងទី៣គេលែងត្រូវតមទៀតហើយ គឺពួកគេទៅសួរសុខទុក្ខបងប្អូនដែលរស់នៅឆ្ងាយៗ ខ្លះទៀតធ្វើដំណើរទៅកំសាន្តទៅតាមរមណីយដ្ឋាននានា ។

បន្ទាប់ពីចប់បុណ្យចូលឆ្នាំនេះ គ្រួសារចិនដែលមានទ្រព្យសម្បត្តិស្តុកស្តម្ភ ច្រើនតែជួលម៉ុងសាយមកលោត ដើម្បីបណ្តេញឧបទ្រពចង្រៃឱ្យអស់ និងសូមពរជ័យទេវតាឆ្នាំថ្មី ជួយទ្រទ្រង់ដល់ពួកគេ ។ សំលេងស្គរម៉ុងសាយនេះលាន់ឮ មានរយៈពេលជាច្រើនថ្ងៃ នៅតាមផ្ទះគ្រួសារចិនជាបន្តបន្ទាប់គ្នា គឺវាស្របនឹងរបាំត្រុដិរបស់ខ្មែរ ដែលសំដែងនៅចូលឆ្នាំខ្មែរដែរ ។

ទាក់ទិនទៅនឹងពិធីសែនព្រេនបុណ្យចូលឆ្នាំចិន-វៀតណាមនេះ មានការអះអាងរឿង១ថា ពីសំណាក់ជនជាតិចិនមួយចំនួនថា កើតទៅសម័យឡៅជឺ វីរបុរសចិន បានសរសេរគម្ពីរមួយឈ្មោះថា "តោតិចកេង" ដែលជាគោលការណ៍សំខាន់របស់លទ្ធិតៅ មុនពុទ្ធសករាជប្រមាណ៦០ឆ្នាំ ។ នៅពេលគាត់ស្លាប់ទៅប្រជាជនចិនបានរៀបចំពិធីសែនព្រេនឱ្យគាត់យ៉ាងគគ្រឹកគគ្រេង ។ ក្រោយមានអ្នកប្រាជ្ញដ៏ល្បីល្បាញ គឺខុងជឺ ដែលកើតមុនពុទ្ធសករាជ៥ឆ្នាំ ហើយត្រូវបានព្រះមហាក្សត្រតែងតាំងជាមន្ត្រីធំ មានកិត្តិយសល្បីល្បាញដូចសូក្រាត ទស្សនវិទូរបស់ក្រិចដែរ ។ ខុងជឺ មានតួនាទីបង្ហាត់បង្រៀនផ្នែកសាសនា សីលធម៌ គុណធម៌ ដល់មន្ត្រីរាជការរបស់ប្រជាពលរដ្ឋចិន ឱ្យយល់ពីបញ្ហាទាំងអស់នេះ និងជាអ្នកបង្កើតពិធីសែនព្រេនឡើង ។

នៅពេលគាត់ស្លាប់ទៅប្រជាជនចិនក៏រៀបចំពិធីគោរពវិញ្ញាណក្ខន្ធគាត់ដូចព្រះ ដោយមានការសែនព្រេនយ៉ាងមហាឡារិក ។ អ្នកខ្លះទៀតថាពិធីសែនព្រេននេះ មានដើមកំណើតតាំងពីសម័យបុរាណ តាមរយៈការជឿលើធម្មជាតិ អារក្ស អ្នកតា ទេវតា គឺមុនពេលមហាវីរបុរសឡៅជឺ និង ខុងជឺ ទៅទៀត ។ ប៉ុន្តែទោះជាយ៉ាងណាក៏ដោយ មហាវីរបុរសទាំងពីរនេះ ត្រូវបានប្រជាពលរដ្ឋចិន ចាត់ទុកជាមគ្គុទ្ទេសក៍ក្នុងការរៀបចំពិធីសែន ដែលមានក្បួនច្បាប់ត្រឹមត្រូវ ហើយកូនចៅជំនាន់ក្រោយៗបន្តគោរពប្រពៃណីនេះយ៉ាងខ្ជាប់ខ្ជួនរហូតមក ។

ពិធីសែនព្រេនបុណ្យចូលឆ្នាំចិននេះ មានសភាពអធិកអធមខ្លាំងណាស់ ចំពោះបងប្អូនជនជាតិចិន និងកូនកាត់ចិន-វៀតណាម ព្រោះពួកគេមានការផឹកស៊ី ជួបជុំគ្រួសារ មិត្តភក្តិ លេងល្បែង ធ្វើដំណើរកំសាន្ត ។ ក្នុងពិធីបុណ្យនេះ ឃើញមានការរីករាយសប្បាយស្ទើរពេញពិភពលោក ហើយវប្បធម៌របស់ជនជាតិចិន ត្រូវបានជនជាតិដទៃ ដែលជាម្ចាស់ស្រុកទទួលយកយ៉ាងស្ងាត់ស្ងៀម សូម្បីតែខ្មែរខ្លះមានសំបុរខ្មៅ ក៏អះអាងថា ខ្លួនជាចិន ៕




▸ ចំពោះមនុស្សចាស់ ចាប់ពីអាយុ៦៥ឆ្នាំឡើងទៅ ដែលមាន Medicare និងត្រូវបានការស្នើសុំនូវទឹកដោះគោបំប៉នកម្លាំង, កៅអីប្រើកម្លាំងភ្លើង, គ្រែប្រើដោយកម្លាំងភ្លើង, ប្រដាប់ប្រដាវាស់សំពាធឈាម, សំភារៈពិនិត្យស្ករក្នុងឈាម ឬទឹកនោមផ្អែម ។

▸ យើងខ្ញុំជួយស្នើសុំដោយឥតគិតកម្រៃ ដោយមានការដឹកជញ្ជូនទៅជួបវេជ្ជបណ្ឌិត ទៀតផង ។

សូមមេត្តាទាក់ទងលេខទូរស័ព្ទ : សូមអរគុណ !

(626) 476-3340 យើងខ្ញុំនិយាយភាសាខ្មែរ
(619) 261-2358 យើងខ្ញុំនិយាយភាសាអង់គ្លេស


## ទិវានៃក្តីស្រឡាញ់មានសារ...

គ្រប់ទិសទី គឺជាទិវាមិត្តសញ្ញារហូតដល់សព្វថ្ងៃ ដោយការឱ្យនូវអ្វីម្យ៉ាង ដែលពួកយើងហៅថា (Valentine) ។

Valentine´s day គឺជាថ្ងៃមួយសំរាប់បង្ហាញពីទឹកចិត្តរបស់ពួកគេ ម្នាក់ៗចំពោះអ្នកមានគុណ ប្តីប្រពន្ធ គូសង្សារ និងមិត្តភក្តិ ។ ពួកគេបានជូនកាដូគ្នាទៅវិញទៅមក ដែលភាគច្រើនផ្កាកុលាប ការដើរកំសាន្ត ការនាំគ្នាទៅទទួលទាន រាំកំសាន្ត ជាដើម ។

ពួកយុវវ័យ កាលណាពិធីនេះចូលមកដល់ គេសប្បាយរីករាយខ្លាំងណាស់ ។ ដោយទិញផ្កាកុលាបសំរាប់គូសង្សារ និងមិត្តភក្តិ ដើម្បីបញ្ជាក់ពីចំណងអនុស្សាវរីយ៍ កាន់តែជ្រាលជ្រៅមួយកំរិតថែមទៀត ។

វត្ថុអនុស្សាវរីយ៍ដែលលក់ដាច់ជាងគេ គឺផ្កាកុលាបសូកូឡា ជាការពេញនិយមសំរាប់យុវវ័យ ដើម្បីបញ្ជាក់ពីសេចក្តីស្នេហា ។

ចំណែកប្រទេសកម្ពុជា ទើបតែទទួលយកវប្បធម៌នេះ រយៈពេលប៉ុន្មានឆ្នាំចុងក្រោយនេះ ។ គេឃើញពួកយុវវ័យ ភាគច្រើន នៅថ្ងៃនេះ ច្រើនទៅកន្លែងរាំកំសាន្ត ខារ៉ាអូខេ ដែលមានបន្ទប់បិទជិត ហើយពួកគេកៀកកើយគ្នាយ៉ាងស្និតរម្មូត ទៀតផង ។

អ្នកស្រី ទូច ផល្លា ម្ចាស់ហាងលក់ផ្កានៅផ្សារអូឡាំពិក បានឱ្យដឹងថា ការលក់ផ្កានៅថ្ងៃបុណ្យសង្សារនេះ ដាច់ខ្លាំងណាស់ និងបានថ្លៃទៀតផង ។ ក្នុងថ្ងៃនេះ គាត់អាចលក់បានប្រហែលជិតមួយម៉ឺនទង ។

អ្នកស្រី ទូច ផល្លា បានបន្តថា ការដែលគាត់លក់ដាច់ជាងគេ គឺដោយសារមានសេវាល្អ ដែលក្នុងមួយទងតម្លៃចាប់ទី៣០០០ទៅ ៣៥០០រៀល ។ ជាពិសេស នេះជាយុវវ័យនិយមទិញផ្កាកុលាបសំរាប់បញ្ជាក់ពីក្តីស្រឡាញ់ ។

លោក ម៉ាក់ សារ៉ាត ប្រធានក្រុមប្រឹក្សាយុវជនបានឱ្យដឹងថា ថ្ងៃនៃក្តីស្រឡាញ់នេះ សំរាប់ប្រទេសគេ វាមានខ្លឹមសារជ្រាលជ្រៅខ្លាំងណាស់ ។ ប៉ុន្តែ សំរាប់កម្ពុជាយើងហាក់ដូចជាពុំសូវល្អ គឺធ្វើឱ្យយុវជនមួយចំនួនតោចពីផ្ទះ សាលារៀន បង្កើតឱ្យមានស្នេហារហូតដល់ជ្រុលជ្រោះ ហ៊ានដល់ការរួមភេទថែមទៀត ។

លោកបញ្ជាក់ថា Valentine´s day មិនជាថ្ងៃ ដែលក្មេងស្រីត្រូវតែដើរលេងជាមួយគូសង្សារនោះទេ ហើយក៏មិនត្រូវបណ្តោយខ្លួនប្រាណឱ្យសង្សារដែរ ។

លោក ស៊ុន វីរៈ និស្សិតឆ្នាំទី៤ នៅសាកលវិទ្យាល័យភូមិន្ទភ្នំពេញ បានឱ្យដឹងថា ឥទ្ធិពលនៃវប្បធម៌បរទេស បានគ្របដណ្តប់មកលើសង្គមខ្មែរយើងខ្លាំងណាស់ ។ ប៉ុន្តែ អ្វីដែលសំខាន់នោះ ឪពុកម្តាយ ក្រុមគ្រួសារ គួរតែចូលរួមជួយទប់ស្កាត់ផងចៀសវាងដល់ពេលមានរឿងរ៉ាវ ហើយបានស្តាយក្រោយ ។

លោក សុក វណ្ណា នាយកវិទ្យាល័យបាក់ទូក ក្រុងភ្នំពេញ បានបញ្ជាក់ថា ក្មេងៗសព្វថ្ងៃដើរលឿនណាស់ គេអាចទំនាក់ទំនងគ្នាតាមរយៈទូរស័ព្ទ និង






អ៊ីម៉ែលយ៉ាងងាយស្រួល ។ ភាពជឿនលឿននេះក៏ជាមូលហេតុបណ្តាលឱ្យយុវវ័យ ងាយនឹងធ្លាក់ខ្លួនក្នុងអន្លង់ស្នេហាដែរ ។

លោក សុក វណ្ណា បានបន្តថា អ្វីដែលកំពុងកើតនោះ ក្រុមគ្រួសារគួរតែមានការប្រុងប្រយ័ត្ន និងថែទាំកូនចៅឱ្យបានល្អ ។

នៅស្រុកគេ ថ្ងៃនៃសេចក្តីស្រឡាញ់នេះ គឺធ្វើឡើងសំរាប់មនុស្សគ្រប់វ័យ បញ្ជាក់ពីការដឹងគុណចំពោះចាស់ទុំ និងភក្តីភាពស្មោះត្រង់ ។ ចំណែកស្រុកខ្មែរពិធីនេះ មានតែយុវវ័យទេ ដែលចូលចិត្ត ហើយពួកគេបានផ្តោតអារម្មណ៍ទៅលើរឿងស្នេហា ។

យុវសិស្ស អេង ពិសី រៀននៅវិទ្យាល័យបាក់ទូក បានឱ្យដឹងថា ខ្លួនមានសេចក្តីរីករាយណាស់ នៅពេលដែលថ្ងៃនៃសេចក្តីស្រឡាញ់មកដល់ម្តងៗ ព្រោះជាឱកាសដ៏ល្អសំរាប់បញ្ជាក់ពីទឹកចិត្តចំពោះមិត្តភក្តិ ។ ជាពិសេស បានដើរលេងកំសាន្តសប្បាយជាមួយមិត្តភក្តិ បំភ្លេចអស់នូវទុក្ខកង្វល់ពីការងាររៀនសូត្រ ។

ពិធីបុណ្យនៃក្តីស្រឡាញ់នេះ ពិតជាមានអត្ថន័យជ្រាលជ្រៅសំរាប់យុវវ័យ ដែលរស់នៅប្រទេសជឿនលឿន ។ ចំណែកយុវវ័យនៅស្រុកខ្មែរ មិនទាន់មានសិទ្ធិសេរីភាពពេញលេញ ដូចអារ្យប្រទេសនោះទេ ព្រោះទំនៀមទំលាប់ប្រពៃណីបានចាក់ឫសយ៉ាងជ្រៅក្នុងសង្គមខ្មែរ ៕

### អាជ្ញាធរ Long Beach និងការ...

ក្រុងខ្មែរ Long Beach ផងដែរ ។

កាលពីថ្ងៃទី២៤ ខែមករា កាសែតខ្មែរប៉ុស្តិ៍ បានទទួលនូវសារ E-mail ពីអ្នកស្រីព្រឹទ្ធសមាជិក សហរដ្ឋអាមេរិក Barbara Boxer ប្រចាំរដ្ឋ California បានបង្ហាញលិខិតជាភាសាអង់គ្លេស ឱ្យដឹងថា កម្មវិធីដែលមានឈ្មោះថា កម្មវិធីបង្ការ និងបង្ក្រាបក្រុមយុវជនក្នុងក្រុង Long Beach បានទទួលនូវកញ្ចប់ថវិកាចំនួន ២៦៨.៩០០ ដុល្លារ អាមេរិក ក្នុងខ្ទង់ថវិការបស់សហព័ន្ធ សំរាប់ការ អប់រំ និងសេវាកម្មប្រឹក្សាយោបល់ក្នុងកិច្ចខិតខំ ប្រឹងប្រែង ដើម្បីបង្ការកុំឱ្យយុវជនធ្លាក់ខ្លួនទៅជា សមាជិករបស់ក្រុមយុវជន ដែលបានបង្កើតឡើង ។

នៅក្នុងលិខិតនោះ ដែលព្រឹទ្ធសមាជិក Barbara Boxer បានបង្ហាញនូវភាពរីករាយជាខ្លាំង ដោយ មើលឃើញថា ទីក្រុង Long Beach បានស្វែង រកជំនួយថវិការបស់រដ្ឋាភិបាលសហព័ន្ធ ។

ក្នុងការខិតខំប្រឹងប្រែង ដើម្បីទប់ស្កាត់កុំឱ្យ ក្មេងៗធ្លាក់ចូលផ្លូវមិនល្អ និងការពាក់ព័ន្ធក្នុង សកម្មភាពក្រុមយុវជន (Gangsters) ។

ក្នុងនាមជាព្រឹទ្ធសភាអាមេរិក អ្នកស្រី Barbara Boxer សន្យានឹងបន្តការងារសំរាប់កម្មវិធី ដែល នឹងផ្តល់ឱកាសឱ្យក្រុមយុវជននូវជម្រើសប្រកប ដោយសុខភាព និងសុវត្ថិភាពចៀសពីក្រុមយុវជន ក្នុងល្បែងអបាយមុខ តាមផ្លូវសាធារណៈ ។ ដោយ អ្នកស្រីមានសុទិដ្ឋិនិយមមើលឃើញថា កម្មវិធីក្រុង Long Beach នេះ ពិតជាបានទទួលនូវថវិកាច្រើន បន្ថែមទៀត តាមតម្រូវការពីកញ្ចប់ថវិការបស់ រដ្ឋាភិបាលសហព័ន្ធ ដែលមានយើងខ្ញុំជាក្រុម តំណាងរាស្ត្រជួយគាំទ្រទាំងស្រុង ។

នៅតំបន់ក្រុង Long Beach វាមិនខុសពីកុន ក្នុងរឿង Holly Wood ដែលសំដែងពីក្រុមយុវជន នៅតំបន់តិចសាសប៉ុន្មានទេ មានក្រុមក្មេងយុវជន ជាច្រើនក្រុម ចំរុះជាតិសាសន៍ មានស ខ្មៅ-ស្ពែនីស និងក្រុម Asian ជាដើម ដែលពួកគេតែងតែបង្ក រឿងរ៉ាវបាញ់ប្រហារសម្លាប់មនុស្សលួចប្លន់ឥតឈប់ ឈរ ។ ដែលសមត្ថកិច្ច និងអាជ្ញាធរ ក៏រងគ្រោះ ដល់អាយុជីវិត ព្រោះតែស្នាដៃពួកគេមិនតិចទេ ។ ជាពិសេសក្រុម Police ដែលមានអ្នកពិការមាន អ្នកស្លាប់ ព្រោះតែឆាកប្រយុទ្ធតដៃពីពួកក្មេង យុវជនទាំងនោះ ។

សហគមន៍ខ្មែរ Long Beach មានគ្រួសារជា មន្ត្រី ដែលកូនបានធ្លាក់ខ្លួនចូលទៅក្នុងក្រុមក្មេង យុវជន ព្រោះតែកត្តាជីវភាព និងការមិនមាន ពេលវេលាគ្រប់គ្រាន់ក្នុងការអប់រំកូនចៅជាមួយ



អ្នកស្រី Barbara Boxer ព្រឹទ្ធសភាអាមេរិក ប្រចាំ California

ចំណេះដឹងបញ្ហាភាសាជាដើម ដែលជាយថា ហេតុធ្វើឱ្យពួកគេងាយនឹងធ្លាក់ទៅក្នុងការអូសទាញ ពីក្រុមយុវជន ។ ដែលធ្វើឱ្យពួកគេខូចអនាគតអស់ មួយជីវិតក្នុងគុក ។

កាលពីឆ្នាំ ២០០២ រដ្ឋាភិបាលសហរដ្ឋអាមេរិក បានសម្រេចបញ្ជូនជនឧក្រិដ្ឋខ្មែរ ដែលមានសញ្ជាតិ អាមេរិក រាប់រយនាក់ទៅរស់នៅប្រទេសកម្ពុជា ព្រោះតែការប្រព្រឹត្តិទោសកំហុសជាឧក្រិដ្ឋកម្ម សម្លាប់មនុស្ស ដែលពួកគេជាច្រើននាក់ សុទ្ធតែ ជាបក្ខពួកក្រុមយុវជន ។ ចំណែកប្រជាជនវៀត ណាមជាង ៤០០០ នាក់ ទាំងអ្នកគ្មានសិទ្ធិរស់នៅ និងឧក្រិដ្ឋជន ក៏ត្រូវបានរដ្ឋាភិបាលអាមេរិកត្រៀម នឹងបញ្ជូនត្រឡប់ទៅកាន់ប្រទេសខ្លួនវិញ ហើយ ដែរ នៅឆ្នាំ ២០០៨ នេះ ។

បើលោកអ្នកដឹងថា កូនចៅរបស់ខ្លួន កំពុងតែ ចង់លង់ខ្លួនចូលទៅរកក្រុមក្មេងយុវជន (Gangsters) ហើយនឹងចង់ទប់ស្កាត់ពួកគេកុំឱ្យធ្លាក់ទៅក្នុងអំពើ អបាយមុខជាក្មេងយុវជន សូមមេត្តាទាក់ទងទៅ សាលាពួកគេ ឬសមត្ថកិច្ច Police និងសាលា ក្រុង Long Beach ៕


ហាងខ្មែរធ្វើតួ និងបាញ់ថ្នាំរថយន្ត

SAMS BODY & PAINT (562) 489-2077

SAM'S AUTO BODY

CUSTOM COLLISION REPAIRS

COMPLETE AUTO PAINTING

RESTORATION INSURANCE WORK

FLAT BED TOWING AVAILABLE

BORIN

TEL: 562-489-2877
FAX: 562-489-0022
CEL: 562-577-8259

EXPERT FRAME & BODY WORK

1427 Long Beach Blvd., Unit A, Long Beach, CA 90813

ហាងយើងខ្ញុំ ទិងជួលរថយន្ត
អោយជិះដោយមិនគិតថ្លៃ បើលោក
អ្នកយករថយន្តមកធ្វើនៅកន្លែង
យើងខ្ញុំ


### អង្គការ Global Witness...

លោក ហ៊ីង ប៊ុនហៀង មេបញ្ជាការអង្គរក្ស ហ៊ុន សែន, ឧត្តម សេនីយ៍ សៅ សុខា, អ្នកស្រី សេង គាង ភរិយា ឌី ចូច), សេង កុកហ៊ាង ។ ចំណែកលោក ហុក ឡង់ឌី អគ្គនាយកនគរបាល ជាតិ ដែលមានជាប់ពាក់ព័ន្ធនឹងអំពើពុករលួយក ន្លងមកត្រូវបានអាមេរិកធ្វើការហាមប្រាមមិន ឱ្យចូលប្រទេសគេមួយរយៈដែរ ។ ប៉ុន្តែ នៅឆ្នាំ ២០០៧ អាមេរិកក៏បានអនុញ្ញាតឱ្យ លោក ហុក ឡង់ឌី ចេញចូលធម្មតាវិញ ។

ដោយសារតែសែស្រឡាយអ្នកលួចជាតិនេះ បានធ្វើឱ្យព្រៃឈើនៅកម្ពុជា តំបន់ជួរភ្នំក្រវ៉ាញ ដងរែក ភូមិសាស្ត្រខេត្តបាត់ដំបង បន្ទាយមាន ជ័យ សៀមរាប ព្រះវិហារ រតនគិរី មណ្ឌលគិរី ស្ទឹងត្រែង ក្រចេះ កំពង់ចាម និងតំបន់មួយចំនួន ទៀត បានរងការកាប់បំផ្លាញយ៉ាងរង្គាល ។ ដោយសារតែគ្មានព្រៃឈើធម្មជាតិមានការប្រែ ប្រួល និងរាំងញឹកញាប់គ្មានភ្លៀង ធ្វើឱ្យរាស្ត្រខ្មែរ ធ្វើស្រែពុំបានជួបគ្រោះទុរ្ភិក្សរងទុក្ខលំបាកវេទនា ស្ទើរតែគ្រប់កន្លែង ៕


ឱសថស្ថានខ្មែរថ្ងៃនេះ

Today Pharmacy

2200 E. Anaheim St.#C Long Bach, CA 90804
Tel: (562) 438-2031 • Fax: (562) 438-2031
(2 Blocks East of Cherry Ave.)

Fast and Friendly Service

- Today Pharmacy គឺជាឱសថស្ថានបំរើការចែកចាយថ្នាំតាមវេជ្ជបញ្ជា ។
- ទទួលយកនៅ Medicare & Medical និង Insurance ។
- ដឹកជញ្ជូនថ្នាំផ្តល់ជូនឲ្យដល់គេហដ្ឋានដោយមិនគិតពីកំរៃផងដែរ ។

• FREE DELIVERY TODAY:
ថ្ងៃល្អរបស់លោកអ្នក
សូមស្វាគមន៍!

# អង្គការ Global Witness គាំទ្រអាមេរិក ឱ្យដាក់ទណ្ឌកម្មមន្ត្រីពុករលួយកម្ពុជា

ដោយ : ទីឃាយុ

ភ្នំពេញ កាលពីថ្ងៃទី២២ ខែមករា ឆ្នាំ២០០៨ កន្លងមកនេះ អង្គការ Global Witness ដែលបានធ្វើការងារផ្នែកបរិស្ថានយ៉ាងយកចិត្តទុកដាក់នៅប្រទេសកម្ពុជា បានសំដែងនូវការគាំទ្រចំពោះសភាអាមេរិក ដែលបានអនុម័តច្បាប់ហាមឃាត់ ចំពោះមន្ត្រីកម្ពុជាទាំងឡាយណា ដែលពាក់ព័ន្ធនឹងអំពើពុករលួយកាប់បំផ្លាញព្រៃឈើ ។ ច្បាប់នេះ ត្រូវបានអ្នកនាំពាក្យរដ្ឋាភិបាលកម្ពុជាច្រានចោល ហើយលើកហេតុផលថា មិនយុត្តិធម៌


ព្រៃឈើនៅតំបន់ជួរភ្នំត្រូវបានកាប់បំផ្លាញ

ចំពោះមន្ត្រីកម្ពុជានោះទេ ។

កាលពីខែមុនសមាជិកសភាសហរដ្ឋអាមេរិក បានអនុម័តច្បាប់នេះ បន្ទាប់ពីអង្គការ Global Witness បង្ហាញភស្តុតាងពីបទបំផ្លិចបំផ្លាញព្រៃឈើយ៉ាងរង្គាលនៅក្នុងប្រទេសកម្ពុជាកន្លងមក ។ រហូតមកទល់ពេលនេះ គេមិនទាន់ឃើញមន្ត្រីជាន់ខ្ពស់កម្ពុជាណាម្នាក់ត្រូវបានហាមប្រាមទិដ្ឋាការចូលសហរដ្ឋអាមេរិកនោះទេ នេះបើតាមលោក ជេហ្វ ដាយហ្គល មន្ត្រីនាំពាក្យស្ថានទូតអាមេរិក ។

ក្នុងច្បាប់នេះ ក៏បានអំពាវនាវឱ្យរដ្ឋាភិបាលអាមេរិក "ហាមប្រាមមន្ត្រីកម្ពុជាជាប់ពាក់ព័ន្ធនឹងអំពើពុករលួយ ដែលត្រូវបានបង្ហាញក្នុងរបាយការណ៍ Global Witness កាលពីខែ មិថុនា ឆ្នាំ ២០០៧ មានចំណងជើងថា សែ-ស្រឡាយក្នុងកម្ពុជាមិនឱ្យចូលសហរដ្ឋអាមេរិក" ។

លោក ដាយហ្គល បានមានប្រសាសន៍ថា នៅពេលយើងមិនទាន់មានការពិភាក្សារវាងស្ថានទូតប្រទេសកម្ពុជាជាមួយនឹងក្រុងវ៉ាស៊ីនតោន ដើម្បីពិចារណាការចោទប្រកាន់ពីកំហុសឆ្គង ដែលចោទប្រកាន់ដោយ Global Witness នៅឡើយទេ ។

លោក ខៀវ កាញារីទ្ធ រដ្ឋមន្ត្រីក្រសួងព័ត៌មាន និងជាអ្នកនាំពាក្យរបស់រដ្ឋាភិបាលកម្ពុជា បានបំភ្លឺតាមប្រព័ន្ធអ៊ីម៉ែលថា "ច្បាប់អាមេរិកមិនយុត្តិធម៌ និងមិនត្រូវបានស្វាគមន៍ឡើយ ។ ខ្ញុំប្រាកដថា មន្ត្រីអាមេរិកដែលធ្វើច្បាប់នេះ មិនបានចំណាយពេលវេលា ដើម្បីផ្ទៀងផ្ទាត់ភាពពិតនៃព្រឹត្តិការណ៍ ដែលទាក់ទងក្នុងឯកសារស្តីពីសែស្រឡាយនេះទេ" ។

លោក ខៀវ កាញារីទ្ធ បានបន្តថា "ការដែលអំពាវនាវឱ្យបណ្តាប្រទេសមួយចំនួនឈប់ផ្តល់ជំនួយដល់ប្រ-ទេសកម្ពុជា គឺមិនអាចទៅរួចទេ ពីព្រោះក្រុមអ្នកតំណាងរបស់គេស្ថិតនៅក្នុងមូលដ្ឋាននេះ ហើយពួកគេស្គាល់ជាងក្រុម Global Witness ឬអ្នកការិយាល័យធិបតេយ្យក្នុងក្រុង វ៉ាស៊ីងតោន" ។

លោក ស៊ីម៉ុន តៃល័រ នាយក Global Witness បានបញ្ជាក់ក្នុងសេចក្តីថ្លែងការណ៍ កាលពីថ្ងៃទី២២ ខែមករា ថា "ច្បាប់នេះ បានធ្វើឱ្យអាមេរិកលេចធ្លោក្នុងចំណោមប្រទេសអ្នកផ្តល់ជំនួយមកកម្ពុជា ហើយមានតែច្បាប់នេះទេ ទើបយើងអាចចាប់ផ្តើមប្រែក្រឡាស់ដំណើរការនៃការលួចជាតិបាន" ។

លោក ទី សុគន្ធ ប្រធាននាយកដ្ឋានព្រៃឈើ ដែលមានឈ្មោះក្នុងរបាយការណ៍ពាក់ព័ន្ធនឹងអំពើកាប់បំផ្លាញព្រៃឈើបានបដិសេធន៍ថា គាត់មិនមានពាក់ព័ន្ធទេ ហើយមិនចាប់អារម្មណ៍នឹងរបាយការណ៍ឡើយ គឺមានតែមនុស្សឆ្កួត ទើបវាយតម្លៃបែបនេះ ។

ចំណែកលោក សម រង្ស៊ី ប្រធានគណបក្ស សម រង្ស៊ី បានមានប្រសាសន៍ថា ការអនុម័តនេះ អាចមានប្រសិទ្ធភាពបំផុត ប្រឆាំងនឹងក្រុមដឹកនាំពុករលួយទាំងនេះ ខណៈពេលដែលពួកគេមិនព្រួយបារម្ភពីសាធារណៈជនទូទៅ ។ លោកបញ្ជាក់ថា ក្រុមមេដឹកនាំកម្ពុជាអាចមានការរសើបជាងក្រុមឧត្តមសេនីយ៍នៅភូមាទៅទៀត ។

បច្ចុប្បន្ន អាមេរិកបានធ្វើការប្រកាសហាមប្រាមចំការធ្វើដំណើរចំពោះមន្ត្រីភូមា ដែលកាលពីមុនមន្ត្រីរដ្ឋាភិបាលហ្ស៊ីមបាវេ និងក្រុមអ្នកគាំទ្រអតីតប្រធានាធិបតេយ្យ ស៊ែប គឺលោក ស្លូបដាន មីឡូសេវិក ។

អង្គការ Global Witness សង្ឃឹមថា វិធានការណ៍របស់អាមេរិកនេះនឹងបង្ខំឱ្យប្រទេសអ្នកជំនួយសំខាន់ៗដល់កម្ពុជា ដូចជា អង់គ្លេស បារាំង អាល្លឺម៉ង់ ជប៉ុន អូស្ត្រាលី យកជាគំរូតាម ។ ពិសេសសូមឱ្យរដ្ឋា-ភិបាលអាមេរិក ចាត់ការឈ្មោះក្នុងរបាយការណ៍ជាខ្សែស្រឡាយអ្នកលួចជាតិឱ្យខានតែបាន ។

គួរបញ្ជាក់ថា ឈ្មោះមេដឹកនាំមន្ត្រីជាន់ខ្ពស់ និងឈ្មួញបានឃុបឃិតគ្នាកាប់ព្រៃឈើលក់ឱ្យប្រទេសវៀតណាម និងថៃ ធ្វើភាពមានបានគ្មានកោតក្រែងនរណាបន្តិចសោះឡើយ ។ ក្នុងរបាយការណ៍នោះក៏មានវាយឈ្មោះ លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន និងភរិយាឈ្មោះ ប៊ុន រ៉ានី ហ៊ុន សែន, លោក ច័ន្ទ សារុន រដ្ឋមន្ត្រីក្រសួងកសិកម្ម រុក្ខាប្រមាញ់ និងនេសាទ, លោក ឌី ប៊ូច (ហ៊ុន ចូច) ប្អូន ជីដូនមួយ ហ៊ុន សែន, មេឈ្មួញ ជីង សុភាព ប្រធានក្រុមហ៊ុន ភាពីម៉ិច,

( តទៅទំព័រទី១២ )

# ក្រុមហ៊ុនសិលាដាម៉ិចជំរុញ...

ដើម្បីចូលរួមការកាត់បន្ថយភាពក្រីក្រខ្វះការងារ ធ្វើរបស់ប្រពលរដ្ឋ នៅក្នុងមូលដ្ឋាន ជាពិសេស គឺក្រុមគ្រួសារយោធិន ដែលកាត់រំសាយនៅពេលនោះឱ្យមានមុខរបរចញ្ចឹមក្រុមគ្រួសារនៅថ្ងៃអនាគត ។

ការអភិវឌ្ឍដំណាំកប្បាសរបស់ក្រុមហ៊ុនសិលាដាម៉ិចនេះ បាននាំយកពូជកប្បាសប្រ-ភេទថ្មី KWA ១៦ មកពីបរទេសមកធ្វើការដាំសាកល្បងលើផ្ទៃដីចំនួន១០០ហិកតា ដោយរួមបញ្ចូលជាមួយកសិករផង និងក្រុមគ្រួសារយោធិនរំសាយផង ។

តាមប្រសាសន៍របស់លោក ដួង ដារី តំណាងក្រុមហ៊ុនសិលាដាម៉ិច បានឱ្យដឹងថា កប្បាសនេះ ត្រូវបានធ្វើការដាំដុះនៅ ខែ មិថុនា រហូតដល់ខែ សីហា ទើបបញ្ឈប់ការដាំដុះ ។ ពេលធ្វើការដាំដុះរហូតដល់ធ្វើការប្រមូលផលកប្បាសមកវិញ នោះគឺត្រូវប្រើប្រាស់រយៈពេលបីខែកន្លះទើបត្រូវប្រមូលផល គឺចាប់តាំងពីចុងខែវិច្ឆិការហូតមកដល់ពាក់កណ្តាលខែធ្នូ ។ ចំពោះលក្ខណៈបច្ចេកទេសនៃការដាស់ដី ការភ្ជួរដីឱ្យបានល្អ និងលើកជារងតូចៗ ដោយទុកចន្លោះទ្រូងរង១ម៉ែត្រ ចន្លោះពីគុម្ព១ទៅគុម្ព១ទៀត០.៨០ម៉ែត្រ ។ ការអនុវត្តបច្ចេកទេសរបៀបនេះ ដើម្បីឱ្យដំណាំកប្បាសលូតលាស់បានល្អ ជាពិសេសចាប់ពីពេលដាំរយៈពេល១៣៥ថ្ងៃ កសិករអាចចាប់ផ្តើមប្រមូលផលបាន ក្នុងនោះដែរ ទិន្នផលកប្បាសប្រមូលផលបានក្នុង១ហិកតា ពី២ទៅ៣តោន ហើយក្នុង១តោនតំលៃ ៣៥០ដុល្លារ ។

លោក ដួង ដារី បានបន្តទៀតថា ចំពោះពូជកប្បាយប្រភេទ A១៦ អាចធ្វើការដាំដុះ និងប្រមូលផលបានក្នុងពីរដង១ឆ្នាំ ដោយយោងទៅតាមលក្ខណៈភូមិសាស្ត្រ ដែលអំ-ណោយផលមានប្រភពទឹកអាចធ្វើការស្រោចស្រពបានទៅតាមតំរូវការ ។ ក្រោយពេលដែលកសិករយើងអាចប្រមូលផលជាលើកទី១ នៅចុងខែវិច្ឆិកា រហូតដល់ខែធ្នូ និងរួចរាល់នៅដើមកុម្ភៈ ។ ដោយឡែកចំពោះទីផ្សារកប្បាសដែលកសិករយើងដាំបាន ក្រុមហ៊ុនសិលាដាម៉ិច ធានាទទួលទិញក្នុង១តោនតម្លៃ៣៥០ដុល្លារអាមេរិក ដោយពុំឱ្យប្រ-ជាកសិករព្រួយបារម្ភនោះទេ ។

លោក ដួង ដារី បានបញ្ជាក់បន្ថែមទៀតថា ក្រុមហ៊ុនសិលាដាម៉ិចនឹងធ្វើការដំឡើងរោងចក្រឱ្យរួចរាល់ជាស្ថាបពរក្នុងឆ្នាំ២០០៨ នេះ។ ក្នុងនោះដែរ ក្រុមហ៊ុនសិលាដាម៉ិច ត្រូវការពង្រីកសកម្មភាពដាំដុះដំណាំកប្បាសនៅលើផ្ទៃដីប្រមាណ៥០០០ហិកតាទៀត ដើម្បីឱ្យគ្រប់ទៅតាមតំរូវការរបស់រោងចក្រ ។ ក្នុងនោះដែរ បំផុសឱ្យមានការចូលរួមពីសំណាក់ក្រុមគ្រួសារយោធិនរំសាយអង្គភាពកងទ័ព និងប្រជាពលរដ្ឋនៅតាមតំបន់នានា នៅក្នុងខេត្តបាត់ដំបង ដើម្បីបង្កើនបរិមាណវត្ថុធាតុដើមសំរាប់ការផ្គត់ផ្គង់ដល់រោងចក្រ ។ ជំហានដំបូងនៅក្នុងឆ្នាំ២០០៧ នេះ ក្រុមហ៊ុនសិលាដាម៉ិច បាននឹងកំពុងដំណើរការនៃការសាងសង់ឃ្លាំងសំរាប់ស្តុកផលិតផលកប្បាសក្នុងការកែច្នៃផងដែរ ដែលមានទីតាំងនៅក្នុងស្រុករតនៈមណ្ឌលតែម្តង ។ ក្នុងដំណើរការអភិវឌ្ឍន៍ដំណាំកប្បាសនេះ ក្រុមហ៊ុនសិលាដាម៉ិច បានបង្កលក្ខណៈងាយស្រួលជាច្រើនសំរាប់កសិករ អង្គភាពកងទ័ព និងក្រុមគ្រួសារយោធិនរំសាយ ដើម្បីឱ្យពួកគាត់មានជីវភាពធូរធារក្នុងពេលអនាគត។

ចំពោះដំណាំកប្បាសនេះ ស្ត្រីម្នាក់ឈ្មោះ គង់ វណ្ណី អាយុ៤៥ឆ្នាំ រស់នៅក្នុងឃុំស្តៅ ស្រុករតនៈមណ្ឌល អតីតភរិយាយោធិនដែលកាត់រំសាយបានមានប្រសាសន៍ថា ក្រោយពីមានការគាំទ្រ និងការយកចិត្តទុកដាក់គ្រប់បែបយ៉ាងរបស់ក្រុមហ៊ុនសិលាដាម៉ិច ដែលបំផុសឱ្យមានការចូលរួមក្នុងការដាំដុះដំណាំកប្បាសនេះ ក្រុមគ្រួសាររបស់គាត់ក៏ដូចជាក្រុមគ្រួសារយោធិនរំសាយដ៏ទៃទៀតដែរ បានធ្វើការដាំដំណាំកប្បាសនេះទៅតាមក្រុមហ៊ុនបានចំនួនច្រើនរាប់សិបហិកតា ។ ចំពោះការដាំដុះទាំងនោះ ក្រុមហ៊ុនសិលាដាម៉ិច បាន



ផ្តល់ពូជទាំងអស់ និងធានាក្នុងការទិញយកផលិតផលដែលដាំបានទៀត ដោយមិនឱ្យពួកគាត់ព្រួយបារម្ភនោះទេ ។ ក្នុងនោះក្រុមហ៊ុនបានបង្កើតសាខា និងសហគមន៍នៅក្នុងមូលដ្ឋានផ្ទាល់សំរាប់ធានាដល់សេវាដាំដុះ និងការប្រមូលទិញទិន្នផលកប្បាសពីពួកគាត់ទៅតាមតម្លៃទីផ្សារ ដែលក្រុមហ៊ុនប្រកាស ។

អ្នកស្រី គង់ វណ្ណី បានបន្តទៀតថា ចំពោះការដាំដុះដំណាំកប្បាស និងបំផុសឱ្យមានការចូលរួមដាំនោះ បច្ចុប្បន្ននេះហាក់បីដូចមានការចាប់អារម្មណ៍ពីសំណាក់ប្រជា-ពលរដ្ឋជាច្រើន នៅតាមមូលដ្ឋានមួយចំនួននៅក្នុងស្រុករតនៈមណ្ឌល ។ បើតាមការប៉ាន់ប្រមាណទៅលើការដាំដុះដំណាំកប្បាសនេះនឹងមានការកើនឡើងជាងនេះទៅទៀត ដែលកាលពីមុនពួកគាត់និយមចូលចិត្តដាំពោតក្រហម សណ្តែកបាយ សណ្តែកសៀង និងដំឡូងមី បានផ្លាស់ប្តូរមកប្រកបមុខរបរដាំកប្បាសវិញ ជំនួសដំណាំផ្សេងៗទៀត ព្រោះដាំណាំកប្បាសងាយទទួលផល និងមិនសូវពិបាកថែទាំនោះទេ ។ បើពាក់ព័ន្ធទៅនឹងសត្វល្អិតចង្រៃមកយាយីនោះ គឺយើងមិនចាំបាច់ប្រើប្រាស់ថ្នាំពុលដែលមានជាតិគីមីនោះទេ គឺគ្រាន់តែប្រើស្លឹកស្តៅថ្នាំជក់មកត្រាំទឹក ហើយយកទៅបាញ់វាងាយស្រួល និងមិនចំណាយទុនច្រើនក្នុងការថែទាំឡើយ ។

## បោះឆ្នោតរកយុត្តិធម៌ឱ្យ...

ការព្រមព្រៀងរវាងគណៈកម្មការចាស់ និងក្រុមឧបាសក-ឧបាសិកា ដែលមានគណៈកម្មការកណ្តាល ៣រូប ជាអព្យាក្រិត នៅថ្ងៃទី៩ ធ្នូ ឆ្នាំ ២០០៧ ត្រឹមត្រូវតាមផ្លូវមេត្តាធម៌ ព្រោះក្រុមឧបាសក-ឧបាសិកា បានទទូចសុំឱ្យគណៈកម្មការ និងបក្ខពួកគាត់ចូលរួមបោះឆ្នោតវិញ ច្រើនលើកច្រើនគ្រា ទោះជាពួកគាត់ផុតកំណត់ក្តី ។ ត្រឹមត្រូវតាមផ្លូវពុទ្ធចក្រ ព្រោះធ្វើនៅក្រោមអធិបតីភាពរបស់គណសង្ឃវត្តអាយរ៉ាប់ ។ ត្រឹមត្រូវតាមផ្លូវប្រជាធិបតេយ្យ ក្រោមការត្រួតពិនិត្យរបស់គណៈកម្មការបោះឆ្នោត ដោយផ្ទុយទៅវិញ គណៈកម្មការចាស់នៅតែមានៈ ពុំព្រមកែកំហុសខ្លួនជាច្រើនគ្រា ពុំព្រមទទួលស្គាល់ថា សមាជិកសកម្មជាធំ ស្របតាមលក្ខន្តិកៈពុទ្ធិកសមាគមខ្មែរ ពុំព្រមទទួលស្គាល់ការបោះឆ្នោតនៅថ្ងៃទី២៧ មករា និងមិនត្រឹមត្រូវតែប៉ុណ្ណោះ គឺនៅតែមើលងាយព្រះសង្ឃ ដែលជាទីសក្ការៈរបស់ឧបាសក-ឧបាសិកាគ្រប់រូប នៅតែព្រហើនកោងកាចក្នុងវត្តអារាម ដូចជា សម្លុត និងឆាឆៅព្រះសង្ឃ នៅពេលព្រះសង្ឃកំពុងឆាន់កាលពីថ្ងៃអង្គារ ទី២៩ ខែមករា ថ្មីៗកន្លងទៅនេះ ដែលជាបទល្មើសលេខ៣០២ នៃក្រមព្រហ្មទណ្ឌ ។ នៅទីបញ្ចប់ ដូចកាសែតខ្មែរប៉ុស្តិ៍ បានបរិយាយពីការផ្សាយឆ្នាំទី២ លេខ៨ ថ្ងៃទី០១-១៥ ខែកុម្ភៈ ឆ្នាំ២០០៨ នៃការកើតមានវិបត្តិជម្លោះនៅវត្តអាយរ៉ាប់ បានឈានដល់ការប្តឹងផ្តល់គ្នានៅតុលាការមែន ។ ប្រជាពលរដ្ឋដែលជាអ្នកកាន់សីលទានធ្វើបុណ្យរងចាំអ៊ុតមើលក្រុមបុគ្គលខិលខូចមួយចំនួន មានទោសកំហុសឬយ៉ាងណា ? ព្រោះម្នាក់ៗ អះអាងលះបង់កាយ និងចិត្តមកបំរើវត្ត និងព្រះសង្ឃមិនចង់បានលាភសក្ការៈទេ... ចុះម្តេចក៏បង្កបញ្ហាមិនស្តាប់ព្រះសង្ឃទៅវិញ ៕


### TOYOTA OF LONG BEACH

- ត្រូវការជ្រើសរើសអ្នកលក់ឡានចំនួន ៣នាក់ (Sales person) មិនថាប្រុស ឬស្រី ដែលជាជនជាតិខ្មែរ មានស្នាត់ជំនាញភាសាខ្មែរ និងអង់គ្លេស ។
- មានទំនាក់ទំនងសាធារណៈល្អក្នុងទីផ្សារ និងមហាជននៃសហគមន៍ក្រុង Long Beah និងទីតំបន់ខ្មែរដទៃទៀត ។
- អ្នកលក់ឡាន (Sales Person) ត្រូវទទួលបានភាគរយក្នុងឡានមួយ ៣៥%(Commission) ។
- បើលោកអ្នកមានការចាប់អារម្មណ៍ចង់ធ្វើការជាមួយក្រុមហ៊ុនយើងខ្ញុំ សូមអញ្ជើញទាក់ទងនូវអាស័យដ្ឋានខាងក្រោម :

4401E. Pacific Coast Highway Long Beach, CA 90804
Phone: (562) 494-4444 /Fax: (562) 494-1350



### ហាងលក់គ្រឿងបន្លាស់រថយន្ត

LONG BEACH AUTO PARTS
Imports & Domestics

Free Delivery







សំរាប់អតិថិជនដែលមានបំណងផ្លាស់ប្តូរគ្រឿងបន្លាស់រថយន្ត សូមអញ្ជើញមកជាវគ្រឿងបន្លាស់ហាងយើងខ្ញុំដែលមានច្រើនប្រភេទតាមតម្រូវការរបស់អតិថិជន

1310B Stanley Ave
Long Beach, CA 90804 (562) 433-8090,(562) 433-8093





### វិមានមាស ភោជនីយដ្ឋាន និង រង្គសាល

1360 E , Anaheim St., Long Beach, CA 90813
Tel: (562) 591-7300 Fax: (562) 591-7331
Mon., Wed., Thu, 10AM- 10PM
Fri, Sat, Sun, 9 AM -2 AM (LIVE ! BAND )
Tuesday (Closed)

សូមអញ្ជើញភ្ញៀវសជាតិម្ហូប ខ្មែរ ថៃ នៅភោជនីយដ្ឋាន **វិមានមាស** ដែលបានបើកទ្វារបំរើអស់លោកអ្នក ចាប់តាំងពីថ្ងៃទី ១៣ ខែ វិច្ឆិកា ឆ្នាំ ២០០៧ នេះហើយ !!!






ចំណែកឯរង្គសាល **វិមានមាស** ក៏បានបើកទ្វារបំរើអស់លោកអ្នក រាំកំសាន្តជាមួយក្រុមតន្ត្រី **វិមានមាស** រៀងរាល់ចុងសប្តាហ៍ ចាប់ពីថ្ងៃ សុក្រ រហូតដល់ថ្ងៃ អាទិត្យ

ភោជនីយដ្ឋាន និង រង្គសាល វិមានមាស មាន ទទួលសំអាងការ ទទួលរៀបអាពាហ៍ពិពាហ៍ បុណ្យខួបកំណើត និង ពិធីជប់លៀងផ្សេងៗ...



# LAW OFFICES OF BOROTH CHAY

# ការិយាល័យមេធាវី





▸មេធាវីខ្មែរពូកែក្តីក្តាំនូវករណីគ្រោះថ្នាក់ចរាចររថយន្ត
◆អន្តោប្រវេសន៍ (ធានាប្តីប្រពន្ធ, គូដណ្តឹង, បងប្អូន) ◆ច្បាប់គ្រួសារ
◆បណ្តឹងលែងលះ ◆ប្រាក់ចិញ្ចឹមកូន ◆រដ្ឋប្បវេណី ◆ច្បាប់ក្ស័យធន
▸បើមិនឈ្នះក្តី គឺមិនគិតកម្រៃ .ពិគ្រោះយោបល់ ឬពិភាក្សាមិនគិតថ្លៃ
▸ករណីប្តឹងផ្តល់នឹងផ្តល់ចម្លើយជូនលោកអ្នក ថាតើបណ្តឹងរបស់លោកអ្នក
មានសង្ឃឹមឈ្នះឬយ៉ាងណា? តើគួរធ្វើការប្តឹងផ្តល់ដែរឬទេ? ។



**Up to 50% of Settlement to Clients**

▸Bankruptcy ▸Family Law ▸Dissolution of Marriage
▸Child and Spousal Support ▸Immigration
▸Family Sponsor Petition ▸Auto Accident
▸Low Contingency ▸No Recovery ▸No Fee.

**Personal Injury:**

Auto Accident Free Consultation
How strong is your case?
Should you file a claim?

We'll answer your questions!

**Other Legal Representations:**

Family Law: Dissolution of Marriage,
Spousal and Child Support Bankruptcy
Immigration Law: Family sponsored petition

2501Cherry Ave , Ste.245 , Signal Hill , CA 90755
Office: (562) 997- 8500 . Direct : (562) 453 - 5898




# ឃុន ហេង

ឃុន ហេង គឺជាផ្សារខ្មែរដ៏ធំមួយតាមដងផ្លូវ
អាណាហែម មានលក់ទំនិញគ្រប់មុខ

☞ សាច់ បន្លែ ផ្លែឈើស្រស់ៗ
☞ អាហារស្ងួត និងម្ហូបកំប៉ុងមកពីអាស៊ី
☞ និងមានលក់ម្ហូបឆ្អិនស្រាប់ៗផងដែរ
☞ ហើយនឹងមានលក់បាច់ផ្កាសំរាប់ពិធីបុណ្យនានា ។

ទោះនៅទីណា
សូមកុំភ្លេចផ្សារ ឃុន ហេង

915 E. Anaheim Street
Long Beach, CA 90813









សូមស្វាគមន៍...

បំណងល្អពី CATHAY PACIFIC

Cathay Pacific
ជានិច្ចកាលតែងតែនាំមកនូវ
ភាពងាយស្រួល និងទំនើប...!



LEAP Live Back Seat - features Office Chair technology to Provide active postural support.



Fixed seat back design-creates a fixed living space that no longer interrupts the space behind when a passenger reclines



9" Personal TV featuring "Audio Video On Demand"




Literture pocket relocated below the seat cushion to creat more room .

ក្រុមហ៊ុន CATHAY PACIFIC AIRWAYS បានផ្តើមការហោះហើរ បំរើអតិថិជន ចាប់ពីខែ ធ្នូ ឆ្នាំ២០០៧ នេះទៅហើយ នូវប្រភេទយន្តហោះ BOEING ថ្មីដ៏ធំបំផុត ដែលរចនាតុបតែងឡើងយ៉ាងល្អប្រណិតក្នុងបច្ចេកទេសខ្ពស់ និងជាសុខភាពល្អ កៅអីធំទូលាយ ងាយស្រួលអង្គុយ និងចេញចូល ទូរទស្សន៍ផ្ទាល់ខ្លួន មានទំហំធំរហូតដល់៩អ៊ីង សំរាប់ថ្នាក់ជិះផ្នែក ECONOMY ។ ក្រុមហ៊ុន CATHAY PACIFIC ហោះហើរ៣ជើងក្នុងមួយថ្ងៃ ពី LOS ANGELES ទៅ HONG KONG ។ ពី HONG KONG ទៅ PHNOM PENH រៀងរាល់ថ្ងៃ (រយៈពេលហោះហើរតែ ២:៣០ នាទី តែប៉ុណ្ណោះ) ។ ប្រព័ន្ធផ្សព្វផ្សាយព័ត៌មានលើយន្តហោះមានជាភាសាខ្មែរផងដែរ ។

PHNOM PENH express

# PHNOM PENH EXPRESS

## ក្រុមហ៊ុនទទួលផ្ញើរប្រាក់ និងលក់សំបុត្រយន្តហោះ

Mon-Sat 9am-6pm
Sunday: 10am-5pm



ទទួលផ្ញើរប្រាក់ទៅកាន់ប្រទេសកម្ពុជា - វៀតណាម, មានលក់សំបុត្រយន្តហោះគ្រប់ក្រុមហ៊ុន, ទៅគ្រប់ប្រទេស, លក់កាតទូរស័ព្ទគ្រប់ម៉ាក និងទទួលបង់វិក័យប័ត្រនានា ។ បំរើអតិថិជន៧ថ្ងៃក្នុងមួយសប្តាហ៍ ។

2140E. Anaheim St., Long Beach CA 90804 . Tel : (562) 434-3322, (562) 434-3760




# ផ្ញើប្រាក់ទៅកាន់ខេត្តណាមួយនៅកម្ពុជា តាមរយៈ Western Union

## ជាមួយថ្លៃ* សេវាកម្មផ្ញើប្រាក់ទាប $11.99 ដុល្លារ

សម្រាប់ការផ្ញើប្រាក់ទៅកាន់ខេត្តក្រុង** ដែលបានជ្រើសរើសក្នុងចំនួនតិចជាង 500 ដុល្លារ

## ជាទូទៅប្រាក់អាចទទួលបានតែប៉ុន្មាននាទី*** ប៉ុណ្ណោះ

- ✓ ថ្លៃ*សេវាកម្មផ្ញើប្រាក់មិនមានការប្រែប្រួលទៅតាមទីកន្លែងរបស់ភ្នាក់ងារទទួលប្រាក់ឡើយ
- ✓ មានភ្នាក់ងារផ្ទេរប្រាក់ជាង 100 កន្លែងនៅ 24 ខេត្តក្រុងទូទាំងប្រទេសកម្ពុជា
- ✓ មិនចាំបាច់មានគណនីនៅធនាគារទាំងអ្នកផ្ញើ និងអ្នកទទួល
- ✓ មិនមានការគិតថ្លៃសេវាកម្មផ្ទេរប្រាក់ពីអ្នកទទួលឡើយ

**WESTERN UNION**®

សេវាកម្មផ្ទេរប្រាក់ទូទាំងពិភពលោក រហ័សទាន់ចិត្ត និងគួរឲ្យទុកចិត្ត

**សូមទាក់ទងទូរស័ព្ទ**
**1-800-325-6000**

**ភ្នាក់ងារផ្ទេរប្រាក់នៅកម្ពុជាដែលទទួលបានការអនុញ្ញាតពី Western Union:**







| | | | | |
|---|---|---|---|---|
| **NHA THUOC THIEN NHIEN**<br>1299 E. ANAHEIM ST<br>LONG BEACH, CA 90813<br>TEL: 562-218-2328 | **MONEY MART #0772**<br>1001 E. PACIFIC COAST HWY<br>LONG BEACH, CA 90806<br>TEL: 562-599-0991 | **MONEY MART #0767**<br>2375 LONG BEACH BLVD<br>LONG BEACH, CA 90806<br>TEL: 562-427-0253 | **CONTINENTAL CURRENCY #704**<br>3106 SAN GABRIEL BLVD<br>ROSEMEAD, CA 91770<br>TEL: 626-280-0380 | **TOPANGA CHECK CASHING**<br>7239 TOPANGA CANYON BLVD<br>CANOGA PARK, CA 91303<br>TEL: 818-594-0057 |
| **CONTINENTAL CURRENCY #408**<br>1301 LONG BEACH BLVD<br>LONG BEACH, CA 90813<br>TEL: 562-599-1550 | **ANTOJITOS LATINOS LIQUOR**<br>25381 ALICIA PKWY STE N<br>LAGUNA HILLS, CA 92653<br>TEL: 949-215-9708 | **NADERS MARKET**<br>25227 REDLANDS BLVD # I<br>LOMA LINDA, CA 92354<br>TEL: 909-796-1660 | **CONTINENTAL CURRENCY #413**<br>237 LONG BEACH BLVD<br>LONG BEACH, CA 90802<br>TEL: 562-432-5883 | **SIAM MARKET**<br>2505 E. ANAHEIM ST<br>LONG BEACH, CA 90802<br>TEL: 562-607-8970 |

*សម្រាប់ការផ្ទេរប្រាក់ដុល្លារអាមេរិចប៉ុណ្ណោះ។

**ថ្លៃសេវាកម្មផ្ញើប្រាក់នេះមានសុពលភាពចាប់ពីថ្ងៃទី 22 ខែ តុលា ឆ្នាំ 2007 នេះនៅតាមបណ្តាភ្នាក់ងារនានាដែលបានចូលរួមក្នុងកម្មវិធីរបស់ខ្លួននៅតំបន់ប្រជុំជន Los Angeles និង Philadelphia ។ Western Union សូមរក្សាសិទ្ធិក្នុងការកែប្រែដោយមិនចាំបាច់ជូនដំណឹងជាមុន។ ថ្លៃសេវាកម្មផ្ញើប្រាក់អាចត្រូវបានគិតច្រើនជាងនេះសម្រាប់ការផ្ញើប្រាក់តាមរយៈទូរស័ព្ទ និង តាមរយៈគេហទំព័រ www.westernunion.com ។

***រយៈពេលនៃការទទួលប្រាក់អាស្រ័យទៅលើកត្តាមួយចំនួននៃសេវាកម្មរួមទាំងម៉ោងធ្វើការ និងទីតាំងរបស់ទីភ្នាក់ងារផ្ទេរប្រាក់ព្រមទាំងភាពខុសគ្នារវាងម៉ោងនៅក្នុងតំបន់នីមួយៗផងដែរ។ ពិនិត្យមើលកត្តាកំណត់ និងល័ក្ខខ័ណ្ឌនានានៅក្នុងបែបបទ "ផ្ញើប្រាក់"។

©2007 Western Union Holdings, Inc. All Rights Reserved.

**C&B CROISSANTS**
WHOLESALE ONLY



# ហាងខ្មែរផលិតនំ ក្រួសង់

ORDER BY PHONE:
(562) 495-5713
(800) 974-3888
Cell: (562) 607-3258
Fax: (562) 495-7544

-ធានាគុណភាពទុកបាន ៣០ ថ្ងៃ
-ដឹកជញ្ជូនដោយមិនគិតថ្លៃ ពីថ្ងៃ ច័ន្ទ-សុក្រ
-ហាងយើងខ្ញុំមានលក់ដុំតែប៉ុណ្ណោះ
-អ្នកទិញត្រូវឱ្យដឹងមុន ១ថ្ងៃ



FREE DELIVERY
We guarantee our products up to 30 days. Order must be made 1 day in advance.
WHOLE SALE ONLY

| Item | Net Wt Each | Packaging | Price/Package |
|---|---|---|---|
| Butter Croissant | 4.50 oz | 50 | $18.00 |
| Triangle Croissant | 5.00 oz | 50 | $18.00 |
| Square Croissant | 5.00 oz | 50 | $18.00 |
| Cream Cheese Croissant | 6.00 oz | 50 | $23.00 |
| Blueberry Cream Cheese Croissant | 6.oo oz | 50 | $23.00 |
| Strawberry Cream Cheese Croissant | 6.00 oz | 50 | $23.00 |
| Raisin Cinnamon Croissant | 6.00 oz | 50 | $23.00 |
| Raisin Custard Croissant | 6.00 oz | 50 | $23.00 |
| Apple Croissant | 6.00 oz | 50 | $23.00 |
| Chocolate Croissant | 6.00 oz | 50 | $23.00 |
| Chocotate Cream Cheese Croissant | 6.00 oz | 50 | $23.00 |
| Pineapple Cream Cheese Croissant | 6.00 oz | 50 | $23.00 |

1339 W. Gaylord Street• Long Beach, CA 90813



# ASIAN PACIFIC INTL TRAVEL

## ក្រុមហ៊ុនលក់សំបុត្រយន្តហោះ និងផ្ញើប្រាក់

មានលក់សំបុត្រគ្រប់ក្រុមហ៊ុនទៅកម្ពុជាដូចជា៖

-Eva Airways
-China Airlines
-Singapore Airlines
-Thai Airways
-Malaysia Airlines
-Cathay Pacific
-Korea Airlines
-Asiana Airlines

* មានលក់សំបុត្រទៅប្រទេសផ្សេងៗទៀត ដូចជា: អឺរ៉ុប
* មានលក់សំបុត្រក្នុងប្រទេស USA
* មានលក់សំបុត្រយន្តហោះពីភ្នំពេញមក USA

កន្លែងនាងខ្ញុំមានប្រថាប់ត្រា
Notary Public Phone Card
Buy 4 get 1 free

$ 869 Eva Tax included

ផ្ញើប្រាក់ទៅស្រុកខ្មែរធានាថោកជាងក្រុមហ៊ុននានា

➲ ផ្ញើ $100 យកកម្រៃ $4 ➲ ផ្ញើ $1.000 ឬ 10.000
យកឈ្នួលចុះថ្លៃច្រើនថែមទៀត !
➲ ផ្ញើទៅស្រុកខ្មែរលឿនរហ័សទាន់ចិត្ត
ប្រគល់ប្រាក់ដល់ដៃភ្លាមៗជាមួយ
បង្កាន់ដៃទទួលប្រាក់ជូនផងដែរ ។



Léssé passe
៣ថ្ងៃយកដោយ
មិនបាច់ផ្ញើ
Re entry , Permit
និងធ្វើលិខិតឆ្លងដែនខ្មែរ

ចុះថ្លៃពិសេសទៅស្រុកខ្មែរ សំបុត្រត្រឡប់
ទិញឡើងបានឆាប់បំផុត

ទទួលរៀបចំធ្វើ

Reentry , Permit , Urgent ,
ធានាប្តីប្រពន្ធ,គូដណ្តឹង,ក្រុមគ្រួសារ
សូមលោកអ្នកអញ្ជើញមកដោយមេត្រី

Prepaid - Phone Cards
Toll Free 1-800- 359 -6698

**CAL -STATE**
**Realty & Leading**

Real Estate *Home Loans
*Residential * Commercial
You will get the best deal
Magaret (LiLy) Chung
Realtor
Sell your home at 3,5%
Buy your home at 1 % Rebate

ធ្វើការដោយស្មោះត្រង់និងយកចិត្តទុកដាក់ជានិច្ច



1065 E. Anaheim Street.
Long Beach CA 90813
Tel: (562) 599 - 5464
Fax : (562) 599-5604
Tony's Cell : (562) 537-3546
LiLy's Cell : (562) 682-6588

4510 E. Pacific Coast Hwy,.
Ste.540 Long Beach, CA 90804
Tel: (562) 599-5464
Cell: (562) 682-6588
Fax: (562) 599-5604
Email : margaretchung@charter.net



WINSTAR CAPITAL

A Residential Mortgage Lending
License: # 01834778

100% CONFORMING
SISA AVAILABLE

## WANTED: LOAN OFFICER AND Sr. LOAN OFFICER!!!

**We're looking for:**

- Motivated and career minded individual to join our sales team
- Seasoned Loan Officers and Senior Loan Officers
- Opportunity to build your team and manage your own branch
- We provide leads and referrals
- Generous commission splits
- We provide friendly, supportive & beautiful working environment
- Khmer speaking preferred

**For confidential interview, please call Dan at:**
**(714) 594 - 5131**

## REAL ESTATE AGENTS & BROKERS COOPS

- Have an LO assigned to your office
- Coops Marketing plan
- Programs to boost your New Year 2008
- 100% Conforming Full Doc
- Jumbo Loan
- Hard Money

**For more info, contact our sales team:**
**(714) 594 – 5135**

17150 Newhope Street, Suite 503, Fountain Valley, CA 92708

# Quality
## Assured Collision Center

"We do what's right to ensure your vehicle gets back to pre - accident condition"

1427 long beach , Blvd , Suite B
Long Beach , California , 90813
T : 562 599 0766 , F : 562 599 6504
QACollison@yahoo.com



" Mission Statement "

To Provide the highest quality of workmanship in reasonable time , while building a lifetime relationship with our customers

ធ្វើតួ និង បាញ់ថ្នាំឡាន
ជាមួយជាងចំណានៗ មានបទពិសោធន៍ខ្ពស់
ធ្វើឱ្យលោកអ្នកមិនខកបំណងឡើយ !










" Services Offered "

- Fast repairs with State-of-the-art equipment .
- Lifetime warranty on body and paint .
- Free estimates .
- Shuttle service .
- Free loaner vehicles , up 7 days .
- Free towing with vehicle repairs .
- I-CAR Free certified technicians .
- costomer Friendly staff .
- Waiting room with wireless internet .
- Computerized framer measurement , print put .
- Expert color mach .
- Auto mechanic on staff .
- 25 working boys .
- 65,000 square feet facility .
- We work with all insurance companies .

STATE -OF-THE-ART Equipment

- 2 chief EZ line 3 post frame machine .
- Garmat downdraft beated spray booth .
- PPG paint mixing room .
- Robinair air condition system reclaim ,evacuate and recharge equipment .
- CCC pathways estimating software .



# KING KONG

STUDIO & DIGITAL LAB

Photography

"Capturing Moments..."

1617 E. Anaheim St. | Long Beach, CA 90813 | Tel.: (562) 591-2296

Hours: Monday - Sunday (9:30am - 6:00 pm)

**Passport+Immigration Photos - *in 5 min.***

*Wedding*

*Glamour*

*Family*

*Restoration*

www.kksphotostudio.com



- ទទួលផ្ញើរលិខិតឯកសារតាម E-mail
- មានធ្វើ Flyer , Name Card,Notary Public

# Income Tax Service!!

Jocelyn C. Thav, C.P.A.

## Certified Public Accountant




- ElectronicFiling for both Federal &State!
- Refunds for ALL 50 states!
- Convenience of Direct Deposit!
- Drop-off Service Available!
- Walk-in or appointments!

Competitive pricing starting at $75.00 per return!!!!!

1617 E. Anaheim St. Long Beach xsteet-Walnut |Tel.: (562) 591-2296

មានថតរូបសំរាប់ធ្វើលិខិតឆ្លងដែន ,និដ្ឋាការ និងកិច្ចការអន្តោប្រវេសន៍

# M.L.K MARKET





- ហាងខ្មែរលក់ទំនិញមានសំលៀកបំពាក់ជាឯកសណ្ឋានសិស្ស (Uniform), រឿងកុនថៃ, ចិន, កូរ៉េ ផ្នែកមនោសញ្ចេតនា បាញ់ប្រហារ កាប់ចាក់ និងក្បាច់គុណបុរាណ កំពុងចេញលក់ថ្មីៗមានបកប្រែជាភាសាខ្មែរ ។
- ហាងខ្មែរ M.L.K ក៏មានកន្លែងលក់ទឹកផងដែរ ។
- ហាងយើងខ្ញុំក៏មានលក់ដូរនូវសំលៀកបំពាក់ជាច្រើនផ្នែកទៀត ទាំងសំភារៈផ្ទះបាយ, សំភារៈដំណេក, សំភារៈបន្ទប់ទឹក និងឧបភោគគ្រឿងទេស, ភេសជ្ជៈជាដើម ។

ទទួលយក Card EBT










មានលក់ Phone Card
















សូមអញ្ជើញជាមួយហាងថ្មីយើងខ្ញុំដោយរីករាយ

ហាងយើងខ្ញុំមានលក់កុនថៃពីក្រុមហ៊ុនមយូរា

1821 M.L.K.JR Ave, Long Beach, CA 90806

Tel: (562) 591-4295

# ប្រាសាទព្រះវិហារនឹងក្លាយជាសម្បត្តិបេតិកភណ្ឌពិភពលោក

**ដោយ : គីម សារឿន**

ប្រាសាទព្រះវិហារដែលជាសម្បត្តិមរតកវប្បធម៌ដ៏មានតម្លៃរបស់ជាតិសាសន៍ខ្មែរ ធ្លាប់មានរឿងក្តីក្តាំងជាមួយថៃ ហើយត្រូវបានតុលាការអន្តរជាតិទីក្រុងឡាអេកាត់ក្តីឱ្យខ្មែរឈ្នះ កាលពីថ្ងៃទី១៥ ខែ មិថុនា ឆ្នាំ១៩៦២ ម្លេះ ។ រហូតមកដល់ពេលនេះភាគីថៃនៅតែធ្វើការទាមទារចេញសេចក្តីថ្លែងការណ៍ពីប្រាសាទព្រះវិហារទៀត ។ ទោះជាយ៉ាងនេះក្តី អង្គការយូណេស្កូនឹងដាក់ប្រាសាទនេះជាសម្បត្តិបេតិកភណ្ឌពិភពលោកនៅអំឡុងខែកុម្ភៈ ឆ្នាំ២០០៨ នេះ ។

ប្រាសាទដ៏ចំណាស់នេះ ស្ថិតនៅស្រុក ជាំក្សាន្ត ខេត្ត ព្រះវិហារ លើកំពូលភ្នំដងរែក ជាប់ព្រំដែនកម្ពុជា-ថៃ ដែលសាងក្នុងរជ្ជកាលស្តេច ៤ អង្គ គឺ ព្រះបាទយសោវរ្ម័នទី១ គ.ស ៨៨៩-៩១០) ព្រះបាទសូរ្យវរ្ម័នទី១ (គ.ស១០០២-១០៥០) ព្រះបាទជ័យវរ្ម័នទី៦ (គ.ស ១០៨០-១១០៩ ) និងព្រះបាទសូរ្យវរ្ម័នទី២ (គ.ស ១១១៣-១១៥០) នៅសម័យមហានគរដ៏រុងរឿង ។

ប្រាសាទព្រះវិហារត្រូវបានអង្គការយូណេស្កូរៀបចំចុះក្នុងបញ្ជីសម្បត្តិបេតិកភណ្ឌពិភពលោកពាល់ព្រំដែនជាមួយប្រទេសជិតខាងនោះទេ ។

តាមសំណុំរឿងប្រាសាទព្រះវិហារ សាលក្រមថ្ងៃទី១៥ ខែមិថុនា ឆ្នាំ១៩៦២ រវាងកម្ពុជា-ថៃ ត្រូវបានលើកឡើងដោយរដ្ឋាភិបាលកម្ពុជា ។ ក្នុងការសំរេចរបស់តុលាការក្រុងឡាអេ ប្រទេសហុល្លង់ ដោយមានសំលេង ៩ ទល់នឹង ៣ ហើយ តុលាការអន្តរជាតិបានសំរេចថា ប្រាសាទព្រះវិហារស្ថិតនៅក្រោមអធិបតេយ្យភាពរបស់កម្ពុជា ។ នៅពេលនេះ តុលាការបានបញ្ជាឱ្យថៃដកកំលាំងប្រដាប់អាវុធ ប៉ូលិស ទាហាន ឬឆ្មាំប្រទេសថៃចេញពីតំបន់នេះ ។

ក្នុងពេលជាមួយគ្នានេះ ដោយសំលេង ៧ ទល់នឹង ៥ តុលាការបានសំរេចចិត្តឱ្យប្រទេសថៃប្រគល់រូបចម្លាក់សិលាចារិក បំណែកបូជនីយដ្ឋាន ឧបករណ៍ជីដុតឱ្យកម្ពុជាទាំងអស់ ។


សំណង់ប្រាសាទព្រះវិហារបែកបាក់នៅលើជួរភ្នំដងរែក



ព្រោះវាមានតម្លៃមហាសាល និងទាក់ទាញឱ្យភ្ញៀវទៅទស្សនា ព្រមទាំងមានក្បាច់ចម្លាក់ល្អប្រណិតទៀតផង ។

លោកឧបនាយករដ្ឋមន្ត្រី សុខ អាន បានថ្លែងក្នុងកិច្ចការពារ និងលើកតម្កើងរមណីយដ្ឋានសក្ការៈព្រះវិហារថា នេះជាតម្លៃមនុស្សជាតិទាំងមូល តាមរយៈការចុះបញ្ជីជាសម្បត្តិបេតិកភណ្ឌពិភពលោកនៃប្រាសាទព្រះវិហារ ។ ប៉ុន្តែ ទោះបីជាមានការទទួលស្គាល់យ៉ាងណាក្តី ក៏តាមរយៈសេចក្តីថ្លែងការណ៍របស់លោក Vasu Poshyanadana កាលពីថ្ងៃទី១១-១៣ មករា ឆ្នាំ ២០០៨ នៅខេត្តសៀមរាប នៅតែទទួលយកបញ្ហាព្រំដែនមកដាក់ក្នុងវេទិកាវប្បធម៌ពិភពលោកដដែល ។

បញ្ហាព្រំដែននេះ ត្រូវបានលោក ឡុង វិសាលោ រដ្ឋលេខាធិការក្រសួងការបរទេស និងសហប្រតិបត្តិការអន្តរជាតិ ក៏ធ្លាប់បានកោះប្រជុំអង្គទូតនៃសមាជិកអង្គការយូណេស្កូហើយដែរ ។ លោកបានធ្វើការអះអាងប្រាសាទព្រះវិហារមិនមានការប៉ះ

កាលពីថ្ងៃទី២៤ មករា ឆ្នាំ ២០០៨ ភាគីថៃបានធ្វើការប្រឆាំងជំទាស់នឹងការដាក់ប្រាសាទព្រះវិហារជាសម្បត្តិបេតិកភណ្ឌពិភពលោក ដោយលើកហេតុផលថា ថៃអាចបាត់បង់ទឹកដី និងសម្បត្តិមរតកវប្បធម៌របស់ខ្លួន ។ ដោយខ្លាចបាត់បង់ប្រាសាទព្រះវិហារភាគីក្រសួងការពារជាតិថៃបានកំណត់ឥរិយាបថ ៣ ប្រការ ដូចខាងក្រោម :

១-ឱ្យមានការប្រឆាំងជំទាស់កម្ពុជាជាផ្លូវការ តាមផ្លូវទូត និងការក្រសួងការបរទេស ។ ត្រូវទំនាក់ទំនងឱ្យបរទេសយល់ពីការចូលរួមសហការពីភាគីថៃក្នុងរឿងនេះ ។

( តនៅទំព័រទី២៩ )

# ប្រាសាទបាយ័នជាសំណង់ស្ថាបត្យកម្មល្អឯក និងបង្កប់ទៅដោយអាថ៌កំបាំង

**ដោយ : គីម សារឿន**

ក្នុងរជ្ជកាលព្រះបាទជ័យវរ្ម័នទី៧ នៅសម័យមហានគរដ៏រុងរឿងព្រះអង្គបានកសាងសមិទ្ធផលជាច្រើន ដូចជា ប្រាង្គប្រាសាទ ស្ពាន ផ្លូវថ្នល់


ប្រាសាទបាយ័ន ដែលមានក្បាច់ចម្លាក់ល្អប្រណិត

មន្ទីរពេទ្យ ស្រះទឹក សាលាដំណាក់ និងរាជធានី ដើម្បីជាប្រយោជន៍សាសនា មនុស្សធម៌ សង្គមកិច្ច វប្បធម៌ សេដ្ឋកិច្ច និងនយោបាយ ។ ចំណែកឯប្រាសាទបាយ័ន ដែលកសាងដោយព្រះបាទជ័យវរ្ម័នទី៧ មានរូបលោកកេស្វរៈញញឹមប្រិមប្រិយនៅតាមប្រាង្គប្រាសាទនីមួយៗមានក្បាច់ចម្លាក់រស់រវើកល្អឆើតឆាយប្រៀបដូចជាសំណង់ក្នុងរឿងព្រេងនិទាន ។ ចម្លាក់ដ៏ល្អឯកនេះ ត្រូវបានអ្នកសិក្សាស្រាវជ្រាវជាតិ និងអន្តរជាតិជាច្រើនធ្វើការសន្និដ្ឋានប្លែកៗគ្នាអ្នក ខ្លះថា ប្រាសាទនេះតំណាងឱ្យព្រះបាទជ័យវរ្ម័នទី៧ ដែលគោរពសាសនាមហាយាន ។ ខ្លះទៀតថា ជាវាំងរបស់ព្រះឥន្ទ្រ ព្រោះវាល្អរកអ្វីប្រៀបផ្ទឹមពុំស្មើឡើយ ។ ចំណែកអ្នកខ្លះទៀតថា ជាវិមានដ៏អស្ចារ្យមួយដែលបង្កប់ដោយអាថិកំបាំង ហើយជាពិសេសមានចម្លាក់រឿងរ៉ាវផ្សេងៗនៅសម័យបុរាណថែមទៀត ។

ប្រាសាទបាយ័នស្ថិតនៅចំចំណុចកណ្តាលនៃខេត្តសៀមរាបជាមជ្ឈមណ្ឌលវប្បធម៌ ដែលកសាងឡើងក្នុងរជ្ជកាលព្រះបាទជ័យវរ្ម័នទី៧ នាចុងសតវត្សទី១២ និងដើមសតវត្សទី១៣ ដើម្បីឧទ្ទិសថ្វាយចំពោះព្រះសាសនាមហាយានជានិមិត្តរូបនៃព្រះពោធិសត្វលោកកេស្វរៈ និងតំណាងឱ្យទិសធំៗទាំងបួន ។ នៅផ្នែកកំពូលមានរូបព្រះព្រហ្មបែរមុខទៅគ្រប់ទិសបញ្ចេញនូវស្នាមញញឹមបង្កប់ដោយអាថិកំបាំង ដែលមានកំពូល៤៩ និងក្លោងទ្វារចូលចំនួន៥ ។

កំពូលទាំងនេះខ្លះថា តំណាងឱ្យខេត្ត-ក្រុងនៅសម័យនោះ ហើយសំណង់ប្រាសាទបាយ័នមានប្លង់៣ជាន់ ។ ដោយនៅជាន់ទី១ និង ទី២មានកំពូល២៩ នៅតាមថែវនីមួយៗមានចម្លាក់ល្អគួរឱ្យគយគន់ និងជាន់ទី៣ ប្រាង្គកណ្តាល ១៧ រាងជា

( តនៅទំព័រទី៣០ )

GOLDEN MOON
97¢ up + UNIFORMS + CLOTHINGS + TOYS
Ken's Wireless
CELL PHONES, ACCESSORIES, REPAIRS & RING TONES
97¢+ KEN លក់ទូរស័ព្ទដៃ
1617 E. ANAHEIM ST.
LONG BEACH, CA 90813 TEL: (562) 591-9209
cingular raising the bar
NEXTEL
Sprint
O2 Wireless
verizon wireless
T-Mobile
PAGE PLUS Cellular
PLATINUMTEL
boost mobile
SIDEKICK III
"Where you At?"
Pacific Coast Hwy.
Long Beach Blvd.
Alamitos Ave.
Walnut Ave.
Cherry Ave.
Anaheim St.
HERE!
North

# ទំព័រហ្វីឡាដែលហ្វីយ៉ា




## ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**តពីលេខមុន**

●**ឆ្នាំ ១៩៤៩** - នៅឆ្នាំនេះ ចលនាខ្មែរឥស្សរៈ ទ្រង់ទ្រាយចលនាប៉ុនប៉ង់រំដោះកម្ពុជាដដែល បើទោះជាបារាំងបានប្តូរចលនាសម្ព័ន្ធគ្រប់គ្រងរដ្ឋសម័យឱ្យនឹងបានប្រគល់ឯករាជ្យមួយភាគធំមកឱ្យខ្មែរវិញ ហើយក៏ដោយ ។

នាខែកុម្ភៈ ចលនាឥស្សរៈបានប្តូរឈ្មោះពី "គណកម្មការរំដោះពលរដ្ឋខ្មែរ " មកជា " គណៈកម្មការខ្មែរ ដើម្បីរំដោះជាតិ " ។ ការប្តូរឈ្មោះនេះ ជាសញ្ញានៃការបែកគ្នាផ្ទៃក្នុង គឺក្រុមខាងយួនវៀតមិញបានឃ្លាតឆ្ងាយ ហើយប្រធានគណៈកម្មការថ្មីនេះ ឈ្មោះ ប៉ុក ឃុន ។

ថ្ងៃ ១២ ខែ កុម្ភៈ រដ្ឋាភិបាលចាស់ដឹកនាំដោយលោក ប៉ែន នុត បានត្រូវប្តូរជំនួសដោយលោក យ៉ែម សំបូរ ទៅវិញ ។

**៤-រដ្ឋាភិបាល ប៉ែន នុត (១៥.៨.១៩៤៩. ១១.២.១៩៤៩ )**

- នាយករដ្ឋមន្ត្រី . រដ្ឋមន្ត្រីមហាផ្ទៃ . រដ្ឋមន្ត្រីព័ត៌មាន : ប៉ែន នុត
- ឧបនាយករដ្ឋមន្ត្រី . រដ្ឋមន្ត្រីសេដ្ឋកិច្ច : សឺម សាន
- រដ្ឋមន្ត្រីការពារជាតិ : ឈាន វ៉ម
- រដ្ឋមន្ត្រីហិរញ្ញវត្ថុ : ម៉ៀច គុន
- រដ្ឋមន្ត្រីសេដ្ឋកិច្ច និងសាធារណការ : សុន វ៉ិនសៃ
- រដ្ឋមន្ត្រីអប់រំជាតិ . កីឡា និងយុវជន : ហ៊ុយ គន្ធុល
- រដ្ឋមន្ត្រីសុខាភិបាល និងសង្គមកិច្ច : ម៉ម សុន
- រដ្ឋមន្ត្រីធម្មការ និងវិចិត្រសិល្បៈ : យិត ស្រុន
- រដ្ឋលេខាធិការមហាផ្ទៃ : ទេព ផន
- រដ្ឋលេខាធិការព័ត៌មាន : ថុង អ៊ុក
- រដ្ឋលេខាធិការសាធារណការ : ង៉ិន ការ៉េត

ស្ថានភាពនៃការគ្រប់គ្រងរបស់បារាំង នាឆ្នាំ ១៩៤៩ នោះ គឺរដ្ឋបាលខ្មែរ មានឯករាជ្យគ្រប់គ្រាន់ តែបារាំងនៅរក្សាទីប្រឹក្សាខ្លួនទៅតាមគណរដ្ឋមន្ត្រី និងអភិបាលខេត្ត តែបារាំងនៅកាន់កាប់កងទ័ព នឹងកិច្ចការបរទេសនៅឡើយ -កម្ពុជាមានស្ថាប័នជា "សហព័ន្ធបារាំង" -អ្នកគ្រប់គ្រងខាងបារាំងមានឈ្មោះថា អគ្គស្នងការសាធារណរដ្ឋបារាំង" ។

ចាប់ពីខែ មិនា ដល់ ខែ មិថុនា ភាពតានតឹងខាងចលនារំដោះបានកើនឡើងដល់មានការបាញ់គ្នាទៀតផង គឺវាំងឥស្សរៈដែលធ្លាប់ជាសម្ព័ន្ធភាពពីមុន ។ នាចន្លោះពេលដដែលនោះ មានការត្រៀមបង្កើត "គណបក្សប្រជាធិបតេយ្យប្រជាជនខ្មែរ " ដែលជាបក្សក្នុងមួយទិស ។

ថ្ងៃ ១៨ ខែ កញ្ញា សម្តេច សីហនុ រំលាយសភាជាតិ ហើយផ្អាកការបោះឆ្នោតសភាជាតិដែលគ្រោងធ្វើខែ វិច្ឆិកា ដោយគ្មានកំណត់ ។

ថ្ងៃ ២០ កញ្ញា រដ្ឋាភិបាលថ្មី ដឹកនាំដោយលោក អៀវ កើស ដែលទទួលខុសត្រូវតែចំពោះមុខព្រះមហាក្សត្រតែមួយអង្គឯងគត់ ។

**៦-រដ្ឋាភិបាល អៀវ កើស (២០.៩.១៩៤៩. ២៨.៩.១៩៤៩ )**

- នាយករដ្ឋមន្ត្រី. រដ្ឋមន្ត្រីមហាផ្ទៃ : អៀវ កើស
- ឧបនាយករដ្ឋមន្ត្រី. រដ្ឋមន្ត្រីកិច្ចការសេដ្ឋកិច្ច និង ផែនការ : ស៊ឹម ហេង
- រដ្ឋមន្ត្រីព័ត៌មាន : យ៉ែម សំបូរ
- រដ្ឋមន្ត្រីការពារជាតិ : ហ៊ុយ ម៉ោង
- រដ្ឋមន្ត្រីហិរញ្ញវត្ថុ : ស្វាយ សូ
- រដ្ឋមន្ត្រីយុត្តិធម៌ : កុសល
- រដ្ឋមន្ត្រីកសិកម្ម . សាធារណការ . និង គមនាគមន៍ : ផ្លែក ភីន
- រដ្ឋមន្ត្រីអប់រំជាតិ : មាស សាអែម
- រដ្ឋមន្ត្រីឧស្សាហកម្ម . ពាណិជ្ជកម្ម និង ផ្គត់ផ្គង់ : វ៉ាយ លុត
- រដ្ឋមន្ត្រីធម្មការ : យុត ឃឿន
- រដ្ឋមន្ត្រីសុខាភិបាល និងសង្គមកិច្ច : នាល ផ្លែង

៥ថ្ងៃក្រោយមក លោក យ៉ែម សំបូរ បានត្រូវតែងតាំងជាប្រមុខរដ្ឋាភិបាលថ្មីជំនួសលោក អៀវ កើស គឺថ្ងៃទី ២៩ កញ្ញា

**៥-រដ្ឋាភិបាល យ៉ែម សំបូរ (១២.២.១៩៤៩. ១៩.៩.១៩៤៩ )**

- នាយករដ្ឋមន្ត្រី. រដ្ឋមន្ត្រីមហាផ្ទៃ និង ព័ត៌មាន : យ៉ែម សំបូរ
- ឧបនាយករដ្ឋមន្ត្រី. រដ្ឋមន្ត្រីកិច្ចការសេដ្ឋកិច្ច និង ផែនការ : ស៊ឹម ហេង
- រដ្ឋមន្ត្រីការពារជាតិ : ហ៊ុយ ម៉ោង.
- រដ្ឋមន្ត្រីហិរញ្ញវត្ថុ : ស្វាយ សូ
- រដ្ឋមន្ត្រីយុត្តិធម៌ : កុសល
- រដ្ឋមន្ត្រីកសិកម្មសាធារណការ និង គមនាគមន៍ : ផ្លែក ភីន
- រដ្ឋមន្ត្រីអប់រំជាតិ : មាស សាអែម
- រដ្ឋមន្ត្រីឧស្សាហកម្ម.ពាណិជ្ជកម្ម និង ផ្គត់ផ្គង់ : វ៉ាយ លុត
- រដ្ឋមន្ត្រីធម្មការ : យុត ឃឿន
- រដ្ឋមន្ត្រីសុខាភិបាល និងសង្គមកិច្ច : នាល ផ្លែន

ថ្ងៃទី ០១ តុលា កម្លាំង ឥស្សរៈ ដាប ឈួន បាន សុំចុះចូល តែនៅមានចរិកដូចស្តេចក្រាញ់នៅភាគខាងជើងកម្ពុជា ។

ខ្មែរ.បារាំង ចុះហត្ថលេខាលើសន្ធិសញ្ញាផ្តល់ឯករាជ្យភាពកម្ពុជានៅក្នុងរង្វង់សហភាពបារាំង . នៅក្នុងសន្ធិសញ្ញានោះ មានកំណត់ថា "កម្ពុជាមិនបោះបង់សិទ្ធិខ្លួន នៅលើដែនដីកូសាំងស៊ីនទេ " ឆ្នាំ ១៩៥០ ។

**នៅមានត**




## អត្ថបទស្តីអំពីខន្ធ៥ និងសមាធិវិប្បស្សនា

**ដោយ : ម៉ៅ ច័ន្ទសំណុំ**

**តពីលេខមុន**

**ទី១ :** សាមីខ្លួនត្រូវទទួលស្គាល់ថា ជាប់ជុំងក្នុងរឿងណាមួយ ឬគំនិតណាមួយ ។ **ទី២ :** ប្រើសតិមើលសភាពជាប់ផុងនេះ មួយសន្ទុះមកក្នុងខួរក្បាលមនុស្សយើងឃើញហាក់ដូចជាគេសំអាត ហើយគំនិតថ្មីៗផ្សេងៗ គំនិតផ្តួចផ្តើមថ្មីៗលេចចេញមកគួរឱ្យអស្ចារ្យណាស់ ។

●ជាធម្មជាតិ ខន្ធសញ្ញានេះ ផ្តល់ព័ត៌មានដល់មនុស្សយើង ពុំចេះចប់ ពុំចេះអស់ ហូរដូចទឹកចេញពីក្បាលម៉ាស៊ីនគ្មានកុងតាក់បិទបើកដូច្នោះ ឯងហូរចេញមកហួសអំពីតម្រូវការ ។ អ្នកប្រាជ្ញវិទ្យាសាស្ត្ររកឃើញថា ក្នុងមួយថ្ងៃៗមានព័ត៌មាន ឬគំនិត ឬរឿងរ៉ាវផ្សេងៗចំនួន៦០,០០០ ឆ្លងកាត់ខួរក្បាលមនុស្សក្នុងនោះមានតែ ៥% ទេ ដែលមនុស្សត្រូវការសំរាប់ប្រើប្រាស់ក្នុងជីវិតជាក់ស្តែង ចំណែកឯ ៩៥% ទៀត សុទ្ធតែជារឿងឥតបានការ ។ បាតុភាពនេះ យើងអាចសំគាល់ឃើញយើងម្នាក់ៗនិយាយម្នាក់ឯងក្នុងក្បាលនិយាយខ្លួនឯង (Selt Talk) ពីរឿងមួយទៅរឿងមួយនិយាយដដែលៗ ពុំចេះឈប់ប្រតិកម្មនៅក្នុងខ្លួនមានជាបន្តម្ចាស់ខ្លួនពុំដឹងខ្លួនឡើយ ព្រោះនេះជាទំលាប់រហូតមក ។

សមាធិកជួយឱ្យមនុស្សសំរាកអំពីចរន្ត (ខន្ធ-សញ្ញា) នេះ ។ បើលោកអ្នកគិតច្រើន បញ្ឈប់វាមិនបានសមាធិជាវិធីអស្ចារ្យណាស់ ។ បើធ្វើដូចម្តេច ប្រើសតិពិនិត្យមើលរាល់ចលនារបស់ខន្ធសញ្ញានេះ ។ ឬក៏ពិនិត្យការគិតរបស់យើងផ្ទាល់ ឬក៏សួរខ្លួនឯងថា អញគិតអំពីអ្វី ? សំនួរនេះ គឺគ្រាន់តែនាំឱ្យយើងឱ្យបង្វែរអារម្មណ៍ទៅក្នុងខ្លួនប៉ុណ្ណោះ ប៉ុន្តែហាមមិនឱ្យសួររកហេតុផល ឬចំលើយណាមួយទេ ។ ធ្វើដូច្នេះច្រើនទៅ អស់លោកនឹងពិនិត្យឃើញថា ខួរក្បាលសំរាក ។ បើអស់លោកអង្គុយសមាធិម្តងៗ ហើយងើបពីអង្គុយភ្លាមហាក់មានអារម្មណ៍ថា មានកម្លាំងជាងមុន តើហេតុអ្វី ? ពីព្រោះចរន្តព័ត៌មានដ៏លើសលប់នេះ ប្រើប្រាស់ថាមពលខ្លួនប្រាណយើងខ្ជះខ្ជាយបំផុត ការអង្គុយសមាធិ ឬប្រតិបត្តិតាមរបៀបខាងលើ (ពិនិត្យមើលចរន្តសញ្ញាខន្ធ) មានន័យថា យើងបញ្ឈប់ចរន្តដ៏ឥតប្រយោជន៍នេះ ពេលនេះ យើងបានផ្តល់ឱកាសឱ្យខ្លួនយើងឱ្យប្រព័ន្ធខ្លួនប្រាណយើង ឱ្យប្រព័ន្ធប្រតិកម្ម (សង្ខារខន្ធ) ផ្អាក ឬបញ្ឈប់មួយគ្រាៗ ។ ដូច្នេះ ថាមពលក្នុងខ្លួន បានសន្សំសំចៃ ។ បើប្រតិបត្តិយូរទៅសុខភាពក៏បានរីកលំអរជាលំដាប់ ។

ជនជាតិអឺរ៉ុបជាច្រើនបានយកវិធីសមាធិកនេះទៅប្រើប្រាស់ក្នុងមន្ទីរពេទ្យ ឬមជ្ឈមណ្ឌលសំរាកកាយចិត្តសំរួលរំងាប់ស្ត្រេះជាដើម ។ ជម្ងឺមួយចំនួនអាចទៅជាស្រាកស្រាន្ត ឬជាទាំងស្រុងព្រោះសមាធិបានបង្កលក្ខណៈឱ្យប្រព័ន្ធធម្មជាតិខ្លួនប្រាណមនុស្សមានចលនាធម្មតាឡើងវិញ ។

**VI. ខន្ធទី៤ :** សង្ខារខន្ធ Sankhara, Mental, Formation

សង្ខារខន្ធ ជាកន្លែងផ្ទុកនូវឆន្ទៈ (Volition) ។ ឆន្ទៈបូកនឹងចរន្តព័ត៌មានពីសញ្ញាខន្ធ ក៏ពូតផ្តុំឡើង ជាជំពូកចិត្តផ្សេងៗ ដូចជា ភាពរីករាយ កំហឹង ការព្រួយបារម្ភ ស្ត្រេះ រំជើបរំជួល ។ល។ លោក អ្នកប្រាជ្ញព្រះពុទ្ធសាសនាបានឱ្យដឹងថា ក្នុងខ្លួន មនុស្សមានរហូតដល់៥០ជំពូកចិត្ត ។ ក្នុងសៀវភៅ ព្រះពុទ្ធសាសនាខ្លះ គេបានឱ្យន័យទៅលើសង្ខារ ខន្ធថា ជាកន្លែងប្រតិកម្មទៅរកអ្វីៗដែលកើត មានជុំវិញខ្លួន ឬដែលនៅក្នុងខ្លួន ។

**ឧទាហរណ៍ទី១ :** មនុស្សម្នាក់ឃើញទារក មួយអង្គុយម្នាក់ឯងជិតផ្លាំងអ៊ុត (១) ភ្នែកនាំរូប ទារកទៅនៅក្នុងប្រព័ន្ធខួរក្បាល (២) សញ្ញាខន្ធ ចាប់ធ្វើការផ្តល់ព័ត៌មានដូចជាថា : ទារកនេះ ជា កូនរបស់ខ្ញុំ - ទារកនេះនៅម្នាក់ឯង - វ៉ានៅជិត ឆ្នាំអ៊ុត - អាចមានគ្រោះថ្នាក់ - ធ្លាប់ឃើញរឿង កុនអំពីស្ថានភាពអាក្រក់នៃទារក... ។ (៣) សង្ខារខន្ធប្រតិកម្មជាការភ័យព្រួយបារម្ភ ។

**ឧទាហរណ៍ទី២ :** ក្រោយពីកូនស្រីខ្ញុំស្លាប់បាន ៥ខែ ថ្ងៃមួយខ្ញុំអង្គុយក្រោមដើមឈើម្នាក់ឯង គាប់ជួនពេលនោះមានក្មេងស្រីម្នាក់សស្លៀងដើ ឆ្លងកាត់តាមទីនោះ ។ (១) ភ្នែកនាំរូបចូលទៅ ក្នុងប្រព័ន្ធខួរក្បាល (២) សញ្ញាខន្ធចាប់ផ្តើម បញ្ជូនព័ត៌មានដូចជាថា នាងនេះដូចកូនអញ - ចាប់នឹកឃើញរឿងរ៉ាវអំពីកូនខ្ញុំ ។ អនុស្សាវរីយ ជាច្រើន ហូរចូលគគុកដូចទឹកបាក់ទំនុកមកក្នុង អារម្មណ៍ខ្ញុំ (៣) សង្ខារខន្ធ ក៏ប្រតិកម្មទៅរ អនុស្សាវរីយ៍ប្រតិកម្មជាភាពក្រៀមក្រំជាកា ស្តាយស្រណោះជាការខកចិត្តជាកំហឹងខ្លួនឯង... ខ្លួនខ្ញុំក្តៅគគុកក្មេងពីរបីនាក់រត់មកលេងជិត ក៏ពុំឃើញ ព្រោះខ្ញុំស្លុងទៅក្នុងរឿងកូនខ្ញុំហើយ

**ឧទាហរណ៍ទី៣ :** មនុស្សម្នាក់សម្លាប់មនុស្ស ម្នាក់ទៀត (១)រូបភាពសម្លេងការប៉ះពាល់ឈា ក្លិន បានហូរចូលតាមអាយតនៈទាំង៥ (២) ខន្ធ សញ្ញាបានស្តុកព័ត៌មាននោះ ទុកយ៉ាងច្រើនលើស លប់ពីរបីថ្ងៃក្រោយមកខន្ធសញ្ញាបានប្រាប់ពីក្នុ មកថា ឯងជាមនុស្សមានទោស បើចាប់បានអា ជាប់គុក ឬត្រូវប្រហារជីវិតបង់សំលេងពីក្នុ មកដដែលៗ (៣)បុរសនេះ ប្រតិកម្ម (ខន្ធសង្ខារ ជាការភ័យស្លោស្លន់គ្រប់ម៉ោងគ្រប់នាទីគ្រប់វិនា គ្រប់ទីកន្លែង ដេកមិនលក់ ហូបមិនបានពូនមុ គ្រប់ពេល... នេះហើយដែលគេហៅថា ឈា ស្រែកស្បែកហៅ ឬគេថា កម្មតាមជាន់ក ។ មនុស នេះរែកពុននូវកម្មអាក្រក់នេះអស់មួយជីវិត ។

ចំណុចនេះហើយដែលភាសាសាសនា គេ កម្មជននេះមានកម្មក្រាស់ជននេះមានសំណាងញៀ ស្រា ញៀនស្រី ញៀនល្បែង ។

**តទៅលេខក្រោយ**

# ក្រុមហ៊ុនសិលាដាម៉ិចជំរុញឱ្យអ្នកស្រុករតនមណ្ឌលដាំដំណាំកប្បាស

**ដោយ : គឹម សារឿន**

កប្បាស គឺជាដំណាំឧស្សាហកម្មមួយប្រភេទដ៏សំខាន់ ក្នុងការផ្តល់នូវវត្ថុធាតុដើមដល់រោងចក្រតម្បាញ សម្រាប់កែច្នៃឱ្យទៅជាក្រណាត់គ្រប់ប្រភេទ ។ កប្បាសត្រូវបានប្រជាពលរដ្ឋខ្មែរ ធ្វើការដាំដុះ តាំងពីដើមរហូតមកដល់ទសវត្សរ៍៧០ តែការដាំដំណាំកប្បាសមានការអាក់ខានទៅវិញរាប់សិបឆ្នាំ ដោយសារតែសង្គ្រាមបានអូសបន្លាយអស់ពេលដ៏យូរ ។ ប៉ុន្តែ សព្វថ្ងៃដំណាំនេះ ត្រូវក្រុមហ៊ុនសិលាដាម៉ិចជំរុញឱ្យកសិករដាំដុះយ៉ាងផុលផុស និងជួយរកទីផ្សារឱ្យទៀតផង ។



គួបផ្សំជាមួយនឹងដំណាក់កាលនោះ ទីផ្សារនៃផលិតផលកប្បាសក្នុងប្រទេសពុំទាន់មានការនាំចេញទៅក្រៅប្រទេស និងផ្សារនៅក្នុងប្រទេសផង នោះបានធ្វើឱ្យការដាំដំណាំកប្បាសស្ទើរតែបាត់បង់ ហើយប្រជាពលរដ្ឋយើងមួយចំនួនបានបំភ្លេចចោលអស់ ។ ប៉ុន្តែ នៅឆ្នាំ២០០៧ ខណៈពេលដែលប្រទេសកម្ពុជាកំពុងធ្វើការអភិវឌ្ឍន៍វិស័យកសិកម្មឱ្យមានដំណើរការឈានទៅមុខយ៉ាងឆាប់រហ័ស និងការធ្វើវិនិយោគទុនរបស់ក្រុមហ៊ុនផងនោះ ។ ក្រុមហ៊ុនសិលាដាម៉ិច ចូលខ្លួនមកប្រឡូកក្នុងវិស័យកសិឧស្សាហកម្មដំណាំកប្បាស និងដំណើរការមួយយ៉ាងពិតប្រាដកនាពេលអនាគតដ៏ខ្លី នៅលើទឹកដីស្រុករតនៈមណ្ឌល ខេត្តបាត់ដំបង ។

កាលពីទសវត្សរ៍ឆ្នាំ៦០ ដំណាំកប្បាសត្រូវបានប្រជាពលរដ្ឋយើងធ្វើការដាំដុះ នៅលើទឹកដីស្រុករតនៈមណ្ឌលដែរ តែក្រោយមកដោយសារតំបន់នេះ ទទួលរងនូវសង្គ្រាមអូសបន្លាយអស់ពេលដ៏យូរ ធ្វើឱ្យប្រជាពលរដ្ឋបោះបង់ដំណាំកប្បាសនេះចោលស្ទើរតែទាំងស្រុងរួមផ្សំជាមួយនឹងនៅក្នុងប្រទេសពុំមានរោងចក្រធ្វើការកែច្នៃផងនោះ ប្រជាពលរដ្ឋធ្វើការដាំដំណាំផ្សេងៗក្រៅពីកប្បាសវិញ ។

ថ្មីៗនេះ ក្រុមហ៊ុនសិលាដាម៉ិច បានធ្វើការបោះវិនិយោគទុន ទៅលើដំណាំក្នុងស្រុករតនៈមណ្ឌល ដែលប្រភេទកសិឧស្សាហកម្មក្នុងគោលបំណងអភិវឌ្ឍន៍វិស័យឧស្សាហកម្មកែច្នៃផលកប្បាសសារជាថ្មីម្តងទៀត ។ ( តទៅទំព័រទី១៣ )

# ការតាំងរូបសំណាកព្រះបាទជ័យវរ្ម័នទី៧ ពុំត្រូវលក្ខណៈធ្វើឱ្យប៉ះពាល់ដល់អារម្មណ៍កូនខ្មែរ

**ដោយ : គឹម សារឿន**

អ្នកប្រាជ្ញជាតិ និងអន្តរជាតិបានបញ្ជាក់ថា ព្រះបាទជ័យវរ្ម័នទី៧ ជាមហាវីរក្សត្រដ៏ឆ្នើម




ដែលមានទេពកោសល្យក្នុងការដឹកនាំប្រទេសឱ្យមានការឯកភាពគ្នាជាធ្លុងមួយមានការរីកចម្រើនរុងរឿងដ៏កំពូល ។ ព្រះអង្គបានកសាងមន្ទីរពេទ្យ សាលាសំណាក់ ផ្លូវថ្នល់ ស្ពាន ជីកស្រះ ដើម្បីបម្រើវិស័យព្រះពុទ្ធសាសនា សេដ្ឋកិច្ច កសិកម្ម សុខាភិបាល និងសង្គមកិច្ច ។ ព្រះអង្គ គឺជាស្តេចដែលមានព្រះវិហារធម៌ចំពោះនាម៉ឺនសព្វមុខមន្ត្រី និងប្រជារាស្ត្រ ព្រមទាំងបានអនុវត្តនយោបាយពង្រីកទឹកដីដ៏ធំមហាសាល ធ្វើឱ្យប្រទេសជិតខាងសុំចុះចូលជាមិត្តនាំសួយសារអាករមកថ្វាយរៀងរាល់ឆ្នាំ ។

ព្រះបាទជ័យវរ្ម័នទី៧ ឈ្មោះដើមជ័យវិធ ជាបុត្រារបស់ព្រះបាទធរណីន្ទ្រវរ្ម័នទី២ និងព្រះនាងចូឌាមណី ហើយព្រះអង្គមានមហេសីពីរ គឺព្រះនាងជ័យរាជទេវី រៀបអភិសេកមុនឡើងសោយរាជ្យសម្បត្តិ ។ បន្ទាប់ពីព្រះនាងសោយទិវង្គត ព្រះអង្គបានរៀបអភិសេកជាមួយព្រះនាងឥន្ទទេវី ដែលជាព្រះរៀមមហេសីមុន គឺព្រះនាងជាសាកលវិទ្យាធិការ និងជាអ្នកនិពន្ធភាសាសំស្ក្រឹតថែមទៀត ។ នៅឆ្នាំ១១៧៧ ពេលចាមចូលមកគ្រួតត្រាប្រទេសកម្ពុជា ព្រះបាទជ័យវរ្ម័នទី៧ បានបង្រួបបង្រួមជាតិគ្រប់ទិសទីឱ្យក្រោកឡើងប្រឆាំងនឹងពួកចាម រហូតដល់ឆ្នាំ១១៨១ ទើបដណ្តើម ( តទៅទំព័រទី២៨ )

## ហាងមយូរាវីដេអូ (Mayura Video)

ក្រុមហ៊ុន មយូរា បានបើកហាងលក់រាយ និងជួលកុន មយូរា ជូនភ្ញៀវដោយខ្លួនឯងផ្ទាល់ចាប់តាំងពីថ្ងៃនេះតទៅហើយ នៅទីក្រុង Long Beach ក្នុងតម្លៃថោកសមរម្យ ។

1295 E. Anaheim Street. Long Beach, CA 90813
Tel: (562) 818-0863 • (562) 761-3515

( កាច់ជ្រុង Anaheim Street & Orange Avenue ជិតភោជនីយដ្ឋាន ROSEMANEE និងទល់មុខភោជនីយដ្ឋានឋានសួគ៌ថ្មី ) ។

ហាង MAYURA VIDEO មានលក់រាយ និងជួល DVD របស់ក្រុមហ៊ុនផ្សេងៗផងដែរ ។

**សូមអញ្ជើញដោយមេត្រីភាព ពីក្រុមហ៊ុនមយូរាយើងខ្ញុំ!**

## សមាគមអរិយធម៌ខ្មែរ

មានកិត្តិយសនឹងជូនដំណឹងដល់បងប្អូនខ្មែរយើងដែលមានភាពអត់ខាត់ ហើយមានកូនចៅកំពុងសិក្សារៀនសូត្រនៅតាមសាលានានា ចាប់តាំងពីថ្នាក់ទី១ ដល់ ថ្នាក់ទី១២ ថា សមាគមយើងមានបំណងនឹងចែកជូននូវ សម្ភារៈប្រើប្រាស់ជាច្រើនមុខ ដូចជា សម្ភារៈសិក្សា និង សម្ភារៈការិយាល័យ ជាដើម ជារៀងរាល់ខែ ដោយឥតគិតថ្លៃ ។

ដូច្នេះ ដើម្បីរក្សា ភាពទៀងទាត់ ភាពថ្លៃថ្នូរ និង ភាពងាយស្រួល សូមបងប្អូនជាមេគ្រួសារ មេត្តាអញ្ជើញមកចុះឈ្មោះចំនួនកូនចៅរបស់អស់លោកដែលត្រូវការចង់បាននូវសម្ភារៈដូចខាងលើនេះ ជាមុនសិន និង ឲ្យបានឆាប់ជាទីបំផុត ( អំណោយមានកំណត់ ) នៅទីស្នាក់ការសមាគមអរិយធម៌ខ្មែរ ដែលបើកទ្វាររៀងរាល់ថ្ងៃ លើកលែងតែថ្ងៃអាទិត្យ

CAMBODIAN CIVILIZATION ASSOCIATION
744 REDONDO AVE. , LONG BEACH , CA 90804
MONDAY.......SATURDAY ( 10:00 AM ...6:00 PM )

សមាគមអរិយធម៌ខ្មែរ សូមសម្តែងស្វាគមន៍ចំពោះបងប្អូនញាតិមិត្រខ្មែរយើងទាំងអស់ដែលមានភាពខ្សត់ខ្សោយខ្វះខាតក្នុងការជួយឧបត្ថមទំនុកបម្រុងកូនចៅឲ្យសិក្សារៀនសូត្រ ពីគ្រប់ទិសទី ។

ប្រធានសមាគម
បណ្ឌិត **ឈុន ខាំសេខ**



# ការថែទាំស្បែកពីទឹកផ្លែក្រូចឆ្មា

**ខាងក្រោមនេះ យើងសូមបង្ហាញមិត្តនារីទាំងឡាយនូវវិធីសាស្ត្រថែទាំស្បែកមួយចំនួន ដែលប្រើដោយផ្លែក្រូចឆ្មារនេះ ។**



**១_ល្បាយសំរាប់ថែទាំស្បែក**

យកផ្លែក្រូចឆ្មារ២ផ្លែលាងឱ្យស្អាតជូតឱ្យស្ងួតយកកាំបិតស្អាតចិតក្រូចឆ្មារជាចំណិតស្តើងៗប្រហែល១សង់ទីម៉ែត្រ ។ ដាក់ក្នុងកែវមាត់ធំ ចាក់ស្រា២០អង្សាសេចូលកែវកន្លះលីត្រគ្របឱ្យជិតរួចដាក់ចូលទូរទឹកកក ។ ទុករហូតដល់៣ខែក្រោយមកទើបយកចេញមកប្រើ ។ មុនពេលប្រើប្រាស់ត្រូវច្រោះទឹកក្រូចឆ្មារក្នុងកែវឱ្យស្អាត ។ ក្រោយងូតទឹក និងលាងមុខលាបល្បាយក្រូចឆ្មារនេះ ហើយឈ្លីច្របាច់ថ្នមៗឱ្យស្បែកឡើងក្រហមដើម្បីធ្វើឱ្យល្បាយជ្រាបចូលស្បែកបានល្អ ដើម្បីឱ្យមានប្រសិទ្ធិភាពល្អ ។ ការប្រើប្រាស់ទឹកផ្លែក្រូចឆ្មារនេះ មួយរយៈពេលយូរ វានឹងធ្វើឱ្យស្បែកភ្លឺរលោងម៉ដ្ឋខៃ ហើយមានក្លិនក្រអូបស្រាលស្រទន់អំពីក្រូចឆ្មារនេះ ។ សាកល្បងលាបល្បាយនេះលើខ្នងបាតដៃ ក្នុងរយៈពេលប៉ុន្មានថ្ងៃ បើសិនជាគ្មានប្រតិកម្មអ្វីទេនោះ នាងអាចយកទៅលាបមុខ និងទូទាំងខ្លួនប្រាណ ។ ចំពោះស្បែកស្ងួត នៅពេលលាបវានឹងមានអារម្មណ៍ថា ស្បែកឡើងតឹងបន្តិចអាចលាយបន្ថែមជាតិគ្លីសេរីនបន្តិច ។ ចូរអ្នកចាំទុកថា មិនត្រូវប្រើប្រាស់ល្បាយនេះរួមជាមួយនឹងប្រភេទក្រែមថែរក្សាស្បែកផ្សេងទៀតឡើយ ។

**២_បិទរបាំងមុខ**

ក្រូចឆ្មារស្រស់ច្របាច់យកទឹកលាយជាមួយចំណុះទឹកប្រហាក់ប្រហែលគ្នានឹងទឹកក្រូចឆ្មារ ។ រួចហើយលាយជាមួយម្សៅមី ៣ ស្លាបព្រាបាយ ។ បន្ទាប់មកអ្នកយកវត្ថុនេះ ទៅបិទលើផ្ទៃមុខ ដែលបានលាងស្អាត រួចហើយទុករយៈពេល ៣០នាទី ។ គេក៏អាចបិទបណ្តាចំណិតក្រូចឆ្មារផ្ទាល់មកលើផ្ទៃមុខ ក៏បានដែរ ប៉ុន្តែប្រសិទ្ធិភាពរបស់វានៅអន់ជាងការបិទរបាំងមុខ ។

**៣_ងូតទឹក**

ចិតក្រូចជាចំណិត ឬសំបកក្រូចឆ្មារស្រស់ដាក់ចូលក្នុងទឹក ហើយងូតទឹកដើម្បីជួយធ្វើឱ្យស្បែកម៉ដ្ឋរលោង និងមានក្លិនក្រអូបប្រហើរ ៕

# រូបមន្តធ្វើឱ្យសក់ស្អាត

**ដើម្បីដោះស្រាយបញ្ហាទាំងអស់នេះ អ្នកគួរតែសាកល្បងថែទាំសុខភាពរាងកាយត្រូវចេះយកចិត្តទុកដាក់ចំពោះ ចំណីអាហារដល់ស្បែកឱ្យបានល្អ និងគ្រប់គ្រាន់ ។ ទោះស្ថិតនៅក្នុងវ័យណាក៏គួរតែរក្សាវិធីថែរក្សាសុខភាពរាងកាយនេះ ឱ្យបានល្អផងដែរ ទាំងអស់ ។**



**❖រូបមន្ត ៖** ក្នុងការអនុវត្ត គឺយកចេកមកកិនឱ្យខ្ទេច លាយជាមួយទឹកឃ្មុំមួយស្លាបព្រាកាហ្វេមកបំពោកលើផ្ទៃមុខទុកចោលឱ្យបាន១៥នាទី ទើបលាងទឹកស្អាតចេញវិញ ។

**❖ទឹកឃ្មុំជួយបំប៉នស្បែក៖** ទឹកឃ្មុំមានគុណសម្បត្តិក្នុងការប្រឆាំងមេរោគជួយឱ្យស្បែកធូរស្រាល និងជាថ្នាំផ្សះស្បែក ។ សារជាតិអាហារដ៏សំខាន់មាននៅក្នុងទឹកឃ្មុំ គឺ ប្រូតេអ៊ីន វិតាមីន B1 B2 B5 និង B12, ធាតុ ដែក, ទង់ដែង, ម៉ាញ៉េស្យូម, សូដ្យូម, ប៉ូតាស្យូម, ហ្វូស្វ័រ, ស្ពាន់ធ័រ និង ក្លរ ។ ហេតុដូច្នេះរូបមន្តប្រើទឹកឃ្មុំមកជំនួយស្បែកមុខ និងបំពោកមុខមិនគួរមើលរំលងឡើយ ។

**❖រូបមន្ត ៖** យកទឹកឃ្មុំទៅកម្តៅបន្តិចបន្តួច ហើយបំពោកលើផ្ទៃមុខទុកចោលឱ្យបាន១៥នាទី រួចលាងសម្អាតចេញវិញ (តទៅទំព័រទី២៧)

ក្រុមហ៊ុនធានារ៉ាប់រង
TOP AUTO INSURANCE AGENCY
នាងខ្ញុំនិយាយភាសាខ្មែរ
AUTO -LIFE-HEALTH-HOME-COMMERCIAL
រថយន្ត_ជីវិត_សុខភាព_គេហដ្ឋាន_ពាណិជ្ជកម្ម
-Immediate Coverage FREE QUOTE Instant SR22
-Any car, any driver LOW RATES Why pay more
Tiffany Prak
Broker/Agent Lic.# 0E44334
(562) 230-5100
-Low Cost. Low Down
. Low Monthly Payment
Tickets, accident, DUI=No Problem
- Multiple Car discount
- Good driver discount
• ធានារ៉ាប់រងជូនភ្លាមៗដល់អ្នកបើកបរគ្រប់រូប និងយានយន្តគ្រប់ប្រភេទ
• ចុះថ្លៃជូនអ្នកបើកបរមានសុវត្ថិភាព និងចុះថ្លៃជូនចំពោះរថយន្តច្រើន
• បង់កាត់ខែតិច • ជំរាបតម្លៃជូនជាមុន
2760 E. Sprint St., Suite 140 • Long Beach, CA 90806
Tel: (562) 989-1800 Fax: (562) 989-1899

ហាងខ្មែរលក់គ្រឿងបន្លាស់រថយន្ត
Parts For Less
Auto Parts & Accessories
1050 E. Pacific Coast Hwy.
Long Beach, CA 90806
562-599-6364
មានលក់គ្រឿងបន្លាស់រថយន្តគ្រប់ប្រភេទសម្រាប់ក្រៅនិងក្នុងស្រុក ។ ទំនិញយើងខ្ញុំលក់តម្លៃសមរម្យ និងធានារកជូនលោកអ្នកនូវទំនិញដែលមិនមានក្នុងហាងយើងខ្ញុំ ។
Complete Foreign & Domestic Parts
សូមអញ្ជើញដោយមេត្រីភាព!




# អាហារសំរាប់ការពារ និងព្យាបាលជម្ងឺបេះដូង



**១-ការថែបំប៉នបេះដូង ឬការពារជម្ងឺបេះដូង**

**▭ផ្លែមៀន :** ថែបំប៉នបេះដូង ប៉ុន្តែហាមទទួលទានច្រើន ព្រោះវាមានរសជាតិផ្អែមខ្លាំងពេក ។

**▭ស្លឹកត្រចៀកក្រាញ់ :** ចាស់ៗបានប្រាប់ថា ជួយថែបំប៉នបេះដូង ព្រោះស្លឹកត្រចៀកក្រាញ់មានគុណប្រយោជន៍ជួយកាត់បន្ថយសម្ពាធឈាមខ្ពស់ និងថែមទាំងបំបាត់ភាពគ្រាំគ្រាក្នុងខ្លួន (ដោយគ្រាន់តែផឹកស្លឹកត្រចៀកក្រាញ់ប៉ុណ្ណោះ) តែមិនអាចកែរោគគ្រាំចិត្តបានទេ ។

**▭សណ្តែកបាយ និងស្ពៃក្តោប :** មានក្បួនតម្រាបានសរសេរថា អាចបង្ការជម្ងឺបេះដូងបាន ។

**▭កន្ទួតព្រៃ :** យកមកច្របាច់យកទឹកផឹកកាត់បន្ថយកូលេស្តេរ៉ូល និង គ្រីធីរលីន បាន ។

តាមតម្រាខ្លះបានសរសេរថា ស្រូវសាលី មានគុណប្រយោជន៍ជួយថែបំប៉នបេះដូង (ដោយមិនកិនរហូតសហួសហេតុពេក) ។ ត្រីសមុទ្រ ក៏ការពារជម្ងឺបេះដូងបានផងដែរ ព្រោះមានសារធាតុដែលគេហៅថា អូមេហ្គា-៣ ប៉ុន្តែបើយកទៅចៀននោះ អូ-មេហ្គា-៣នឹងត្រូវបំផ្លាញ ។ ដូច្នេះត្រូវចំអិនដោយវិធីផ្សេងៗក្រៅពីនេះ ។



**២-បន្លែ និងផ្លែឈើជួយកាត់បន្ថយកូលេស្តេរ៉ូល ឬខ្លាញ់ក្នុងឈាម**

កាត់បន្ថយដើមហេតុនៃជម្ងឺបេះដូងបានមួយប្រ-ភេទ គឺជម្ងឺបេះដូងគាំងដែលបណ្តាលមកពីសរសៃឈាមក្រហម បន្លែ ផ្លែ-ឈើ ដែលកាត់បន្ថយកូឡេស្តេរ៉ូលបាន :

**▭ខ្ទឹមស :** គួរទទួលទានខ្ទឹមសស្រស់យ៉ាងតិចណាស់ក្នុងមួយថ្ងៃពី ១០-១៥កំពីស បើបានខ្ទឹមរាងកំពិសថ្លោសបន្តិចក៏ កាន់តែល្អ ហើយកុំភ្លេចដុសធ្មេញផងណា នៅពេលដែលចូលប្រឡូកនៅក្នុងសង្គម ។

**▭ខ្ទឹមបារាំង :** អាចបរិភោគស្រស់ ដោយដាក់លាយជាមួយនឹងបន្លែសាលាដប្រភេទផ្សេង ឬចម្អិនក៏បាន ។ ខ្ទឹមបារាំងជួយកាត់បន្ថយកូលេ-ស្តេរ៉ូល អាក្រក់តែបន្ថែមកូលេស្តេរ៉ូល ។

**▭សៀងជប៉ុន:** សៀងជប៉ុនក៏កាត់បន្ថយកូលេស្តេរ៉ូល និងខ្លាញ់ក្នុងឈាមបានដូចគ្នាដែរ ដោយយកមកធ្វើស៊ុបសៀង ។

**▭ផ្លែឈើ :** ពពួកផ្លែប៉ោម និងស្ត្របឺរី ក៏ជួយកាត់បន្ថយកូលេស្តេរ៉ូលបានដែរ ៕

## រូបមន្តធ្វើឱ្យស្រស់...

វាអាចជួយបំបាត់ស្នាមជ្រីវជ្រួញបន្តិចបន្តួចលើស្បែកមុខអ្នកបាន ។ ក្រៅពីនេះទឹកឃ្មុំនៅជាឱសថយ៉ាងស័ក្តិសិទ្ធិជួយឱ្យរាងកាយអ្នករហ័សរហួនរឹងប៉ឹងបន្ថែមថាមពលបំបាត់ការធុញអាហារជំនួយបេះដូង ជំនួយសន្លាក់ និងជួយឱ្យដេកលក់ បានស្រួលផង ។

**▭ក្រូចឆ្មារផ្តល់នូវសំណើម :** អាស៊ីដ ផ្លែឈើពីក្រូចឆ្មារជួយធ្វើឱ្យស្បែកស្រស់ថ្លា ជួយរឹតបណ្តឹងឱ្យរន្ធរោមតូចចុះ ហើយវីតាមីន C ដែលមាននៅក្នុងក្រូចឆ្មារអាចជួយទប់ស្កាត់រ៉ាឌីកាល់សេរីជួយឱ្យស្បែករឹងមាំ និងធ្វើឱ្យស្បែកភ្លឺថ្លាបានមួយកម្រិត ។

**▭ធ្វើឲ្យគ្រាប់ភ្នែកភ្លឺថ្លា :** បើសិនភ្នែករបស់អ្នកហើម និងជាំខ្មៅ គួរប្រើរូបមន្តបុរាណ ហើយបានផលខ្ពស់ គឺអ្នកត្រូវយកតែខ្មៅមកត្រាំក្នុងទឹកក្តៅហើយទុកចោលឱ្យត្រជាក់ ហើយច្របាច់ទឹកចេញនាំយកដាក់លើត្របកភ្នែកដែលបិទជិតទុកចោល ១០នាទី ។ សារជាតិ "ថែនទីន" មាននៅក្នុង តែ អាចជួយឱ្យស្បែកធូរស្រាលជួយបង្កើនភាពរឹងមាំដល់ស្បែក និងជួយបន្ថយអាការហើមបានយ៉ាងល្អ អាចធ្វើឱ្យភ្នែករបស់អ្នកស្រស់ស្អាត និងភ្លឺថ្លា ៕


# MODERN FABRIC & SHOES

-ហាងយើងខ្ញុំមានលក់ ក្រណាត់ប៉ាក់ ស្បែកជើង សំលៀកបំពាក់
-ទទួលកាត់សំលៀកបំពាក់គ្រប់ម៉ូតសំរាប់បុរសនិងស្ត្រី
-សំអាងការតាមបែបបុរាណនិងសម័យថ្មីនិយម

សូមស្វាគមន៍ដោយក្តីរីករាយ!



1636 E. ANAHEIM STREET LONG BEACH, CA 90813
Tel: (562) 599-3333 • (562) 599-3237

SPECIAL
GRAND OPENING
Buy 1 Get 1 Free
K2J cafe
(562) 498-0383 www.k2jcafe.com
3753 E. Anaheim St., Long Beach, CA 90804

## ដំណឹងលក់ហាង

យើងខ្ញុំត្រូវការលក់ហាង Donut បើលោកអ្នកចង់ទិញហាងយើងខ្ញុំ សូមទាក់ទងមកលេខទូរស័ព្ទ

**(626) 318-7665**

ហាង Donut យើងខ្ញុំស្ថិតនៅទីប្រជុំជនតំបន់រស់នៅល្អធានាសន្តិសុខ

## ដំណឹងលក់ហាង

-ហាងខ្មែរ LIQUOR នៅរដ្ឋ TEXAS ត្រូវការលក់ ជាតំបន់មានសុវត្ថិភាព.អំណោយផលល្អសំរាប់ធ្វើជំនួញរបស់លោកអ្នកដោយមិនខុសបំណងឡើយ ។

-សូមកុំឱ្យឱកាសល្អកន្លងផុត .សូមទាក់ទងជាមួយខ្ញុំឈ្មោះ RICK នូវទូរស័ព្ទ :

**(៩៤០) ៧៨១-៥៥៦៣ ឬ (៩៤០) ៦៨៧-៥៥៨៨**

▶Excellent Location, Includes Land and a new automatic car wash
▶Corner lot, good visibility ▶Concrete /Asphalt Parking
▶Additional building can be Added
▶Check Cashing,Western Union, Lottery ▶Liquor store Gross = $ 650 k
▶Liquor store Gross = $ 650 k ▶Automatic car wash = $ 30 k
▶Check Cashing and Western Union = $ 30 k ▶Offered at $ 690,000 + Inventories

## ដំណឹងលក់ផ្ទះ TRIPLEX

-នៅតំបន់ក្រុងខ្មែរ ជិតមន្ទីរពេទ្យ. ឱសថស្ថានក្នុងអគារ U.C.C. កណ្តាលក្រុងខ្មែរ តាមផ្លូវ Anaheim Street ។
- ផ្ទះខាងមុខមានបន្ទប់គេងចំនួន ០២, បន្ទប់ទឹក ០១ និងបន្ទប់ទទួលភ្ញៀវផងដែរ ។
- ខាងក្រោយផ្ទះមានពីរ ដែលផ្ទះនិមួយៗមានបន្ទប់គេង ០១, បន្ទប់ទឹក ០១ និងបន្ទប់ទទួលភ្ញៀវ (Living Room) ។
- មានកន្លែងចតឡាន (Garage) ដាក់ឡានមួយម្នាក់ ។
- តំបន់មានសន្តិសុខ, សុវត្ថិភាពល្អ ។
▶តម្លៃ ៥៦០,០០០ដុល្លារ (អាចនិយាយតថ្លៃគ្នាបាន)
▶សូមមេត្តាទូរស័ព្ទមកកាន់លេខ : Call: (760) 522-8638 / (562) 338-3585

*សូមអរគុណ !*

## ដំណឹងលក់ហាង HAWAIIAN B.B.Q

- ហាងដែលព័ទ្ធជុំវិញទៅដោយតំបន់ដែលមានអំណោយផលល្អ ជិតសាលារៀន , មន្ទីរពេទ្យ, City Hall (សាលាក្រុង) ។
តម្លៃឈ្នួលអគារសមរម្យក្នុងមួយខែត្រឹមតែ ១,៥៦៣ដុល្លារ ។
បើកទ្វារ ៧ ថ្ងៃចាប់ពី ម៉ោង 11:00 AM - 9:00 PM .
▶តម្លៃ **$75,000** (ដោយអាចនិយាយតថ្លៃគ្នាបាន) ។
▶សូមទាក់ទងម្ចាស់ហាងលេខ : Call: **(714) 588-8513**

*សូមអរគុណ !*

## ការតាំងរូបសំណាក....

បានជ័យជំនះ ហើយបានឡើងគ្រងរាជ្យសម្បត្តិពីឆ្នាំ១១៨១ ដល់១២២០ ។ ពេលនោះព្រះអង្គធ្វើការរៀបចំកសាងរាជធានីកំពែងព័ទ្ធជុំវិញអង្គរធំ ដែលនៅគោបុរៈ និងប្រាង្គនីមួយៗមានរូបព្រហ្មមុខបួនតំណាងឱ្យព្រហ្មវិហារធម៌ទាំង៤ គឺមេត្តា ករុណា ឧបេក្ខា និងមុទិតា ដែលគោរពព្រះពុទ្ធសាសនាមហាយាន ។ តាមសិលាចារឹកប្រាសាទព្រះខ័ន ឆ្នាំ១១៩១ បញ្ជាក់ថា កាលនោះប្រទេសខ្មែរត្រូតត្រាដល់ជ្រោយ ម៉ាឡាយូ ហើយស្តេចផ្ជាយួន និងចាមចំណុះឱ្យស្តេចខ្មែរ គឺមានទឹកដីធំធេងណាស់ ។

ស្នាព្រះហស្តព្រះបាទជ័យវរ្ម័នទី៧ មានសេសសល់ទាំងក្នុង និងក្រៅប្រទេស តាំងពីសម័យបុរាណរហូតមកដល់សព្វថ្ងៃ ជាពិសេសក្រុងអង្គរទី៣ ដែលមានកំពែង និងគូទឹកព័ទ្ធជុំវិញ និងមានប្រាសាទបាយ័ននៅចំកណ្តាលដ៏ល្អ គ្មានគូប្រៀប បង្កប់នូវអត្ថន័យជ្រាលជ្រៅ ហើយមានប្រាង្គមុខបួនញញឹមគ្រប់ទិស គួរឱ្យកោតស្ញប់ស្ញែងណាស់ ។ នៅជុំវិញក្រុងអង្គរ មានប្រាសាទបន្ទាយក្តី តាព្រហ្ម ព្រះខ័ន នាគព័ន្ធ តាសោម ក្រោលគោ និងនៅតាមបណ្តាខេត្ត-ក្រុងទូទាំងប្រទេស ។

ក្រៅពីសំណង់ប្រាសាទ គេឃើញមានសាលាសំណាក់ចំនួន១២១ និងមន្ទីរពេទ្យចំនួន១០២ កន្លែងសម្រាប់បម្រើវិស័យសង្គមកិច្ចសុខាភិបាល ។ សិលាចារឹកព្រះខ័នបានបញ្ជាក់ថា ការកសាងសាលាសំណាក់ចម្ងាយ១៥គីឡូម៉ែត្រ មានមួយកន្លែង ហើយពីអង្គរទៅប្រទេសចាម មាន៥៧កន្លែង ពីអង្គរទៅភិម៉ៃ១៧កន្លែង និង ៤៤កន្លែងទៀត នៅតំបន់ផ្សេងៗ ។ ប្រាសាទបាយ័នដែលលម្អទៅដោយស្នាមញញឹមព្រហ្មមុខបួនទាំង ៥៤ ខ្លះជាតំណាងឱ្យខេត្ត-ក្រុងទូទាំងប្រទេសនាសម័យនោះ ហើយប្រាសាទនេះ ជាកន្លែងប្រារព្ធពិធីផ្សេងៗរបស់ព្រះរាជា ដើម្បីឧទ្ទិសដល់ព្រះរាជវង្សានុវង្សដែលសោយទីវង្គត ។

ការដែលព្រះអង្គសាងប្រាសាទមានព្រហ្មមុខបួនបែបនេះ គឺចង់បង្ហាញពីការស្រុះស្រួលគ្នាឡើងវិញ ដើម្បីកសាងជាតិមាតុភូមិ ដោយក្នុងប្រាសាទដែលធ្លាប់តែតម្កល់លិង្គ (ទេវរាជ) មកតម្កល់ពុទ្ធរាជព្រះលា គេស្វះជំនួសវិញ ។ គ្រប់សំណង់ស្ថាបត្យកម្មរបស់ព្រះអង្គសុទ្ធតែបានយកចិត្តទុកដាក់ទៅលើផ្នែក សុខាភិបាល សង្គមកិច្ច សាសនា ព្រោះព្រះអង្គយល់ឃើញថា ការឈឺចាប់របស់ប្រជារាស្ត្រ គឺជាការឈឺចាប់របស់ព្រះអង្គដែរ ។ ចំណែកនៅតាមមន្ទីរពេទ្យ មានគ្រូពេទ្យជំនាញប្រចាំការ ដើម្បីព្យាបាលជំងឺ និងចែកថ្នាំជូនដល់អ្នកជំងឺ ដែលមានសកម្មភាពរស់រវើក ។

នៅមជ្ឈមណ្ឌលវិទ្យាសាស្ត្រ និងវប្បធម៌រុស្ស៊ី កាលពីព្រឹកថ្ងៃទី៣០ ខែវិច្ឆិកាកន្លងមក មានរៀបចំធ្វើសិក្ខាសាលាស្តីពី "ព្រះបាទជ័យវរ្ម័នទី៧ ក្នុងប្រវត្តិសាស្ត្រខ្មែរ" ដែលមានវាគ្មិនល្បីៗជាច្រើនចូលរួមផងដែរ ។

( តទៅទំព័រទី៣២ )

## ជីវិត និងការតស៊ូ ...

និយាយប្រាប់ខ្មែរប៉ុស្តិ៍ ហ៊ាង លីណា បានថ្លែងថា សម្លេងពីធម្មជាតិរបស់នាងបានរុញច្រានជីវិតនាងឱ្យជោគជ័យក្នុងជីវភាពប្រចាំថ្ងៃ នៅលើទឹកដីទី២នៃសហរដ្ឋអាមេរិក បន្ទាប់ពីស្រុកកំណើតរបស់នាង ដែលត្រូវឃ្លាតឆ្ងាយតាំងពីរបបខ្មែរក្រហមកាន់កាប់មក ។

ហ៊ាង លីណា បានរៀបរាប់ពីជីវិតពីកុមារភាព នៅតាមជំរំជនភៀសខ្លួន គឺជំរុំខៅអ៊ីដាង នាងប្រាថ្នាចង់រៀនសូត្រឱ្យបានជ្រៅជ្រះ និងចង់ក្លាយជាអ្នកជំនួញនាថ្ងៃអនាគត ។

ប៉ុន្តែ ក្តីស្រមៃពីម្តេឆ្នាំមុន មិនខុសបំណងទាំងអស់ដូចដែលបានគិតទុកនោះទេ ។ ពោលគឺនាងបរាជ័យក្នុងការសិក្សាមិនបានខ្ពង់ខ្ពស់ក៏ពិតមែន ប៉ុន្តែនាងបានជោគជ័យក្នុងផលរបររកស៊ីជាជំនួញ ពោលគឺពីបាតដៃទទេ ដែលផ្តើមជីវិតចេញពីអ្នកបញ្ចូលសម្លេងឱ្យក្រុមហ៊ុនចិន ថៃ សេង តាំងពីឆ្នាំ ១៩៨៨ រហូតដល់ឆ្នាំ១៩៩០ ហ៊ាង លីណា បានចាប់ផ្តើមធ្វើក្រុមហ៊ុនបញ្ចូលសម្លេងកុនដោយខ្លួនឯង គឺក្រុមហ៊ុនសិលាផ្កាយព្រឹកតរហូតមកជាមួយនឹងសិល្បៈជាអ្នកចម្រៀងបន្ទាប់បន្សំទៀតនោះ ។

កាលជាកុមារី នៅក្នុងជំរុំ ហ៊ាង លីណា ចូលចិត្តផ្នែកសិល្បៈដោយត្រូវបានម្តាយបញ្ជូនឱ្យទៅរៀនរាំរបាំ និងបានចូលខ្លួនរហូតដល់ក្លាយជាតួស្រីល្ខោនបាសាក់ទៀតផង ។ មុនចាកចេញរបស់គ្រួសារនាងពីជំរុំខៅអ៊ីដាងមកកាន់សហរដ្ឋអាមេរិកអំឡុងឆ្នាំ១៩៨៧ ។

កាលពីសប្តាហ៍មុន ហ៊ាង លីណា បានបើកសម្ពោធហាងលក់វីដេអូ និងវត្ថុអនុស្សាវរីយ៍នៅតាមផ្លូវ PCH Highway នៃសហគមន៍ក្រុងខ្មែរ Long Beach ។

ដោយផលរបរថ្មីនេះ ហ៊ាង លីណា បានដាក់ការសង្ឃឹម និងអំពាវនាវដល់អតិថិជនជាភ្ញៀវជាមិត្តភក្តិ ពិតជាជួយគាំទ្រនូវមុខរបរបើកហាងថ្មីនេះផងដែរ ។

ទោះបីជានាងបានសំដែងនូវមោទនភាពពីដំណើរជោគជ័យនៃជីវិតក្នុងផលរបររកស៊ីក្រុមហ៊ុនបញ្ចូលកុន និងជាអ្នកចម្រៀងល្បីម្នាក់ក៏ដោយ ។ ក៏នាងនៅតែដាក់ការព្រួយបារម្ភពីការលួចចម្លងស្នាដៃកុនរបស់នាងពីពួកជនទុច្ចរិត ដែលធ្វើឱ្យយើងបាក់ទឹកចិត្តជាមួយការហត់នឿយនៃកម្លាំងកាយចិត្ត និងថវិកា ។ តែទោះបីជាយ៉ាងណាក៏នាងនៅតែខិតខំតស៊ូបន្តទៀត ទៅតាមការគាំទ្ររបស់ទស្សនិកជន ។

ទីផ្សារក្នុងសហគមន៍ខ្មែរ Long Beach មានទំហំតូចចង្អៀតស្របទៅនឹងសេដ្ឋកិច្ចអាមេរិក កំពុងធ្លាក់ចុះផងទៀត ការរកស៊ីត្រូវជួបការលំបាក ដែលអ្នកជំនួញខ្លះក៏បានបិទហាង និងទន្ទឹមនឹងនោះ ក៏មានអ្នកថ្មីចូលខ្លួនមករកស៊ីម្តងវិញ ដោយបើកហាងថ្មីនានា ។ ប៉ុន្តែជោគជ័យ ឬបរាជ័យ គឺវាអាស្រ័យលើយីអ៊ុន និងសំណាងរបស់មនុស្សគួបផ្សំជាមួយការបង្កើតនូវទំនាក់ទំនងសាធារណៈល្អក្នុងការទាក់ទាញម៉ូយនោះផងដែរ ៕




# IRON WORK CORP

## ក្រុមហ៊ុនធ្វើរបង និងទ្វារដែក

1433 Daisy Ave., Suite B
Long Beach, CA 90813

Bus : (562) 435-8753
Cell : (562) 595-3644





ក្រុមហ៊ុនយើងខ្ញុំមានទទួលធ្វើ :

- FOLDING GATES
- WINDOW GUARDS
- GATES
- RAILLINGS
- IRON SCREEN DOORS
- WELDING SERVICES
- FENCES
- DRIVEWAY GATES
- FIRE ESCAPES
- STAIRS





សូមអញ្ជើញទាក់ទងជាមួយខ្ញុំ
ដោយមេត្រីភាព !











## ប្រាសាទព្រះវិហារនឹងក្លាយជាសម្បត្តិ....

**២**-ថ្កោលទោសទង្វើកម្ពុជា ដែលឃើញតែផលប្រយោជន៍ផ្ទាល់ខ្លួន ក្នុងការចុះបញ្ជីបេតិកភណ្ឌពិភពលោកម្នាក់ឯង រួមទាំងកម្ពុជា ព្យាយាមបំភ័ន្តបង្កើតភស្តុតាងប្រវត្តិសាស្ត្រ និងទាក់ទាញឱ្យបរទេសជឿជាក់ជួយដល់ខ្លួន ។

**៣**-រដ្ឋាភិបាលថៃ ត្រូវគិតគូរពីបញ្ហានេះឱ្យបានល្អិតល្អន់... ។

ទោះបីជាយ៉ាងនេះក្តី អង្គការយូណេស្កូ របស់សហប្រជាជាតិ បានទទួលស្គាល់ជាគោលការណ៍ហើយថា ប្រាសាទព្រះវិហារត្រូវដាក់បញ្ចូលជាសម្បត្តិបេតិកភណ្ឌពិភពលោករួចទៅហើយ ។ ការរារាំងនេះ វាជាសញ្ញាមួយបញ្ជាក់ពីចេតនារបស់ថៃ ចំពោះកម្ពុជាក្នុងរឿងនេះខ្លាំងណាស់ ។

នៅថ្ងៃទី២៥ ខែមករា អ្នកនាំពាក្យក្រសួងការពារជាតិថៃ បានចេញសេចក្តីថ្លែងការណ៍ថា ជាការភ័ន្តច្រឡំនឹងកំហុសទិន្នន័យប៉ុណ្ណោះ ហើយបញ្ហាមួយដែលអាចនាំឱ្យប៉ះទង្គិចទំនាក់ទំនងល្អរវាងប្រទេសទាំងពីរថែមទៀត ។

នាយករដ្ឋមន្ត្រីថៃ លោក ស៊ូរ៉ាយុទ្ធ ជូឡាណុន បានថ្លែងថា បញ្ហាប្រាសាទព្រះវិហារមានតែជំរើសមួយគត់ គឺចរចាគ្នា ស្វែងយល់គ្នា ហើយបញ្ហានេះលោកធ្លាប់បានពិភាក្សាគ្នាជាមួយរាជរដ្ឋាភិបាលកម្ពុជាក្នុងនាមជាប្រទេសជិតខាងហើយដែរ ។

លោក ខៀវ កាញារីទ្ធ រដ្ឋមន្ត្រីក្រសួងព័ត៌មាន និងជាអ្នកនាំពាក្យរដ្ឋាភិបាលបានប្រាប់កាសែតក្នុងស្រុកថា "**ទី១** រដ្ឋមន្ត្រីក្រសួងការពារជាតិថៃ ត្រូវស្គាល់ពីតួនាទីរបស់អង្គការយូណេស្កូ ហើយអង្គការនេះ ពុំមានសិទ្ធិកំណត់ខ្សែបន្ទាត់ព្រំដែននោះទេ ។ ចំណែកឯព្រំដែនទុកឱ្យក្រសួងការបរទេសដោះស្រាយ ។ **ទី២:** យ៉ាងហោចណាស់ ក្រសួងការពារជាតិថៃ គួរតែមានអ្នកច្បាប់មួយរូបដែរ ឬបើមិនអ៊ីចឹងទេ គួរពិភាក្សាជាមួយក្រសួងការបរទេសមុននឹងចេញសេចក្តីប្រកាសណាមួយទាក់ទិននឹងប្រាសាទព្រះវិហារ ។ ទោះបីជាមានប្រតិកម្មឆ្លងឆ្លើយគ្នារវាងពាក្យសំដីយ៉ាងនេះក្តី ប៉ុន្តែ បានស្ងប់ស្ងាត់ទៅវិញហើយ ។

ការរៀបចំដាក់ប្រាសាទព្រះវិហារ ជាសម្បត្តិបេតិកភណ្ឌពិភពលោកលើកទី៣២ នៅប្រទេសកាណាដា មានការចូលរួមពីប្រទេសជាច្រើន ដូចជាអគ្គរាជទូត មន្ត្រីទូត អ្នកឯកទេស និងស្ថាប័នចំនួន១៦ទៀត គឺ កម្ពុជា, បែលហ្ស៊ិក, បារាំង, សហរដ្ឋ-អាមេរិក, ឥណ្ឌា, ចិន, ថៃ, NDP, Hello Trust, ICOMOS, UNESCO, អាជ្ញាធរកំចាត់មីន-កម្ពុជា, អាជ្ញាធរអប្សរា, គណៈកម្មការជាតិ UNESCO កម្ពុជា និងអាជ្ញាធរព្រះវិហារ ។

ការគាំទ្ររបស់បណ្តាប្រទេស និងស្ថាប័នទាំងអស់នេះ បញ្ជាក់ឱ្យឃើញថា ប្រាសាទព្រះវិហារជាកម្មសិទ្ធិរបស់កម្ពុជា តាំងពីសម័យបុរាណ និងជាសម្បត្តិដ៏មហាសាលរបស់ពិភពលោកទាំងមូល ។

បន្ទាប់ពីប្រាសាទព្រះវិហារ ត្រូវបានគេបញ្ចូនជាសម្បត្តិបេតិកភណ្ឌពិភពលោកនេះ គេសង្ឃឹមថា នឹងមានអ្នកទេសចរចំរុះជាតិសាសន៍មកកាន់តែច្រើនមកទស្សនាប្រទេសកម្ពុជា ។ ជាពិសេសជាតិសាសន៍នានាបានស្គាល់ពីវប្បធម៌ដ៏រុងរឿងរបស់កម្ពុជាតាំងពីសម័យបុរាណ នៅតំបន់អាស៊ីអាគ្នេយ៍ ៕




## ហាងខ្មែរជួសជុលរថយន្ត

បើចង់ឱ្យរថយន្តលោកអ្នកត់បានល្អ សូមអញ្ជើញ

# Rathe`s Auto Service

State and Emission
Inspection General
Repairs and Maintenance

MON-SAT, 8:30AM -5:30PM
SUN. EMERGENCY ONLY




-ជាងមានបទពិសោធន៍ជាយូរឆ្នាំ -ជួសជុលរថយន្តគ្រប់ប្រភេទ
-មានដូរប្រេង ដូរហ្វ្រាំង ដូរកង់ និងករណីជាច្រើនទៀត ។
-មានត្រួតពិនិត្យគ្រឿងម៉ាស៊ីន DIAGNOSTICS ដោយឥតគិតថ្លៃ -មានចុះថ្លៃពិសេស ចាប់ពីខែកុម្ភៈ ២០០៨ ទៅ : -ដូរប្រេងគិត ៥ ក្វាត $22. - INSPECTIONS រថយន្តឆ្នាំ 96 up $49.99+ កាត់ -មានជូនប័ណ្ណពិសេស សំរាប់ដូរប្រេង ចុះថ្លៃពាក់កណ្តាល នៅពេលយកមកជួសជុលអស់តម្លៃ $150.
-តម្លៃជួសជុលទូទៅ សមរម្យ ដោយទាបជាងហាងជួសជុលផ្សេងៗទៀត
- ប្តេជ្ញាចិត្តធ្វើជូនដោយហ្មត់ចត់ គុណភាពខ្ពស់ មិនឱ្យខុសបំណងលោកអ្នកឡើយ ។
ពិសេស ជួយយកទៅពិនិត្យដល់កន្លែងនូវរថយន្តណាដែលខូច STARTER ឬផុងអាគុយអស់ភ្លើងដោយឥតគិតថ្លៃ ។ *សូមអរគុណ !*

5105 N.2ND ST., PHILADELPHIA, PA 19120. TEL: (215) 329-2418
Fax: (215) 329-2419.Rath CELL: (215) 431-6376

# "ស៊ូព័រ ឈ្យូដេ" ពលរដ្ឋអាមេរិកាំង ប្តូរគំនិតនយោបាយ

**ដោយ : ពិន សំខុន**


លោក បារ៉ាក់ អូបាម៉ា


លោក ជន ម៉ាកេន


អ្នកស្រី ហ៊ីឡារី គ្លីនតុន

ក្នុងសប្តាហ៍កន្លងទៅនេះ សហរដ្ឋអាមេរិក បានផ្តោតអារម្មណ៍យ៉ាងខ្លាំង ទៅលើការបោះឆ្នោតជុំទី១ Primary សំរាប់ជ្រើសរើសប្រធានាធិបតីថ្មី ជាពិសេសនាថ្ងៃអង្គារទី៥ ខែកុម្ភៈ នេះ គេឱ្យឈ្មោះថា Super Tuesday ដែលនៅពេលនោះរដ្ឋចំនួន ២៩ នាំគ្នាបោះឆ្នោតចង្អុលថា បេក្ខជនណាមួយដែលនឹងតំណាងឱ្យគណបក្សរបស់ខ្លួន ដើម្បីប្រកួតនឹងគណបក្សផ្សេង ដណ្តើមអាសនៈជាប្រធានាធិបតីថ្មី រយៈពេលបួនឆ្នាំ ចាប់តាំងពីឆ្នាំ២០០៩ ទៅ ។

ស៊ូព័រ ឈ្យូសដេ Super Tuesday លើកនេះ មានលក្ខណៈចំឡែក ដែលការទស្សទាយរបស់អ្នកឯកទេសទាយស្ទើរខុសទាំងអស់ ដោយសារតែពលរដ្ឋអាមេរិកាំង កំពុងប្តូរទស្សនៈរបស់ខ្លួន អំពីការគ្រប់គ្រងប្រទេសនាពេលអនាគត ។

គណបក្សប្រជាធិបតេយ្យមានប្រៀបលើគណបក្សសាធារណៈរដ្ឋកំពុងកាន់អំណាច នាពេលនេះ ដោយសារសង្គ្រាមនៅអ៊ីរ៉ាក់ និងនៅអាហ្គានីស្ថាន ពុំបានរលត់ស្ងប់ស្ងាត់នៅឡើយ ហើយម្យ៉ាងទៀតសេដ្ឋកិច្ចសហរដ្ឋអាមេរិកកំពុងដុនដាប ។ គណបក្សនេះ បានយកជ័យជំនះលើគណបក្សសាធារណៈរដ្ឋ នៅក្នុងសភាអាមេរិកាំង កាលពីឆ្នាំមុនម្តងហើយ ឥឡូវសង្ឃឹមថា ស្ថានភាពមានប្រៀបនេះ និងនៅដដែល ។ បន្ថែមពីលើនេះ គណបក្សប្រជាធិបតេយ្យមានបេក្ខជនពីរនាក់ ដែលសំខាន់ហើយប្លែកពីធម្មតា គឺ ហ៊ីឡារី គ្លីងតុន ជាស្ត្រីភេទ សមាជិកសភារដ្ឋញូវយ៉ក និងបារ៉ាក់ អូបាម៉ា ព្រឹទ្ធសភារដ្ឋអ៊ីលីណយជាជនស្បែកខ្មៅ ដំបូងបង្អស់ ដែលមានប្រជាប្រិយភាពខ្លាំងក្លាណាស់ដែរ ។ ទាំងពីរនាក់នេះ បន្ទាប់ពីបោះឆ្នោតថ្ងៃ "Super Tuesday" រួចមក បានលទ្ធផលខ្ពស់បំផុត ស្មើរស្មើគ្នា ដែលការប្រកួតដណ្តើមយកឋានៈជាបេក្ខជនឈ្នះគេនោះ ប្រាកដជាខ្លាំងក្លាគួរឱ្យរំភើបជាពុំខាន ។

សហរដ្ឋអាមេរិក មិនដែលនឹកថា នឹងមានប្រធានាធិបតីស្ត្រីភេទ ឬស្បែកខ្មៅនៅពេលឆាប់ៗនេះទេ ក៏ប៉ុន្តែពេលនេះ លោកស្រីហ៊ីឡារី គ្លីងតុន និងលោក បារ៉ាក់ អូបាម៉ា ជាមនុស្សតែពីរនាក់គត់ ដែលពលរដ្ឋអាមេរិកាំងផ្អែកខាងគណបក្សប្រជាធិបតេយ្យចង្អុលថានឹងក្លាយជាបេក្ខជនប្រជាធិបតេយ្យ ។

លទ្ធផលចុងក្រោយឱ្យអ្នកស្រី គ្លីងតុន បានចំនួនប្រតិភូ ១០៤៥ នាក់ហើយ ។ លោកអូបាម៉ា បានប្រតិភូចំនួន១០១៩នាក់ អ្នកទី៣ គឺ ផនអេដវ៉ដ បានប្រកាសដកខ្លួនពីឆាកប្រកួតរួចហើយ ។

នៅខាងគណបក្សសាធារណៈរដ្ឋវិញ នៅក្នុងដំណើរមកដល់ពាក់កណ្តាលផ្លូវនៃការប្រកួតយកតំណែងជាបេក្ខជនប្រធានាធិបតីនៃគណបក្សសាធារណៈរដ្ឋ លោក ផន ម៉ាកេន ព្រឹទ្ធសមាជិកសភាអាមេរិកាំង បានទទួលលទ្ធផលលេខ១ ដាច់ឆ្ងាយពីអ្នកទី២ បានសម្លេងប្រតិភូចំនួន៧០៧នាក់ ។ អ្នកទី២ មិត-រ៉មនី បាន២៩៤នាក់ និងលោក ឡាកាបេយ៍ ជាអ្នកទី៣ បានសន្លឹកឆ្នោត១៩៤នាក់ ។

អ្នកវិភាគនយោបាយបានមើលឃើញខ្លះហើយថា និងមានលោក ជន ម៉ាកេន ប្រឈមមុខនឹង ហ៊ីឡារី ឬ អូបាម៉ា នៅក្នុងវគ្គទី២ នៃការបោះឆ្នោតប្រធានាធិបតីថ្មីជាមិនខាន ៕

# វត្តព្រះពុទ្ធរង្សីកំពុងសំដែង...

វត្តខ្មែរនៅសហរដ្ឋអាមេរិកនេះ បានទទួលបច្ច័យពីពលរដ្ឋជើងវត្តយ៉ាងក្រាស់ក្រែល ក៏ប៉ុន្តែពុំមានទទួលប្រាក់កម្មវិធី ដែលពលរដ្ឋត្រូវជួយនោះទេ ដោយសាររាស្ត្រជើងវត្តបានផ្តល់ភាពគ្រប់គ្រាន់ដល់វត្ត ។

សហគមន៍ខ្មែរនៅហ្វីឡាដែលហ្វីយ៉ា នៅមានជំនឿយ៉ាងកក់ក្តៅលើព្រះពុទ្ធ-សាសនា (ភាគច្រើន) ក៏ប៉ុន្តែវត្តអារាមខ្មែរគ្មានសេវាសង្គមណាមួយសំរាប់ជួយឧបត្ថម្ភដល់ពុទ្ធសាសនិកវិញទេ ហេតុនេះហើយបានជាវត្តមាននៃកម្មវិធីសិក្សា ឬកម្មវិធីសេវាសង្គមរបស់វត្តពុទ្ធរង្សីបានទទួលការអបអរសាទរយ៉ាងខ្លាំងពីពលរដ្ឋជាពុទ្ធសាសនិកនៅហ្វីឡាដែលហ្វីយ៉ានេះ ។ គ្រួសារខ្មែរភាគច្រើនរស់នៅក្រោមបន្ទាត់នៃភាពក្រីក្រអ្នកទាំងនោះត្រូវការជាទីបំផុតនូវការណែនាំ និងសេវាសង្គមសំរាប់ជីវិតរាល់ថ្ងៃ ៕

# ប្រាសាទបាយ័ន...

កាកបាទ ដែលសំណង់នេះ មានលក្ខណៈស្មុគស្មាញខ្លាំងណាស់ ។ ទៅតាមជញ្ជាំងប្រាសាទមានចម្លាក់ជាច្រើន ដែលនិយាយទាក់ទងទៅនឹងរឿងព្រេងនិទាន ជីវភាពរស់នៅការទេសាទ ទំនៀមទម្លាប់ប្រពៃណី ចម្បាំង សិល្បៈ និងកីឡា គំរូវីភាពរបស់អ្នកដឹកនាំក៏ដូចជាប្រជាពលរដ្ឋផង ដែរ ។

ទាក់ទងទៅនឹងបញ្ហានេះ បើតាមសៀវភៅដើម្បីស្វែងយល់ឱ្យកាន់តែច្បាស់របស់លោក ហ្ស៊ សឺដេស ចាងហ្វាងសាលាចុងបូព៌ាទីក្រុងហាណូយប្រទេសវៀតណាម បានបញ្ជាក់ថា ប្រាសាទបាយ័ន មានអាថ៌កំបាំងខ្លាំងណាស់ ដោយសារមាន ប្លង់ស្មុគស្មាញ ទីធ្លាតូចចង្អៀត ដូចអណ្តូងទឹកថែវងងឹត ហើយនៅផ្នែកខ្លះនៃចម្លាក់មិនអាចពន្យល់បានឡើយ តែមានការឯកភាពគ្នាក្នុងប្រវត្តិសិល្បៈ ។ ចំណែកលោក ខ្វឹមហ្វូ-ក្រេ បានយល់ថា ប្រាសាទបាយ័នជាសំណង់ស្ថាបត្យ-កម្មអច្ឆរិយចំណាត់ថ្នាក់លេខ១ ហើយបានប្រៀបដូចសំណង់នេះ ក្នុងរឿងព្រេងនិទានល្អមនោរម្យជាងបណ្តាប្រាសាទនានា ដែលបុព្វខ្មែរបានបន្សល់ទុក ។ រីឯលោក ពីយែឡូទី នៅពេលឃើញប្រាសាទលើកដំបូង បានមានប្រសាសន៍ថា ពេលខ្ញុំងើបក្បាលឡើងលើឃើញប្រាសាទទាំងឡាយត្រង់ជុំវិញ ដូចបន្ទាត់មានពណ៌បៃតងស្រស់ ខ្ញុំភ្ញាក់ភ្លាមមិនដឹងហេតុអ្វី គឺឃើញស្នាមញញឹមទី ៣, ៤ និងទី៥ នៅគ្រប់ទីកន្លែង ។ ចម្លាក់ព្រហ្មមុខបួនដែលលេចឡើងទៅតាមប្រាង្គប្រាសាទនេះ គេសង្កេតឃើញមាននៅប្រាសាទបន្ទាយក្តី បន្ទាយឆ្មារ តាសោម... ដែលបែរព្រះភក្ត្រទៅគ្រប់ទិស បិទព្រះនេត្រមានស្នាមញញឹមប្រកបដោយក្តីមេត្តាករុណាចំពោះមនុស្សគ្រប់ទិសទី ។

ស្នាមញញឹមនៅប្រាសាទបាយ័នត្រូវបានអ្នកប្រាជ្ញជាតិ និងអន្តរជាតិមួយចំនួនបញ្ចេញទស្សនៈផ្សេងៗគ្នាថា រូបព្រហ្មតំណាងឱ្យអ្នកថែរក្សាការពារពិភពលោក គឺមិនមែនរូបព្រះព្រហ្មក្នុងលទ្ធិព្រាហ្មណ៍សាសនាទេ ។ ចំណែកអ្នកដែលមានទំនោរចំពោះស្តេចថារូបនេះជាព្រះបាទជ័យវរ្ម័នទី៧ ដែលជាស្តេចសឹកដ៏អង់អាចក្លាហានក្នុងសមរភូមិសង្គ្រាមបានធ្វើឱ្យទឹកដីខ្មែរចេះផ្សេង និងរុងរឿងដល់កម្រិតកំពូល ហើយព្រះអង្គបានទុកនូវស្នាដៃជាច្រើន សំរាប់មនុស្សជំនាន់ក្រោយ ។ ចំពោះអ្នកដែលមានជំនឿខាងសាសនាថា ព្រះព្រហ្មមុខបួននេះ តំណាងឱ្យទឹកចិត្តមេត្តា ករុណា ឧបេក្ខា និងមុទិតា ខ្លះថា តំណាងឱ្យធាតុ ទឹក ដី ភ្លើង និងខ្យល់ ។

លោក ប៊ុន ធឿន អនុបណ្ឌិតផ្នែកប្រវត្តិសាស្ត្រ និងជាអ្នកស្រាវជ្រាវនៃរាជបណ្ឌិតសភាកម្ពុជាបានឱ្យដឹងថា ក្បាច់ចម្លាក់នៅប្រាសាទបាយ័នពុំដូចនៅប្រាសាទអង្គរវត្តទេ ប៉ុន្តែមានអត្ថន័យស៊ីជម្រៅខ្លាំងណាស់ គឺបានបង្ហាញពីទឹកព្រះទ័យរបស់ព្រះបាទជ័យវរ្ម័នទី៧ច្រើនជាង ។ តាមរយៈចម្លាក់នេះដែរបានបង្ហាញពីប្រភពចំណាសាវទំនៀមទម្លាប់ ប្រពៃណី សិល្បៈ កីឡា ចម្បាំង និងរឿងរ៉ាវផ្សេងៗ ក្នុងសង្គមខ្មែរតាំងពីសម័យបុរាណ ជាពិសេសព្រះមហាក្សត្រ នាម៉ឺនមន្ត្រី និងប្រជាពលរដ្ឋ ។

លោក ប៊ុន ធឿន បានបន្តថា ប្រាសាទដែលមានរចនាបថមុខបួនគ្រប់ទិសនេះ បើយើងមើលពីចម្ងាយហាក់ដូចជាមានរូបព្រហ្មតែមួយ ប៉ុន្តែ ពេលដែលយើងចូលទៅជិតនឹងឃើញកំពូលមុខព្រហ្មតាំងពីក្រោមរហូតដល់លើច្រូងច្រាង ហាក់ដូចជាកំពុងតែបញ្ចេញមហិទ្ធិឫទ្ធិអស្ចារ្យស្នាមញញឹមបង្កប់ដោយភាពរឹងមាំជ័យជំនះមិនចេះរីងស្ងួតរង់ចាំទទួលស្វាគមន៍ភ្ញៀវគ្រប់ទិសទីដោយក្តីអំណរពេកក្រៃ ។ សំណង់ប្រាសាទបាយ័ននេះ មានលក្ខណៈអច្ឆរិយៈខុសប្លែកពីប្រាសាទដទៃ ក្នុងរជ្ជកាលដែលព្រះអង្គបានកសាងឡើងនៅសម័យនោះ ហើយប្រាសាទនេះ ត្រូវបានអ្នកសិក្សាស្រាវជ្រាវចាត់ទុកជាសំណង់ផ្ទាល់របស់ព្រះអង្គ ។ គឺរូបព្រះលោកេស្វរៈ នៅតាមកំពូលប្រាសាទនេះ តំណាងឱ្យព្រះបាទជ័យវរ្ម័នទី៧ ដែលជាមហាវីរក្សត្រ


ចម្លាក់នៅទាហានជើងគោកនៅប្រាសាទបាយ័ន

ដ៏ខ្លាំងក្លាក្នុងការដឹកនាំប្រទេសជាតិ និងបង្រួបបង្រួមសាសនា ដែលបែកបាក់គ្នាពីការគោរពព្រហ្មញ្ញសាសនាមកគោរពព្រះពុទ្ធសាសនាមហាយានវិញ ។

លោកអនុបណ្ឌិតបានបន្តថា ប្រាសាទបាយ័នមិនត្រឹមតែមានក្បាច់រចនាល្អប៉ុណ្ណោះទេ ប៉ុន្តែសំណង់នៃប្រាសាទដែលបុព្វបុរសយើងបានកសាងឡើងនេះ ហាក់ដូចជាមានលក្ខណៈស្មុគស្មាញពិបាកពន្យល់ខ្លាំងណាស់ ។ រហូតមកដល់ពេលនេះ នៅផ្នែកមួយចំនួនពុំទាន់មានអ្នកណាអាចធ្វើការពន្យល់ឱ្យស៊ីជម្រៅស្របទៅតាមលក្ខណៈសំណង់នៅឡើយទេ ។ ទោះជាយ៉ាងនេះក្តីអ្នកប្រាជ្ញជាតិ និងអន្តរជាតិបានចាត់ទុកប្រាសាទនេះ ជាសំណង់ស្ថាបត្យកម្មល្អឯកមួយក្នុងចំណោមប្រាសាទនានានៅសម័យមហានគរ ។ ជាពិសេសប្រាសាទបាយ័នមានកត់ត្រារឿងរ៉ាវជាច្រើនក្នុងរជ្ជកាលព្រះបាទជ័យវរ្ម័នទី៧ ដែលផ្តល់នូវសារប្រយោជន៍យ៉ាងខ្លាំងសំរាប់អ្នកសិក្សាស្រាវជ្រាវប្រវត្តិសាស្ត្រ វប្បធម៌ អរិយធម៌ ប្រជាជនខ្មែរ និងទាក់ទាញភ្ញៀវទេសចរឱ្យមកទស្សនាប្រាសាទអង្គរវត្តកាន់តែច្រើន ។

ប្រាសាទបាយ័នពេលយើងទស្សនានាព្រឹកព្រលឹមឃើញពន្លឺស្រស់ថ្លា គួរឱ្យចាប់អារម្មណ៍ ដែលចាំងប៉ះនឹងចុងព្រឹក្សា ។ នៅពេលថ្ងៃរៀបអស្តង្គតវិញ មានចោលពន្លឺពណ៌មាសឆ្អិនឆ្អៅ ហាក់ដូចជាប្រាសាទមាសអ៊ីចឹង ដែលផុសចេញពីទ្រូងព្រៃព្រឹក្សា ចោលពន្លឺប៉ះព្រះលោកេស្វរៈ កំពុងបញ្ចេញស្នាមញញឹមប្រៀបដូចជារង់ចាំស្វាគមន៍ភ្ញៀវមិនឱ្យទាស់ចិត្តឡើយ ។ ប៉ុន្តែបើយើងទស្សនាពេលរាត្រី ហាក់ដូចជាឋានសួគ៌ាជាន់រកអ្វីប្រៀបពុំបានឡើយ ។ ប្រាសាទដែលមានចម្លាក់ព្រហ្មមុខបួនច្រើនស្មុគស្មាញ តាំងពីក្រោមរហូតដល់កំពូលនេះ សំរាប់ឧទ្ទិសថ្វាយព្រះពុទ្ធសាសនា ដែលគេនិយមហៅថា "ជ័យពុទ្ធមហាលាភ" គឺតំណាងឱ្យព្រះបាទជ័យវរ្ម័នទី៧ ប្រកបដោយព្រហ្មវិហារធម៌ គិតគូរដល់សុខទុក្ខប្រជារាស្ត្រគ្រប់ទិសទី ។ ស្នាមញញឹមនេះ ចង់បញ្ជាក់ថា ព្រះអង្គសព្វព្រះទ័យនឹងបំពេញការងារជូនជាតិមាតុភូមិ និងប្រជារាស្ត្រមិនខ្លាចនឿយហត់ឡើយ ៕

# បច្ចុប្បន្នភាពនៃរឿងមិនគួរកើតនៅកម្ពុជា

## ថ្ងៃកូនរៀបការដន្លងពង្រត់គ្នា ទៅក្រុបទឹកឃ្មុំនៅជាយដែន

**ដោយ : ទីឃាយុ**

ស្នេហាបញ្ច្រាស់ទិស ខុសក្រឹត្យក្រមមួយ ដែលមនុស្សភាគច្រើនទឹកស្មានមិនដល់នោះ គឺថ្ងៃរៀបការកូនកំលោះក្រមុំ បែរជាឪពុកម្តាយជាដន្លងពង្រត់គ្នាទៅក្រុបទឹកឃ្មុំនៅជាយដែនដែរ ។

ស្នេហាឆក់កន្ទៀតនេះ កើតនៅភូមិប៉ែនមាស ឃុំសំរោង ស្រុកត្រាំកក់ ខេត្តតាកែវ ដែលធ្វើឱ្យកូនចៅសាច់ញាតិខ្មាសគេពេញភូមិ ងើបមុខលែងរួច ។

លោក តុក ឌី អាយុ៥១ឆ្នាំ ដែលជាឪពុករបស់កូនក្រមុំ បានរៀបរាប់ថា បានរៀបការជាមួយប្រពន្ធរបស់គាត់ឈ្មោះ ផាន់ ខន អាយុ៤៧ឆ្នាំ តាំងពីកំលោះក្រមុំរហូតមានកូន៧នាក់ ។

ដន្លងរបស់គាត់ឈ្មោះ អួន សំ អាយុ៥០ឆ្នាំ ដែលមានប្រពន្ធឈ្មោះ ទី ឡុន បានមកស្តីដណ្តឹងកូនស្រីគាត់ធ្វើជាភរិយា ។ មុនថ្ងៃរៀបការដន្លងរបស់គាត់តែងមកដឹកប្រពន្ធគាត់ទៅចែកសំបុត្រជូលភ្លេង និងទៅកន្លែងផ្សេងៗ ពេលនោះគាត់ពុំបានចាប់អារម្មណ៍ឡើយ ។

លោក តុក ឌី បន្តថា នៅថ្ងៃមង្គលការកូន ភ្ញៀវកំពុងតែចងដៃកូនយ៉ាងច្រើនកុះករ ស្រាប់តែបាត់ដន្លង និងប្រពន្ធគាត់មិនដឹងទៅណា ទោះបីជាប្រកូកប្រកាសរកយ៉ាងណាក្តី ។ នៅពេលនេះ មង្គលការបានបន្តរហូតដល់ចប់ លុះ៤-៥ថ្ងៃក្រោយមក ទើបទទួលដំណឹងថា ប្រពន្ធគាត់ និងដន្លងបានពង្រត់គ្នាទៅក្រុបទឹកឃ្មុំនៅជាយដែន ។ ដំណឹងនេះ ធ្វើឱ្យគាត់ និងក្រុមគ្រួសារខ្មាសគេលែងបមុខលែងរួច ។

ចំណែកអ្នកស្រី ទី ឡុន អាយុ៤៣ឆ្នាំ ក៏បាននិយាយទាំងហួសចិត្តថា ប្តីរបស់គាត់ឈ្មោះ អួន សំ នេះរៀបការជាមួយគាត់តាំងពីឆ្នាំ១៩៧០ មានកូនរហូតដល់៨នាក់ ហើយមិនដែលបែកចិត្តឆ្គួតអ៊ីចឹងទេ ។

ស្នេហាបញ្ច្រាសទិសនៃដន្លងទាំងពីរនេះ ត្រូវអ្នកស្រុកសើចចំអក ហើយចោទថា បណ្តាលមកពីតណ្ហាគិតមុខភ្លេចគិតក្រោយ ។ កូនក្រុបទឹកឃ្មុំ ម៉ែឪពុកក្រុបទឹកឃ្មុំដែរ វាជារឿងមួយគួរឱ្យអស់សំណើចខ្លាំងណាស់ និងជារឿងមួយដែលទឹកស្មានមិនដល់ផងដែរ ៕

## ក្លាយជាឃាតកសំលាប់បង ព្រោះតែអាណិតអ្នកមានគុណ

**ដោយ : ទីឃាយុ**

យុវជនម្នាក់ដែលជេរប្រមាថ និងវាយដំទៅលើម្តាយបង្កើតរបស់ខ្លួនយ៉ាងឃោរឃៅនោះ ត្រូវប្អូនបង្កើតចាក់នឹងកាំបិតចុងស្រួចស្លាប់យ៉ាងអណោចអធម ។

ហេតុការណ៍នេះ កើតនៅចំណុចភូមិដើមចាន់ សង្កាត់ច្បារអំពៅ ខណ្ឌមានជ័យ ក្រុងភ្នំពេញ កាលពីយប់ថ្ងៃទី២០ ខែមករា ឆ្នាំ២០០៨ ។

ជនរងគ្រោះឈ្មោះ អ៊ុន ជី អាយុ២២ឆ្នាំ ចំណែកឯជនដៃដល់ជាប្អូនឈ្មោះ អ៊ុន វុត្ថា អាយុ១៨ឆ្នាំ អ្នកទាំងពីរមានមុខរបរមិនពិតប្រាកដ រស់នៅភូមិកើតហេតុខាងលើ ។

សាក្សីនៅកន្លែងកើតហេតុនោះបាននិយាយថា នៅយប់នោះ ជនរងគ្រោះបានរៀបចំពិធីផឹកស៊ីស្រវឹងជោកជាំ ហើយបានរករឿងវាយម្តាយរបស់ខ្លួន ។ ខណៈនោះ ប្អូនប្រុសជាឃាតកបានទៅជួយម្តាយ និងអង្វរបងកុំឱ្យធ្វើបាបម្តាយ ព្រោះគាត់ជាអ្នកមានគុណ ។ ប៉ុន្តែ ត្រូវបងវាយទ្រោមខ្លួន ដោយទ្រាំមិនបាននឹងសកម្មភាពរបស់បងប្អូនរូបនោះ ក៏យកកាំបិតស្រួចចាក់ទៅលើបងលិចមួយកាំបិត បណ្តាលឱ្យដេកស្លាប់ក្នុងថ្លុកឈាម ។

ជនរងគ្រោះត្រូវគេបញ្ជូនទៅដល់មន្ទីរពេទ្យ ក៏ដាច់ខ្យល់ស្លាប់ រីឯឃាតកជាប្អូនក៏គេចខ្លួនបាត់ស្រមោល ៕

## ស្រវឹងស្រាកាប់ម្តាយក្មេក៣កាំបិត និងប្អូនថ្លៃ២កាំបិតរងរបួស

**ដោយ : ទីឃាយុ**

ស្ត្រីជាម្តាយ និងកូនប្រុសពីរនាក់ ត្រូវកូនប្រសារទុរយសកាប់ក្នុងបំណងផ្តាច់ជីវិត ។ ហេតុការណ៍នេះ បានកើតនៅថ្ងៃទី២៦ ខែមករា ឆ្នាំ២០០៨ នៅភូមិភ្នំកន្លង់ ឃុំស្តេចគង់ខាងជើង ស្រុកបន្ទាយមាស ខេត្តកំពត ។

ស្រីរងគ្រោះឈ្មោះ ហ៊ុន ឃឿន អាយុ៤៨ឆ្នាំ បានរៀបរាប់ថា នៅយប់កើតហេតុនោះ គាត់បានយកសំឡឱ្យកូនស្រីទទួលទាន នៅពេលនោះ គាត់មិនទាន់មកផ្ទះភ្លាមទេ គឺនៅអានកាសែត ។ មួយសន្ទុះក្រោយមក ស្រាប់តែកូនប្រសាឈ្មោះ ង៉ែត គឹមសឿន អាយុ៣៨ឆ្នាំ ដែលមានអាការស្រវឹងស្រា បានឡើងមកលើផ្ទះ ហើយសួររកកាំបិត ។ ខណៈនោះ គាត់ជាម្តាយបាននិយាយថា រកកាំបិតធ្វើអីទាំងយប់អ៊ីចឹង តែកូនប្រសានោះឆ្លើយថា អញទុកការពារខ្លួន ។

ស្ត្រីរូបនោះបានបន្តថា គ្រាន់តែនិយាយមិនទាន់ចប់ផង កូនទុរយសនេះ បានមកកាប់គាត់ត្រូវ៣កាំបិត ចំណែកឯកូនប្រុសគាត់ឈ្មោះ ពេម សិលា អាយុ១៨ឆ្នាំ ដែលនៅខាងក្រោមផ្ទះ ក៏ស្ទុះឡើងមកជួយត្រូវកូនប្រសាទុរយសនោះកាប់២កាំបិត ត្រូវត្រង់កដួលសន្លប់នឹងថ្លុកឈាមយ៉ាងអណោចអធម ។ លោក គឹម សុខន ប៉ូលិសស្រុកបន្ទាយមាស បានបញ្ជាក់ថា អំពើហិង្សានេះ វាផ្តើមចេញមកពីការស្រវឹងស្រា ហើយកូនប្រសានេះ មានចេតនាចង់សំលាប់ម្តាយក្មេក ព្រោះលួចមានគំនុំនឹងគ្នាយូរមកហើយ ៕

**"ជីវិតសុខសាន្ត បើគ្មានស្រា"**

## គណបក្សប្រជាធិបតេយ្យ ....

រណឫទ្ធិ ពីព្រះប្រធាន ។ ចាប់តាំងពីពេលនោះ មន្ត្រីហ៊្វុនស៊ិនប៉ិច តាំងពីថ្នាក់រដ្ឋមន្ត្រី រដ្ឋលេខាធិការ អភិបាល អភិបាលរង ខេត្ត-ស្រុកបានទៅរួមជាមួយគណបក្សប្រជាជនកម្ពុជា ជាហូរហែរ ។ ខ្លះទៅចូលរួមជាមួយគណបក្ស សម រង្ស៊ី រីឯគណបក្ស សម រង្ស៊ី ខ្លះរត់ទៅគណបក្សសិទ្ធិមនុស្ស ។

ក្រុមគណបក្សប្រជាធិបតេយ្យ ដែលប្រជាពលរដ្ឋកត់សំគាល់នោះ មានគណបក្សហ៊្វុនស៊ិនប៉ិច ដឹកនាំដោយលោក កែវ ពុទ្ធរស្មី, គណបក្ស សម រង្ស៊ី ដឹកនាំដោយលោក សម រង្ស៊ី, គណបក្សសិទ្ធិមនុស្ស ដឹកនាំដោយលោក គឹម សុខា និងគណបក្សនរោត្តម រណឫទ្ធិ ដឹកនាំដោយសម្តេចក្រុមព្រះនរោត្តម រណឫទ្ធិ ។

គណបក្សទាំងបួននេះ កាលពីដើមឡើយកើតចេញពីគណបក្ស ហ៊្វុនស៊ិនប៉ិច ដែលសព្វថ្ងៃនេះកំពុងតែអួតដាក់គ្នា តាមរយៈវិទ្យុសំបុកឃ្មុំ FM105 ។ គណបក្សនីមួយៗមិនត្រឹមតែអួតអាងពីកម្មវិធីនយោបាយក្នុងការដណ្តើមយកជ័យជំនះ នៅពេលបោះឆ្នោតប៉ុណ្ណោះទេ ថែមទាំងធ្វើការទិទៀនគ្នាមិនចេះចប់ ។ កម្មវិធីនេះត្រូវបានប្រជាពលរដ្ឋខ្លះហៅថា ជាការហែកហួរគ្នា រវាងអ្នកប្រជាធិបតេយ្យទៅវិញ ។

ការហែកហួរគ្នានេះ វាមិនបានធ្វើឱ្យអ្នកប្រជាធិបតេយ្យរឹងមាំ និងប្រជាពលរដ្ឋសប្បាយចិត្តនោះទេ គឺជាការខាតបង់មួយដ៏ធំ ហើយអ្នកដែលទទួលផលចំណេញជាងគេ គឺគណបក្សប្រជាជនកម្ពុជា ។

ពួកគេភ្លេចគិតថា ចំនួនអ្នកដែលមានសិទ្ធិចូលរួមបោះឆ្នោតប្រមាណ៧លាននាក់ ហើយក្នុងនោះមាន២លាននាក់ ជាជនជាតិវៀតណាម ដែលមករស់នៅស្រុកខ្មែរ ហើយគាំទ្រគណបក្សប្រជាជន ។

នៅសល់ចំនួន៥លាននាក់ទៀត ជាប្រជាពលរដ្ឋខ្មែរសុទ្ធសាធ ពួកគេទាំងនោះប្រកាន់បក្សផ្សេងៗគ្នា គឺគណបក្សប្រជាជន, ហ៊្វុនស៊ិនប៉ិច, សម រង្ស៊ី, សិទ្ធិមនុស្ស និងគណបក្សនរោត្តម រណឫទ្ធិ... ។

បើគិតពីចំនួនប្រជាពលរដ្ឋខាងលើ គឺគណបក្សប្រជាធិបតេយ្យ មិនអាចដណ្តើមជ័យជំនះបានទេ ហើយអ្នកដែលទទួលជ័យជំនះ គឺគណបក្សប្រជាជនកម្ពុជា ។ ទាក់ទិននឹងបញ្ហានេះ លោក គល់ បញ្ញា នាយកប្រតិបត្តិអង្គការសង្កេតការណ៍បោះឆ្នោត ឈ្មោះ ខុម ហ្វ្រែល (Comfrel) ធ្លាប់បានប្រាប់អ្នកសារព័ត៌មានថា "យើងមិនចោទពួកគេទេ តែជាយុទ្ធសាស្ត្ររបស់គណបក្សធំរៀបចំឡើងដើម្បីបំបែកសំលេងសន្លឹកឆ្នោត" ។

ម្យ៉ាងទៀត ប្រព័ន្ធបោះឆ្នោតក៏ជាកត្តានាំឱ្យមានគណបក្សច្រើន ពីព្រោះថា គ្មានប្រព័ន្ធឯកត្តនាម ។ ដូច្នេះ បើអ្នកណាចង់បង្កើតគណបក្សនយោបាយ ត្រូវចូលរួមជាមួយគណបក្សផ្សេង បើមិនដូចនេះទេ គឺត្រូវបង្កើតគណបក្សខ្លួនឯង ។

គណបក្សជាច្រើនបានបង្កើតឡើងជាច្រើនឆ្នាំមកហើយ ប៉ុន្តែ មិនដែលទទួលបានសំលេងគាំទ្រក្នុងអាសនៈរដ្ឋសភាសោះ តែគេមិនរំលាយចោលទេ ។ ជាក់ស្តែងគណបក្សជាតិខ្មែរ របស់លោក ខៀវ ដារ៉ា ដែលបំបែកចេញពីលោក សម រង្ស៊ី កាលពីឆ្នាំ ១៩៩៧ និងគណបក្សរបស់លោក អ៊ុក ភូរិ (គណបក្សប្រជាធិបតេយ្យខ្មែរ) ។

លោក ហង្ស ពុទ្ធា នាយកប្រតិបត្តិគណៈកម្មាធិការអព្យាក្រឹត្យ និងយុត្តិធម៌ ដើម្បីការ



សម្តេចក្រុមព្រះនរោត្តម រណឫទ្ធិ

បោះឆ្នោត ដោយសេរី និងត្រឹមត្រូវនៅកម្ពុជា ហៅកាត់ថា (និកហ្វិច) ធ្លាប់មានប្រសាសន៍ថា តាមការស្ទាបស្ទង់មតិប្រជាពលរដ្ឋ ដែលអង្គការរបស់លោកបានធ្វើនៅទូទាំងប្រទេសបានបង្ហាញថា គណបក្សដែលទទួលសំលេងគាំទ្រច្រើន ស្ថិតលំដាប់លេខ១ គឺគណបក្សប្រជាជន, គណបក្ស សម រង្ស៊ី លេខ២ និងលេខ៣ គណបក្សសិទ្ធិមនុស្ស ។ រីឯគណបក្សហ៊្វុនស៊ិនប៉ិច និងគណបក្សនរោត្តមរណឫទ្ធិ មិនមានចំណាត់ថ្នាក់ទេ ។

ដើម្បីប្រមូលកំលាំងអ្នកប្រជាធិបតេយ្យឱ្យរួបរួមគ្នាដណ្តើមយកជ័យជំនះនៅពេលបោះឆ្នោតនោះ លោក ម៉ម សូណង់ដូ បានធ្វើការអំពាវនាវចំពោះគណបក្សប្រជាធិបតេយ្យធំៗ៣ គឺគណបក្ស សម រង្ស៊ី, គណបក្សសិទ្ធិមនុស្ស និងគណបក្សនរោត្តម រណឫទ្ធិ ឱ្យរួបរួមគ្នាបង្កើតគណបក្សតែមួយ ។

ការអំពាវនាវរបស់លោក ម៉ម សូណង់ដូ នេះ មានការគាំទ្រពីសំណាក់អ្នកស្តាប់វិទ្យុនេះយ៉ាងខ្លាំង ដែលចង់ឱ្យមានការរួបរួមគ្នាឡើងវិញ ហើយបញ្ចប់នូវការរិះគន់ទិទៀនគ្នា និងបំភ្លេចរឿងរ៉ាវអតីតកាលចោល ។

បើតាមការផ្សាយរបស់កាសែត The Cambodia Daily ចុះផ្សាយថ្ងៃទី០៦ កុម្ភៈ ឆ្នាំ២០០៨ បានបញ្ជាក់ថា លោក មុត ចន្ថា អ្នកនាំពាក្យរបស់គណបក្សនរោត្តម រណឫទ្ធិ មានប្រសាសន៍ថា គណបក្សរបស់លោកត្រៀមខ្លួនជាស្រេច ហើយមានបំណងចូលរួមដោយគ្មានលក្ខខ័ណ្ឌ ដោយទុកឱ្យប្រជារាស្ត្រជាអ្នកសំរេច ។

លោក គឹម សុខា ប្រធានគណបក្សសិទ្ធិមនុស្ស បានសំដែងនូវបំណងចង់ចូលរួមជាមួយគណបក្ស សម រង្ស៊ី ។ ប៉ុន្តែ ក៏បានបញ្ជាក់ថា មិនចង់ចូលរួមជាមួយគណបក្សនរោត្តម រណឫទ្ធិ នោះទេ ពីព្រោះអ្នកគាំទ្រគណបក្សសិទ្ធិមនុស្សយល់ឃើញថា ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ មានព្រះកិត្តិនាមមិនសូវល្អ ។

ចំណែកលោក អេង ឆៃអ៊ាង អគ្គលេខាធិការគណបក្ស សម រង្ស៊ី បានមានប្រសាសន៍ កាលពីថ្ងៃទី៥ កុម្ភៈ ថា "វាគ្មានប្រយោជន៍ទេ ក្នុងការចរចារជាមួយគណបក្សនយោបាយផ្សេងនោះ ។ យើងមានគំនិតនយោបាយផ្សេងគ្នា ហើយយើងមិនខ្ជះខ្ជាយកំលាំង និងពេលវេលានោះទេ" ៕



# ហោរាសាស្ត្រប្រចាំខែ កុម្ភៈ ថ្ងៃទី ១៦-២៩



## ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះដែរ សំខាន់បំផុតលោកអ្នកត្រូវចេះសង្កេតមើលសមាសភាពមនុស្សល្អ និងអាក្រក់ឱ្យបានច្បាស់លាស់ មុននិងសេពគប់ ឬមុននិងធ្វើជំនួញជួញដូរចូលហ៊ុនជាមួយគ្នាទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុង រយៈពេលនេះ ប្រយ័ត្នក្រែងមានអ្នកទីពាចូលជ្រៀតជ្រែក ៕



## ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែលោកអ្នកអាចរកចំណូលបានច្រើនក្រាស់ក្រែលគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំដែរ ។ ឯបញ្ហាស្នេហាគូស្នេហ៍ច្រើនចេះខន្តីដល់គ្នាជានិច្ច ៕



## ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ព្រមទាំងមានបងប្អូនញាតិមិត្តជួយជ្រោមជ្រែងពីគ្រប់ទិសទីទៀតផង ។ ចំពោះគូស្នេហ៍ បើស្គាល់ចិត្តថ្លើមគ្នាយូរហើយអាចគិតគូរឿងអាពាហ៍ពិពាហ៍បាន ៕



## ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកឡើងខ្ពស់ត្រដែតរាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លាគំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វីៗក៏ដោយ ក៏អាចដំណើរការបានស្រួលដែរ ជាពិសេសបើបានជួបចរចាពិគ្រោះពិភាក្សារឿងកិច្ចការងារអ្វីមួយ គឺលោកអ្នកច្រើនមានប្រៀបឈ្នះជានិច្ច ។ ឯបញ្ហាស្នេហាគូស្នេហ៍មានភាពស្មោះត្រង់នឹងគ្នា ៕



## ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះបើមានរឿងជម្លោះកើតឡើង ចូរចេះ អត់ធ្មត់ និងរម្ងាប់ចិត្តឱ្យបានត្រជាក់ដាច់ខាតមិនត្រូវតបតទាំងកំហឹងទល់កំហល់ឡើយ ទើប រឿងតូចមិនអាចក្លាយជារឿងធំបាន ។ ឯបញ្ហាស្នេហាគូស្នេហ៍ច្រើននាំរឿងក្តៅក្រហាយឱ្យគ្នាទៅវិញទៅមក ៕



## ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនិង បញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ លោកអ្នកត្រូវចេះបោះបង់នូវអត្តចរិតឆាប់ខឹងឆេវឆាវចោលឱ្យអស់ពុំនោះទេ មិនត្រឹមតែបង្ករឿងជម្លោះឱ្យកាន់តែរីករាលដាលប៉ុណ្ណោះទេ តែវាអាចរាំងស្ទះដល់ការងាររកស៊ីទៀតផង ។ ឯបញ្ហាស្នេហាគូស្នេហ៍ច្រើនពាក់មុខយក្សដាក់គ្នា ៕



## ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់ កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ លោកអ្នកហាក់មានអារម្មណ៍នៅឯកោ និងរសាប់រសល់នៅក្នុងខ្លួន ដូច្នេះបើមានទុកដាក់របស់មានតម្លៃ ចូរប្រយ័ត្នប្រយែងក្រែងភ្លាំងភ្លាត់ស្មារតីច្រឡំដៃនាំឱ្យបាត់ទទេ ។ ចំពោះស្នេហាគូស្នេហ៍ច្រើនតែប្រចែប្រចណ្ឌគ្នាខុសរឿង ៕



## ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លា គំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វីៗក៏ដោយ ក៏អាចដំណើរការបានស្រួលទាំងអស់ ។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះ ជោគសំណាងរបស់អ្នកមកដល់ ហើយបើអ្នកនៅលីវនឹងមានគេចូលស្តីដណ្តឹងធ្វើជាគូអនាគត ៕



## ឆ្នាំវក : (ពពួកទេវតាប្រុស ធាតុដែក )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះការចេញដំណើរទៅរកស៊ីជួញដូរផ្លូវឆ្ងាយ គឺមិនសូវល្អឡើយ ព្រោះនៅតាមផ្លូវធ្វើដំណើរជួបគ្រោះអាក្រក់ច្រើន ព្រមទាំងអាចនាំរឿងក្តៅក្រហាយត្រឡប់ចូលផ្ទះ ។ ឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះចៀសពុំរួច ៕



## ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿង រកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ អ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ គឺត្រូវដកខ្លួនចេញឱ្យឆ្ងាយពីមិត្តខិលខូច បើពុំដូច្នោះទេ អាចរលាយទ្រព្យ និងជាប់ពាក់ព័ន្ធក្នុងបទល្មើសផ្សេងៗទៀតផង ។ ចំពោះបុរសក្នុងរយៈពេលនេះមិនត្រូវបង្ករឿងឈ្លោះ ជាមួយស្ត្រីភេទឡើយ ព្រោះអាចជួបរឿងប្រុសប្រកាន់ស្រីប្រកែក ៕



## ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះរាល់កិច្ចការងាររកស៊ីជួញដូរមានល្បឿនដូចចែវទូកបញ្ច្រាស់ខ្សែទឹកហូរ គឺពិបាករុលទៅមុខណាស់ ដូច្នេះចូរខិតខំប្រឹងប្រែង ទើបគូប្រជែងមិនអាចយកប្រៀបបាន ។ ឯបញ្ហាស្នេហាគូស្នេហ៍រួមរស់ជាមួយគ្នាបានសេចក្តីសុខក្សេមក្សាន្តណាស់ ៕



## ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វី ក៏ដោយ ក៏អាចដំណើរការបានស្រួលដែរ ជាពិសេសបើបានជួបពិគ្រោះកិច្ចការងាររកស៊ីជួញដូរ គឺឆាប់និយាយត្រូវរ៉ូវគ្នា ។ ឯបញ្ហាស្នេហាគូស្នេហ៍ចេះយល់អធ្យាស្រ័យគ្នាទៅវិញមកទៅមក ៕

# ការតាំងរូបសំណាក....

លោក មឿង សុន តំណាងគណៈកម្មការរៀបចំសិក្ខាសាលានោះ បានឱ្យដឹងថា លោកជាអ្នកផ្តួចផ្តើមកម្មវិធីនេះឡើង ដែលចង់បង្ហាញពីគំនិតឧត្តុង្គឧត្តមក្នុងការទទួលខុសត្រូវវប្បធម៌ជាតិ ។ វប្បធម៌របស់យើងចុះខ្សោយ ដោយសារតែយើងមិនមានមូលដ្ឋានរឹងមាំ ដូចពាក្យស្លោកមួយបានឃ្លាថែងថា "វប្បធម៌រលត់ជាតិរលាយ វប្បធម៌ពណ្ណរាយជាតិរុងរឿង" ។ កន្លងមកលោកបានប្រទះឃើញមានការតាំងរូបចម្លាក់ព្រះបាទជ័យវរ័ន្មទី៧ មិនគ្រប់លក្ខណៈនៅតាមទីសាធារណៈនានា ដែលជាហេតុនាំឱ្យមានការរិះគន់ពីសំណាក់មហាជនជាតិ និងអន្តរជាតិ ។ ការតាំងរូបសំណាក់មិនគ្រប់លក្ខណៈបែបនេះ ធ្វើឱ្យប៉ះពាល់សតិអារម្មណ៍កូនខ្មែរ និងប៉ះពាល់ដល់ព្រះកិត្តិនាមរបស់អតីតមហាក្សត្រដ៏ខ្លាំងថែមទៀតផង ។ គណៈកម្មការស្តីពី "ព្រះបាទជ័យវរ័ន្មទី៧ ក្នុងប្រវត្តិសាស្ត្រខ្មែរ" គ្រោងនឹងធ្វើសំណើរទៅរាជរដ្ឋាភិបាលឱ្យធ្វើការណែនាំចំពោះស្ថាប័នផ្សេងៗ កុំឱ្យតាំងរូបសំណាក់ព្រះបាទជ័យវរ័ន្មទី៧ ដែលពុំគ្រប់លក្ខណៈ ហើយឱ្យដាក់តាំងរូបសំណាក់ដែលគ្រប់លក្ខណៈជំនួសវិញ ។

ព្រះបាទជ័យវរ័ន្មទី៧ ជាមហាវរក្សត្រដ៏ខ្លាំងពូកែជាងគេក្នុងសម័យមហានគរ ដែលបានដឹកនាំប្រទេសជាតិឱ្យមានការរីកចំរើនលើគ្រប់វិស័យ ប្រកបដោយទសពិធរាជធម៌អង់អាចក្លាហានឈ្លាសវៃបំផុត ។ គុណបំណាច់របស់ព្រះអង្គចំពោះជាតិមិនអាចកាត់ថ្លៃបាន ហើយរូបសំណាក់ព្រះអង្គត្រូវបានគេឆ្លាក់ទុកសម្រាប់គោរពបូជារហូតដល់សព្វថ្ងៃ សូម្បីពួកបរទេសក៏ចង់ឃើញ និងស្គាល់ព្រះភ័ក្ត្រព្រះអង្គដែរ ។ ព្រះអង្គ គឺជាព្រះមហាវរក្សត្រមួយអង្គ ដែលមានកិត្តិនាមល្បីល្បាញធ្វើឱ្យសង្គមខ្មែរមានការរីកចម្រើនគ្រប់វិស័យដល់កំពូល ហើយព្រះអង្គ គឺជាមហាវីរៈបុរសខ្មែរស្ថិតក្នុងដួងចិត្តកូនខ្មែរគ្រប់ជំនាន់ ៕

# SPP VIDEO & GIFT SHOP






## ហាងសិលាផ្កាយព្រឹកវីដេអូ និងលក់វត្ថុអនុស្សាវរីយ៍

-ក្រុមហ៊ុនសិលាផ្កាយព្រឹក (SILA PKAY PREK VIDEO ) បានបើកហាងលក់ជុំ,ភាយ.និងជួលកុន ជូនដល់អតិថិជនពីក្រុមហ៊ុនយើងខ្ញុំ , ក្រុមហ៊ុនថៃសេង និងក្រុមហ៊ុន(SILA PKAY PREK VIDEO ) ផងដែរ ។

-ហាងយើងខ្ញុំក៏មានលក់នូវសំលៀកបំពាក់ ស្បែកជើង វត្ថុក្មេងលេង កាបូបរៀន ខោអាវកូនសិស្ស និងវត្ថុអនុស្សាវរីយ៍ផ្សេងៗទៀត ។

សូមអញ្ជើញដោយមេត្រីភាពពីហាងសិលាផ្កាយព្រឹកយើងខ្ញុំ ចាប់បើកពីថ្ងៃនេះតទៅហើយ ។







1001E Pacific Coast Hwy, Ste 125
Long Beach, CA 90806 , Cell: (562) 682 2544

# BELMONT SHORE TRAVEL

## ក្រុមហ៊ុនទេសចរណ៍ និងលក់សំបុត្រយន្តហោះ



- យើងខ្ញុំរីករាយក្នុងការបំរើសេវាជូន

- លោកអ្នកអាចទិញ និង ទទួលសំបុត្រយន្តហោះបានភ្លាមៗមួយរំពេច ។
- តម្លៃសំបុត្រទៅកាន់ប្រទេសកម្ពុជាសមរម្យមិនថ្លៃមិនថោក ។
- EVA Airline
- Cathay pacific Airline
- China Airline
- ប្រភេទយន្តហោះ Boeing ថ្មីទំនើប , បំរើភ្ញៀវដោយហ្មត់ចត់ ដែលធ្វើឱ្យលោកអ្នកមិនខុសបំណងឡើយ !
- ក្រុមហ៊ុនយើងខ្ញុំជួយសំរួល និងយកចិត្តទុកដាក់រាល់កិច្ចការដែលទាក់ទងនឹងការធ្វើដំណើរសំរាប់លោកអ្នកប្រកបដោយសុវត្ថិភាពគ្មានការភ័យព្រួយ ។

**បើលោកអ្នកមាន Green Card ហើយមានអាសន្ន ឬបន្ទាន់ក្នុងករណីណាដែលត្រូវធ្វើដំណើរទៅកាន់ស្រុកខ្មែរ សូមទាក់ទងយើងខ្ញុំដោយរងចាំតែពីរសប្តាហ៍តែប៉ុណ្ណោះ ។**






**ទទួលធ្វើ :**

- លិខិតឆ្លងដែនខ្មែរបន្តឆ្នាំ Cambodia passport ,
- លិខិតឆ្លងដែនខ្មែរ ដែលផុតកំណត់ Cambodia passport Extension

Notary Public

744 Redondo Ave
Long Beach , CA 90804
1-800 - 732 - 9363

Phone : (562) 439-2129
FAX : (562) 439- 2550
belmontshoretravel@charter.net
www. belmontshoretravel.net

M-F : 9:00AM - 6:00 PM
SAT : 10:00 AM - 4:00PM

# ភោជនីយដ្ឋានឋានសួគ៌ថ្មី

## New Paradise Restaurant

1350 EAST ANAHEIM STEET , LONG BEACH ,CA 90813

TEL: (562) 218-0066








ជួបជាមួយអ្នកចំរៀងល្បីៗពីភ្នំពេញ













សូមអញ្ជើញមកពិសារម្ហូបពិសេសសំរាប់គ្រួសារ ពេលបាយ
ថ្ងៃត្រង់ និងពេលល្ងាច ចាប់ពីថ្ងៃ ច័ន្ទ ដល់ ថ្ងៃ ព្រហស្បត្តិ៍

### A : $ 19.95

- សម្លម្ជូរត្រី ( Hot & Sour Fish Soup )
- សាច់គោអាំង ( Beef Stick )
- ប្រហុកខ្ទិះ ( Ground Pork Curry & Fresh Vegetable )

### B : $ 29.95

- សម្លម្ជូរគ្រឿងឆ្អឹងជំនីជ្រូក ( Spare Rib Green Hot & Sour Soup )
- ញាំមាន់ត៉ាំងហ៊ុន ( Chicken Salad )
- ត្រីប្រម៉ាចំហុយ ( Steam Pork Cake & Fresh Vegetable)
- សាច់គោអាំង ( Beef Stick)

### C : $ 38.95

- សម្លម្ជូរត្រី ( Hot & Sour Fish Soup )
- សាច់គោអាំង ( Beef Stick )
- អាម៉ុក (Steam Fish Cake with Coconut Milk)
- សាច់មាន់ឆាប័រ (Sauteed Chicken with Butter Sauce )
- ញាំមាន់ត៉ាំងហ៊ុន

### D : $ 59.95

- សម្លម្ជូរបង្កង និង ត្រី ( Hot & Sour Langostinos & Fish Soup )
- សាច់គោអាំង ( Beef Stick)
- ក្តាមឆាប័រ ( Crab with Special Sauce)
- លាសឆាជីនាងវងម្ទេស ( Clam w/Sweet Basil & Jalopenos )
- ត្រីខ្ទោចំហុយ ( Tilapia Steamed with Ginger Sauce)
- មាន់ឆាគ្រឿង ( Sauteed Chicken with Green Herb & Spices )

### E : $ 78.95

- សម្លម្ជូរបង្កង និងត្រី ( Hot & Sour Langostinos & Fish Soup )
- ភ្លាជើងទា (Bonelees Duck Feet Salad )
- សាច់គោអាំង ( Beef Stick )
- លាសឆាជីនាងវងម្ទេស ( Clam w/Sweet Basil & Jalopenos )
- ត្រីក្រម៉ាចៀនជូរអែម ( Sauteed Rock Cod w/Pineapple & Bell Pepper)
- សាច់គោឡុកឡាក់ ( Beef Cub Salad )

### F : $ 119.95

- ញាំមាន់ត៉ាំងហ៊ុន ( Chicken Salad )
- សម្លម្ជូរបង្កង និង ត្រី ( Hot & Sour Langostinos & Fish Soup )
- ត្រីក្រម៉ាចំហុយ ( Steam pork Cake & Fesh Vegetable )
- ឆាក្តាម ( Sauteed Crab )
- សាច់គោឡុកឡាក់ ( Beef Cub Salad )
- ឆាបង្កង ( Lobster )

**BEER , WINE , COCKTAIL**

ភោជនីយដ្ឋានយើងខ្ញុំមានទីកន្លែងស្អាត មានអនាម័យល្អ មានផាសុខភាព សេវាកម្មរហ័សទាន់ចិត្ត មានមុខម្ហូបឆ្ងាញ់ឆ្ងាញ់
ជួបជាមួយតន្ត្រីក្រុមល្បីៗ ហើយមានស្រាល្បីៗមកពីបរទេសពិភពលោក កំដរដោយតារាចំរៀងល្បីៗមានសំនៀងពិរោះ

First AMERICAN TEAM REALTY ™

ជំនាញឯកទេសជាទីទុកចិត្តនិងស្មោះត្រង់ចំពោះលោកអ្នក

- ពន្យល់ណែនាំពីកិច្ចការទូទៅដែលទាក់ទងនឹងការលក់, ទិញផ្ទះ, ហាងជំនួញ និងដីធ្លី ។
- បង្ហាញលោក-អ្នកឱ្យយល់ទូវពីធីខ្ចីប្រាក់សាងសង់ ឬជួសជុលផ្ទះជាដើម ។
- បើលោក-អ្នកមានចម្ងល់ជុំវិញការលក់ផ្ទះ និងទិញផ្ទះ សូមអញ្ជើញទាក់ទងខ្ញុំបាទគ្រប់ពេលវេលា តាមអាស័យដ្ឋានខាងក្រោម :

Mr. Monorom Neth
Licensed Realtor
2501 Cherry Ave.,#100 • Signal Hill, CA 90755
Office (562) 427-7765 Ext.333
Cell (562) 483-7333 Fax (562) 427-0767

ALL TRANSMISSION & CLUTCH

មាន ឥណទានជ្រើ

complete
- Auto RePair
- Engine
- Tune Up
- Brakes

-ជួសជុលគ្រប់ប្រភេទប្រអប់លេខរថយន្តលោកអ្នក ដែលបើកមិនទៅមុខមិនថយក្រោយ ឬនៅពេលលោកអ្នកបញ្ចូលលេខ,ឡានរបស់លោកអ្នកត្រូវកញ្ឆក់ខ្លាំង ឬឮសម្លេងរោទិ៍ជា

Rebuild
Automatic Transmission
(Front Wheel Drive & Over Drive ) MANUAL Transmission
រថយន្តគ្រប់ជុន

TRANSMISSIONS & CLUTCH 494-6968
TRANSMISSION PARTS
MOTOR TUNE-UP
COMPLETE AUTO

(562)494-6968
2800E .PCH Hwy . Long Beach , CA 90804

HILLSIDE CHIROPRACTIC & REHAB CENTER

AUTO COLLISION . WORK INJURY . SPORT INJURY

មន្ទីរពេទ្យចាប់សរសៃ

Dr. Rene Uong D.C

Receptionist

Alfredo Munoz Jr. LMT
Massage Therapy

Dr. Hanh Bullee, D.C.

សូមអញ្ជើញ ដោយមេត្រីភាព

ទទួលព្យាបាលជំងឺដូចជារោគៈ
.ឈឺក្បាល . វិលមុខ. ឈឹក . ឈឺចង្កេះ. ឈឺស្មា .ដៃជើង . ចុករោយសាច់ដុំ . ស្ពឹកដៃជើង .
អស់កម្លាំងខ្សោយ . ធ្វើសរសៃ . គ្រោះថ្នាក់ចរាចរ ។ល។ ខ្ញុំ Dr. Rene E.Uong និយាយភាសាខ្មែរ

2760E. SPRING STREET, SUITE 150 , LONG BEACH, CA 90806
PHONE : (562) 424-1200, FAX : (562) 424-1214

FULL SERVICE TREATMENT

- Personal Injury /Sports Injury
- Wellness Care ▸Work Related Injuries
- Chironctic Care ▸Chironpratic Care
- Chironic Pain Syndromes
- Physical Therapy
- Customize Rehabilitation ▸Massage Therapy
- Program ▸Complete physical Exams
- Posture/Body Mechanics ▸Athletes-DMV / DOT
- Per / Post Operation Care ▸Nutritional Analysis
- Neck and Back School
- Auto Accident Care Specialist
- Therapy Products

CHIROPRACTIC IS PROVEN EFFECTIV IN THE TREATMENT OF MANY COMMON AILMENTS INCLUDING...

- Headaches ▸Neck Pain ▸Back Pain
- Shoulder and Arm Pain ▸Leg Pain ( Sciatical )
- Carpal Tunnel Syndrome
- Numbness & Tingling
- And Many Other Common Heath Issues
- Joint Stiffness ▸Muscle Spasms ▸Dise Hemiation
- Scoliosis ▸Low Energy ▸Stretss

សូមស្វាគមន៍!

ភោជនីយដ្ឋាន សុភី

Sophy´s CAMBODIAN & THAI CUISINE

ភោជនីយដ្ឋានជាទីពេញចិត្តរបស់លោក-អ្នក ជាមួយម្ហូបខ្មែរ
ថៃ ចំរុះគ្រប់មុខដែលមានរសជាតិឈ្ងុយឆ្ងាញ់គួរឱ្យពិសារ ។

3720E. Anaheim St., 102 . Long Beach, CA 90804
Tel: (562) 494-1763 Delivery FREE with Purchase of $15.00 or More